សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

Free

Issue 157
17th- July 30th, 2014

# អគ្គីភ័យនៅក្រុងខ្មែរឡូវែល

## Fire on Branch Street, Lowell





តាសាក់ អស់កូនប្រុស កូនប្រសារ និងចៅ៧នាក់

អភិបាលក្រុង រ៉តនី អេលិយុត - ប្រធានសមាគម បុផ្ផា មេឡូនព្រះសង្ឃ មកជួបពលរដ្ឋរងទុក្ខ

ដោយ : ខ្មែរផុស ស រ អា

**ក្រុងឡូវែល:** អគ្គីភ័យមួយបានកើតឡើងនៅផ្ទះល្វែងមួយស្ថិតនៅលើផ្លូវ ប្រាន់ឆ៍ នាថ្ងៃព្រហស្បតិ៍ ទី១០ ខែកក្កដា ឆ្នាំ២០១៤។ ក្នុងចំណោម៩ ឃុនីត មាន៧ ឃុនីតនៃគ្រួសារខ្មែរដែលរស់នៅទីនោះ ។

មិនទាន់មានការសន្និដ្ឋានណាមួយដែលបកស្រាយពីមូលហេតុនៃការឆាបឆេះនេះនៅឡើយ ។ ផ្អែកទៅលើប្រភពដែលសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកទទួលបានពេលទៅជាសាក្សីនៃទីកន្លែងកើតហេតុបានឱ្យដឹងថាមានមនុស្ស៧នាក់បានស្លាប់ក្នុងអគ្គីភ័យនេះ ។ រីឯជនរងគ្រោះដែលរងរបួសត្រូវបានបញ្ជូនទៅមន្ទីរពេទ្យ ។

បច្ចុប្បន្នជនរងគ្រោះ និងក្រុមគ្រួសារត្រូវបានជម្លៀសយកទៅស្នាក់នៅជាបណ្តោះអាសន្ននៅមជ្ឈមណ្ឌលមនុស្សចាស់នៃក្រុងឡូវែល (Lowell Senior Center) ។





១-ទុង សាក់ ២-អេឡែន វង់ ៣-អន់តូនី ១២ឆ្នាំ ៤- វ៉ាយិន ៩ឆ្នាំ ៥-សាយូរី ៧ ឆ្នាំ ៦-ទីណា គ្រីស្តាឡូស ៣៨ ឆ្នាំ ៧- តាម្នាក់ អាយុ៧ឆ្នាំ

ហេតុដែលបណ្តាលឱ្យមានខ្មែររងគ្រោះច្រើនយ៉ាងនេះ ពីព្រោះផ្ទះដែលឆេះនោះស្ថិតនៅក្នុងក្រុងខ្មែរដែលជាតំបន់ដែលសម្បូរខ្មែររស់នៅច្រើនជាងគេនៃរដ្ឋម៉ាសាឈូសែត ។ សេចក្តីរាយការណ៍ពីបុព្វហេតុនៃអគ្គីភ័យដែលគេរង់ចាំការផ្សព្វផ្សាយ១សប្តាហ៍មកហើយបាននិយាយថា គឺប្រើ្ទមឆេះដោយសារខ្សែភ្លើងចាស់ប៉ះគ្នាក្នុងជញ្ជាំងឆេះអស់យ៉ាងយូរមុនពេលផ្ទះអគ្គីភ័យឡើងពុំមែនដោយសារឆេះកាំជ្រួចដែលស្តុកក្នុងផ្ទះនោះទេ។ ក្រសួងគ្រប់គ្រងផ្ទះបានមកឆ្លងការត្រួតពិនិត្យឆ្នាំ២០១៣ ជាមួយអាគារដែលមានចំណាស់១០០ឆ្នាំហើយនោះម្ចាស់ផ្ទះឈ្មោះ សញ្ជ័យ ប៉ាថែល ក៏ពុំបានទទួលការផាកពិន័យពីការធ្វើខុសច្បាប់ណាមួយដែរ ។ លោកស្រី វ៉ាអិន ម៉ារីយាន ធ្វើការជាឌីស្ទ្រីកអាច់រទី សង្កាត់១៨ និយាយថាមានការឱ្យសញ្ញា៤យ៉ាងទៅក្រុមពន្លត់អគ្គីភ័យមានការហៅ៩១១ពីក្នុងផ្ទះកំពុងឆេះហៅ៩១១ពីអ្នកជិតខាងការហៅដោយប៉ូលិសល្បាតតាមផ្លូវនឹងមានអ្នកដែលទៅគោះទ្វារស្ថានីយពន្លត់ភ្លើងដែលនៅក្បែរនោះ ។ សាក្សីម្នាក់និយាយថា ខ្លួនភ្ញាក់ដឹងខ្លួនដោយសារផ្សែងចូលដល់បន្ទប់ ហើយភ្លើងឆេះដល់មាត់ទ្វារបន្ទប់ដេកទៅហើយដែរ...អ្នកស៊ើបអង្កេតបុព្វហេតុភ្លើងឆេះនិយាយថា ខ្សែភ្លើងឆេះផ្ទុំក្នុងជញ្ជាំងយូរហើយពុំមាននរណាដឹងជាមុនទេរហូតដល់មានគេបើកទ្វារខ្យល់ក៏បក់នាំខ្យល់ថ្មីចូលមកធ្វើឱ្យភ្លើងឆាបខ្លាំងឡើងមួយរំពេចធ្វើឱ្យឡានពន្លត់ភ្លើងទប់ភ្លើងមិនឈ្នះនេះជាចម្លើយចំពោះការសង្ស័យថារថពន្លត់ភ្លើងទៅកន្លែងកើតហេតុមិនទាន់ពេល ។ អាគារសំណល់ពីឆេះបានត្រូវសម្រេចឱ្យរំលំចោលនាថ្ងៃអង្គារនេះ ប៉ុន្តែលោក ស្ទេហ្វ មេធាវីនៃអ្នករងគ្រោះនៅបុស្តុនបានដាក់ពាក្យប្តឹងទប់ស្កាត់ការរំលំនេះដើម្បីរកការពិតឱ្យឃើញជាមុនសិនការរំលំចោលនេះក៏ត្រូវពន្យាពេល ។

សហគមន៍ទាំងមូលបានប្រមូលប្រជុំគ្នា

តទៅទំព័រទី ០៤



# បទសម្ភាសន៍ជាមួយនាង យោម បុប្ផា

**ដោយ : ពិន សំខុន**

ជ័យលាភីរង្វាន់ ជេម ឡសន់ នៅមហាវិទ្យាល័យ ចើហ្វ បសស្តុន សហរដ្ឋអាមេរិកស្តីពីការតស៊ូអហឹង្សា គឺនាង យោម បុប្ផា សកម្មជនដីធ្លីនៅតំបន់បឹងកក់បន្ទាប់ពីទទួលបដិសណ្ឋារកិច្ចដោយអង្គការតស៊ូអហឹង្សានឹងសកម្មជនល្បីៗឯទៀតក្នុងពិភពលោកអស់ពេញ១សប្តាហ៍នៅបសស្តុនរដ្ឋធានីនៃរដ្ឋម៉ាសាឈូសែតស.រ.អា.មកក៏បានចូលមកជួបសហគមន៍ខ្មែរនៅឡូវែល នាថ្ងៃសៅរ៍ នឹងអាទិត្យទី២១មិថុនានេះ មុននឹងធ្វើដំណើរតាមយន្តហោះបន្តទៅរដ្ឋធានីវ៉ាស៊ីនតោនទៀតនាព្រឹកថ្ងៃចន្ទទី២៣ ។

នាង យោម បុប្ផា អាយុ៣៤ឆ្នាំ បានផ្តល់បទសម្ភាសនិមួយជូនខ្មែរផុសស.រ.អា. នៅមុនពេលចេញដំណើរថា :

**សំនួរ:** តើដំណើរមកដល់ក្រុងឡូវែលបងប្អូនខ្មែរយើងទទួលនាងបានសមរម្យទេ? យោម បុប្ផា : ចា! ខ្ញុំសូមអរគុណលោក ពូ សំខុន នឹងបង សូបិន ដែលបានជួយរៀបចំឱ្យខ្ញុំបានជួបបងប្អូនខ្មែរនៅឡូវែលនេះខ្ញុំមានសេចក្តីរីករាយណាស់



**អ្នកស្រី យោម បុប្ផា**

នឹងមានកិត្តិយសដ៏ធំធេងដែលបានមកដល់ឡូវែលនឹងបានទទួលពានរង្វាន់នេះ

**សំនួរ:** បងប្អូនខ្មែរយើងនៅឡូវែលនេះ មិនសូវស្គាល់បុប្ផា ជានរណាទេ ដឹងតែស្ថានភាពនយោបាយទូទៅរបស់ខ្មែរស្រាប់តែបុប្ផាលេចមកដល់ទីនេះ បន្ទាប់ពីជាប់គុក៤៤៤ថ្ងៃនៅកម្ពុជាដោយសារការតស៊ូមតិប្រឆាំងនឹងរដ្ឋាភិបាល តើបុប្ផាអាចនិយាយពីជីវិតតស៊ូនោះឱ្យយើបានដឹងផងដែរឬទេ?

**យោម បុប្ផា:** ខ្ញុំទទួលស្គាល់ថា ជីវិតនៅក្នុងពន្ធនាគារវាមិនជាស្រួលទេ ប៉ុន្តែខ្ញុំក៏មិនចង់និយាយពីការលំបាកឱ្យខ្លាំងដែរ នាំឱ្យបងប្អូនមានការភ័យខ្លាច ដូច្នេះខ្ញុំគ្រាន់តែនិយាយថា ដំបូងឡើយគេយកខ្ញុំ

ទៅដាក់ពន្ធនាគារក្នុងក្លែងតូចចង្អៀតមានទំហំ៦គុណ១៥ម៉ែត្រ ហើយមានអ្នកទោស១៣៥នាក់ដាក់ក្នុងនោះ នេះគឺដើម្បីបំបាក់ស្មារតីខ្ញុំឱ្យឆាប់បាក់ស្បាតម្យ៉ាងទៀត គេឱ្យខ្ញុំប្តិតមេដៃទាំងដប់ឱ្យទទួលស្គាល់កំហុសដែលខ្ញុំមិនបានធ្វើខ្ញុំមិនព្រមផ្តិតគេរក **តទៅទំព័រទី ២១**





អ្នកស្រី យោម បុប្ផា ជួបនិងតំណាងខ្មែរសហគមន៍ខ្មែរឡូវែល

# វត្តខ្មែរថ្មីទើបនឹងចាប់កំណើតនៅឡូវែល

**ដោយ : ខ្មែរប៉ុស្ដិ៍ស.រ.អា.**

**ឡូវែល:** វត្តទើបនឹងចាប់កំណើតថ្មីមួយឈ្មោះវត្តខ្មែរសាមគ្គីសន្តិការាមស្ថិតនៅ៨៥ tyngboro Rd. North Chelmford MA 01863 ទើបនឹងប្ដើមធ្វើបុណ្យពិសាខបូជារបស់ខ្លួនជាលើកដំបូងបង្អស់កាលពីថ្ងៃទី១២កក្កដា២០១៤ ជាមួយពុទ្ធសាសនិកប្រមាណជិត២០០នាក់ ។ ទឹកមុខស្រស់ស្រាយនៃឧបាសកឧបាសិកាដែលយើងបានជួបនៅទីតាំងជាវត្តអារាមថ្មីបានត្រូវព្រះសង្ឃព្រះនាម ហូ ឈីវនាថ ពិពណ៌នាថា ទីកន្លែងធំទូលាយជាងមុន ហើយបញ្ហាក៏សង្ឃឹមថានឹងត្រូវបញ្ចប់។








បញ្ហានឹងត្រូវបញ្ចប់ ជាប្រយោគដ៏គួរឱ្យសង្វេកនឹងសោកស្ដាយដល់អ្នកដែលទ្រទ្រង់ព្រះពុទ្ធសាសនាថេរវាតនៅឡូវែលដែលបានយកពេល១៥ឆ្នាំហើយនឹងលុយពុទ្ធបរិស័ទច្រើនលានដុល្លាសម្រាប់ប្ដឹងផ្ដល់គ្នាទៅតុលាការអាមេរិកាំងដើម្បីឱ្យជួយសម្រេចរកម្ចាស់វត្តពិតប្រាកដមកគ្រប់គ្រងវត្តត្រៃរតនារាម ដែលនៅចម្ងាយប្រមាណ១មាយ៍ពីវត្តថ្មីមួយនេះ...ក៏ប៉ុន្តែមេឃស្រឡះលាក់ពពកខ្មៅនៅឯជើងមេឃនៅឡើយ ។ ជាក់ស្ដែងណាស់ នៅឡូវែលនេះសហគមន៍ខ្មែរមានវិបត្តិផ្នែកមេដឹកនាំដ៏សំខាន់មួយ ក្នុងចំណោមវត្ត៣ ដែលមានឈ្មោះថាអារាមសាធារណខ្មែរ តែក្រុមអ្នកដឹកនាំវត្តកំពុងដោះស្រាយយកឈ្នះជាឯកជនតែរឿង៧ខ្លួន ដោយមានវត្ត២កំពុងរងនូវកេរ្តិ៍ឈ្មោះអាសោចវត្តទី១ បង្កភាពអាសោចជាប្រចាំដោយកាពារឱ្យរក្សាព្រះសង្ឃដែលសាធារណជនដឹងថាដាច់អាបត្តិដោយរឿងមានផ្លូវភេទជាមួយស្ត្រីជើងវត្តនឹងកសាងវត្តដោយលក់ព្រះបដិមាករ វត្តទី២ត្រូវបានបែកជា២ បន្ទាប់មកត្រូវរដ្ឋអំណាចបិទដោយការមិនបានគោរពបទបញ្ញានៃច្បាប់ រីឯវត្តចុងក្រោយក៏បានឈ្មោះមានកេរ្តិ៍ប្រសើរជាងគេដោយគ្មានគូរប្រកួត ។ ឥឡូវនេះក្រុមវត្តទី២ ដែលបានបែកទីកន្លែង ហាក់ដូចជានៅស្ងប់ស្ងៀមសុខសាន្តខាងវត្តលើបំបែកយកអាគិតូចដែលរដ្ឋមិនបានបិទ លើដីវត្តត្រៃរតានារាម មកនៅតែម្នាក់ឯង រីឯវត្តក្រោមត្រូវខ្ចាតទៅជួលអាគិតមួយនៅកន្លែងថ្មីសម្រាប់ព្រះសង្ឃគង់។ នៅខែកក្កដា ២០១៤នេះ វត្តក្រោម ក៏សម្រេចជាឯកជនបង្កើតវត្តថ្មីមួយទៀតឈ្មោះវត្តខ្មែរសាមគ្គីសន្តិការាម គឺនៅកន្លែងថ្មីនេះ ហើយដែលផ្ដល់សេចក្ដីសុខសាន្តជាបណ្ដោះអាសន្នដល់ព្រះសង្ឃនឹងពុទ្ធបរិស័ទចំនុះជើងវត្ត ។

ដោយរង់ចាំពីធីបញ្ចុះសីមាវត្ត យើងសូមប្រសិទ្ធីពរមហាប្រសើរដល់វត្តខ្មែរសាមគ្គីសន្តិការាម ។ ភាពសុខសាន្តអចិន្ត្រៃយ៍នឹងកើតមាននៅទីអារាមសាធារណដោយសារដំណោះស្រាយជាសាធារណពុំមែនដោយសារល្បិចជាឯកជនណាមួយនោះទេ ៕

## តមកទំព័រទី ០២ អគ្គីភ័យនៅក្រុងខ្មែរឡូវែល...

ចូលរួមមរណទុក្ខគ្រួសារអ្នកស្លាប់នឹងរំលែកទុក្ខអ្នករងគ្រោះទាំងអស់នៅវត្តពន្លឺពុទ្ធចក្រមានទាំងអភិបាលក្រុងរ៉ត្តនី អេលីយ៉ុត ថែមទាំងអភិបាលរដ្ឋ ប៉ទ្រីក ឌុយវ៉ល ក៏ចូលរួមដែរ ។ ដឹកមុខដោយសមាគមខ្មែរនឹងចូលរួមដោយសមាគមអង្គរក្រុងខ្មែរនិងតំណាងសហគមន៍ច្រើនទៀត បានអំពាវនាវរកជំនួយផ្ដល់ឱ្យគ្រួសារអ្នករងគ្រោះប្រមូលបាននាល្ងាចថ្ងៃអាទិត្យនោះ ៣៤.៨១៤ដុល្លា សមាគមវប្បធម៌ខ្មែរប្រមូលថវិការនាវេលាថ្ងៃត្រង់នៃថ្ងៃដដែលបាន៤.៧០៤ដុល្លា ដែលលោក រ៉ាឌី ម៉ម ថានឹងប្រគល់ដាក់ហិបសមាគមខ្មែរដែរ រីឯអ្នកដែលចូលជួយវិភាគទានតាមអិនទ័រណេតសមាគមខ្មែរ រហូតមកដល់រាត្រីថ្ងៃពុធនេះ បាន៨.៣៧៧ដុល្លា។ មូលនិធិទាំងអស់នេះ នឹងបញ្ជូនទៅគ្រួសារអ្នករងគ្រោះដោយភ្លើងឆេះកាលពីថ្ងៃ១០កន្លងទៅតាមសេចក្ដីសម្រេចតំណាងសហគមន៍នៅថ្ងៃក្រោយ ។

រដូវនេះជារដូវក្ដៅសីតុណ្ហភាពកើនឡើង ដូចនេះប្រការយកចិត្តទុកដាក់រួមមានការបើកបិទកុងតាក់ប្រើប្រាស់អគ្គិសនី និងជើងក្រានហ្គាសត្រូវបង្កើនការប្រុងប្រយ័ត្ន ។ បន្ថែមលើនេះក្រុមគ្រួសារខ្មែរដែលប្រកាន់ព្រះពុទ្ធសាសនាមានការអុជធូបទៀនក្នុងផ្ទះត្រូវពិនិត្យមើលឱ្យបានសព្វគ្រប់ ជ្រុងជ្រោយក្នុងការពន្លត់ពេលចាកចេញពីផ្ទះ ដើម្បីចៀសវាងអកុសលជាយថាហេតុដូចអគ្គីភ័យខាងលើ ៕



អភិបាលក្រុង រ៉ដនី អ៊ីលៀត



ប្រធានសមាគមខ្មែរ បុប្ផ មេឡូន






# ផ្លាស់ប្តូរអ្នកគ្រប់គ្រងនៅសមាគមខ្មែរនៅហ្វីឡាដែលហ្វៀ

**ដោយ : ខ្មែរផុសសហរដ្ឋអាមេរិក**

**ហ្វីឡាដែលហ្វៀ:** សមាគមខ្មែរនៅហ្វីឡាដែលហ្វៀនឹងមានការផ្លាស់ប្តូរអ្នកគ្រប់គ្រងដោយអ្នកស្រី រីង ស៊ន នាយិកា បម្រើសមាគមតាំងពី ១៥ឆ្នាំមកហើយ បានលាលែងចេញពីតំណែងចាប់ពីដាច់ខែសីហា ២០១៤ នេះទៅហើយ។ សមាគមនៅកំពុងជ្រើសរើសបេក្ខជនប្រធានប្រតិបត្តិថ្មីដែលគេពុំទាន់ដឹងថា នឹងបានទៅអ្នកណានៅឡើយទេ ។

នៅក្នុងឱកាសដ៏លំបាកដែលសមាគមខ្មែរ



ស្ទើរគ្រប់កន្លែងប្រឈមមុខនឹងឱនភាពថវិកាដែលករណីនេះ ផ្តោតទៅលើការប្តូរទិសនៃជំនួយបានន័យថា សហគមខ្មែរបច្ចុប្បន្នបានក្លាយទៅជាខ្មែរអាមេរិកាំង រីឯជំនួយដែលបានពីមុនៗគឺក្នុងនាមជាខ្មែរភៀសខ្លួន។

មកទល់ពេលនេះ សមាគមខ្មែរនៅហ្វីឡាដែលហ្វៀឈ្មោះថា Cambodian Association of Greater Philadelphia (CAGP) មានទីស្នាក់ការធំរបស់ខ្លួននៅផ្លូវលេខ៥ ហ្វីឡាដែលហ្វៀខាងជើង និងសាខាថ្មីមួយទៀត នៅផ្លូវលេខ៧ ហ្វីឡាដែលហ្វៀខាងត្បូងនៅមានសាខាទីបីមួយទៀត ដែលជាអំណោយរបស់សមាគមព្រឹទ្ធាចារ្យខ្មែរ នៅផ្លូវលេខ៦ខាងត្បូងនៅមិនទាន់ប្រើប្រាស់ច្បាស់លាស់នៅឡើយ។

ប្រធានសមាគមខ្មែរកំពុងតែប្រកាសស្រាវជ្រាវបេក្ខជននាយកប្រតិបត្តិសមាគមថ្មីដែលមានសមត្ថភាពគ្រប់គ្រាន់ក្នុងការដឹកនាំសមាគមរបស់ខ្លួននៅគ្រប់ទីកន្លែងនៃសហរដ្ឋអាមេរិក។

អ្នកស្រីរីង ស៊ន បានបម្រើសមាគមខ្មែរប្រកបដោយភាពស្និតស្នាល និងជាទីគាប់ចិត្តសហគមដែលពុំមានដំណឹងអាស្រូវណាមួយកើតឡើងរំខានភាពថ្លៃថ្នូរ និងប្រសិទ្ធភាពការងាររបស់អ្នកស្រីឡើយ។ អ្នកស្រីបាននិយាយប្រាប់ខ្មែរផុសសហរដ្ឋអាមេរិកថា អ្នកស្រីមានការហត់នឿយនឹងការងារដ៏ច្រើន ទើបសម្រេចចិត្តលាលែងពីមុខតំណែងដើម្បីឱ្យមានការសម្រាកក្នុងជីវិតបានខ្លះ។

ខ្មែរផុសសហរដ្ឋអាមេរិកសូមជូនពរឱ្យការងាររបស់អ្នកស្រីនៅពេលខាងមុខប្រកបដោយជោគជ័យសម្រាប់ខ្លួនផង និងសហគមន៍ផងដូចដែលអ្នកស្រីធ្លាប់បានធ្វើ ៕

# សមាគមន៍ខ្មែរបង្ហាញម៉ូដ សម្លៀកបំពាក់ប្រពៃណីខ្មែរ និងសម័យ

**អត្ថបទដោយ : ម៉ូនីផល ប៊ីង**

**ប្រែសម្រួលជាខេមរភាសាដោយ: សុខា**

**ក្រុងឡូវែល:** ធ្វើនៅក្លឹបកំសាន្តក្រោន (Crown) នាថ្ងៃសុក្រទី ២៧ ខែមិថុនា ឆ្នាំ ២០១៤ សមាគមខ្មែរ (CMAA) បានបង្កើតជាកម្មវិធីបង្ហាញម៉ូដដែលដើរម៉ូដដោយយុវជនយុវនារីខ្មែរអាមេរិកាំងមានរូបសម្បត្តិស្រស់ស្អាត និងសង្ហា។ កម្មវិធីបានលើកទឹកចិត្តដល់យុវជនយុវនារីទាំងនោះ បានស្វែងយល់មួយចំណែកធំ អំពីខ្លឹមសារនៃការស្លៀកពាក់សម្លៀកបំពាក់ប្រពៃណីខ្មែរមានសម្លៀកបំពាក់អាពាហ៍ពិពាហ៍រាត្រីសមោសរ ឬសម្លៀកបំពាក់នៅពេលទៅវត្ត ឬបុណ្យទាននានាជាដើម។ ក្រៅពីវត្តមានម្ចាស់កម្មវិធីរួមមានបុគ្គលិកសមាគមខ្មែរ មានប្រធានគណកម្មការនាយក បុប្ផា មេឡូន (Bopha Melone) នាយកប្រតិបត្តិ សុវណ្ណា ពៅ (Sovanna Pouv) នាយកប្រតិបត្តិរូប ដឺវុលភៀល្យេរ៉េ (Voop De Vulpelereir) និងប្រធានកម្មវិធីនានានៃសមាគមខ្មែរមានភ្ញៀវកិត្តិយសជាតិ និងអន្តរជាតិផ្សេងទៀត ព្រមទាំងអ្នកដឹកនាំស្ថាប័ននានាក្នុងសហគមន៍បានចូលរួមក្នុងកម្មវិធីរាត្រីនោះ។

គួរបញ្ជាក់ផងដែរ ការតុបតែងខ្លួន និងសម្លៀកបំពាក់ប្រពៃណីខ្មែរត្រូវបានឧបត្ថម្ភដោយសម្អាងការទេពសូត ច្នៃម៉ូដដោយ ចិន្តា ខុន ឯផ្នែកសម័យច្នៃម៉ូដដោយ TRIVD; Chris Oung & G.


Princess chan poety perform


Executive Director Sovanna pouv speaking to the audience


Vitchka kong & Ricky orng


Virak dy and vitchka kong


Princess chan and Steven kin

# "An Enchanted Evening of Fashion"

## Lowell CMAA Fundraiser

**By Moniphal Bing, KhmerPostUSA Intern**

LOWELL June 28th -- Lights, models, and cameras, the Cambodian Mutual Assistance Association (CMAA) hosted "An Enchanted Evening of Fashion" at Crown to raise fund for the CMAA programs.


Female models in modern clothing

"This event, we would like to celebrate the richness and the beauty of our cultures," said VirakUy, CMAA Board member and the head coordinator of the event. From traditional Khmer clothing to modern western clothing, the audiences were mesmerized by the beauty of clothing and 'distinctive walks' by the young models.

Behind the dresses, many Cambodian -American young models felt by getting involved in this glamorous event has connected them to their Cambodian roots.

Princess Chan, age 20, who wore the traditional engagement dress in the bridal ceremony during the fashion show commented, "It's hard to learn the Khmer culture when it's been difficult to speak to my mom cause' she still living in the 'war". As a spoken-word poet, **Continued to page 09**

# ប្រធានក្រុងខេវិន មឺហ្វី ពង្រឹងយុទ្ធសាស្ត្រលើកស្ទួយក្រុងឡូវែល

## City Manager Kevin Murphy the large marketing campaign for the City of Lowell

**ដោយ : សុខា**


City manager Kevin Murphy

**បែលវឺជៀះ** បុគ្គលសំខាន់ៗដែលជាកម្លាំងចលករនៃក្រុងឡូវែលបានធ្វើការជួបជុំពិភាក្សានៅល្ងាចថ្ងៃព្រហស្បតិ៍ កាលពីចុងខែមិថុនា ឆ្នាំ២០១៤ ដើម្បីពិភាក្សាអំពីការអភិវឌ្ឍផ្នែកទីផ្សារសំដៅផ្សព្វផ្សាយក្រុងឡូវែលឱ្យក្លាយជាទីល្បីល្បាញមានកិត្តិនាមល្អ ដូចពីអតីតកាល។

កិច្ចប្រជុំនាថ្ងៃនោះផ្តួចផ្តើមចេញពីគំនិតរបស់ប្រធានក្រុង ខេវិន មឺហ្វី (City Manager Kevin Murphy) ។ វត្ថុបំណងរបស់លោក គឺដើម្បីបំផុសនូវថាមពលដល់ក្រុងឡូវែលបន្ថែមទៀតក្នុងការបង្ហាញមុខមាត់របស់ខ្លួនឱ្យកាន់តែប្រសើរឡើង។ ខ្លឹមសារនេះប្រព្រឹត្តទៅជាសកម្មភាពដោយផ្សារភ្ជាប់ទៅនឹង"វគ្គដោះដូរយោបល់" ឬ "Feedback Session"។ វគ្គនេះ ផងដែរ ត្រូវបានសម្របសម្រួលដោយអ្នកស្រី ស៊ូសាន ហាលធី នាយកកម្មវិធីវប្បធម៌នៃក្រុងឡូវែល។

ផ្អែកតាមប្រសាសន៍ អ្នកស្រីស៊ូសាន ហាលធី ដែលជាអ្នកសម្របសម្រួលកម្មវិធីនោះ អ្នកស្រីបានមានប្រសាសន៍ថា អ្នកស្រីទទួលបាននូវចក្ខុវិស័យវិជ្ជមានពីភ្ញៀវដែលបានចូលរួម ហើយដែលអ្នកទាំងនោះតាំងចិត្ត និងបញ្ជាក់នូវការចូលរួម និងបណ្តាក់ទុន លើកស្ទួយក្រុងឡូវែលតាមរបៀបដែលគេអាចធ្វើបាន ដូចជាការលើកស្ទួយសាលាយូម៉ាសឡូវែលសាលាមីដលសិក ឬភោជនីយដ្ឋានក្នុងតំបន់ឡូវែល ដូចជាខូបលស្តូនជាដើម។

គួរបញ្ជាក់ផងដែរ កម្មវិធីល្ងាចនោះប្រព្រឹត្តទៅនៅភូមិគ្រឹះ ជែក & ធែរីអូរខ័រណ័រ (Home of Jack and Terry O'Connor) ដោយមានការអញ្ជើញចូលរួមពីអភិបាលក្រុងឡូវែល រ៉ដនីអេលៀត ( Mayor Rodney Elliott) ប្រធានក្រុង ខេវិន មឺហ្វី (City Manager Kevin Murphy) ដែលជាអ្នកផ្តួចផ្តើមគម្រោងនេះឡើង ព្រមជាមួយវត្តមានទីប្រឹក្សាក្រុងរីតា មឺស្សី (Councilor Rita Mercier) ទីប្រឹក្សាក្រុង ខរី ប៊ីលែនជឺ (City Councilor Corey Belanger) ទីប្រឹក្សាក្រុង វីលៀម សាម៉ារ៉ាស់ (Councilor William Samaras) ដែលបានផ្តល់ជាមតិល្អៗគួរពិចារណាសុទ្ធសឹងជាយោបល់សំខាន់ៗ។ ក្រៅពីនោះ គឺវត្តមាននៃស្ថាប័នរដ្ឋ និងឯកជនផ្សេងទៀតដូចជាម្ចាស់ភោជនីយដ្ឋានខូបលស្តូន (Cobblestones)ស្កត់ និង ខាស្សលីន (Scott and Kathleen Plath) ជាដើម៕


City manager Kevin Murphy, Ms. Susan Halter, Ms. Soben Pin

Continued to page 06

# "An Enchanted Evening of Fashion"

she also performed her poetry, 'When the War Begun' during the event.

Seda Meas, age 21, "When I was younger, my parents told me to dress appropriately to the temple in order to keep Khmer culture alive, until I got older, I started to appreciate our cultures more" said Meas, one of the models.

Regina Sor, age 21, wearing Khmer traditional for the fashion show made her felt 'who she is. "I always wear American clothing cause' it simple to put on, but in Cambodian clothing, it's more detailed and we came from a people who are very detailed into perfection," said Sor.

Finally, Ricky Orng, age 23 shared with KhmerPost USA "Getting involved with CMAA's fashion show was the right decision for me. I like to be educated and CMAA has given me the access to teach me more about my cultures."

All Models participated in the fashion shows were: Female Models: Marlena Ton, Lada Lau Seda Meas, Charvie Khloy, Tiffany Choun, McKayla Chao, Regina Sor, Princess Chan, Lianna Kushi, Vichtcha Kong, Sayda Em. Male models: Kevin Chea, Eric Ponn, Peter Sieng, Ricky Orng, Steven Kim. Designers: Tepsou Bridal; Chenda Khon, TRIVD; Chris Oung & G.


Trivd Clothing Brand



# GEOPOLITICS, POWER PLAYS, AND LUST
## By Brian Kenneth Swain

Just completed Ambassador Siv's first foray into the fiction realm. Fans of his memoir Golden Bones will recognize the familiar political themes, in particular the strong focus on international relations, both professional and, in this case, personal. The novel is filled with intertwining relationships between world leaders, behind-the-scenes actors, and family members, all of whom have some involvement, either direct or tangential, with the turmoil developing in a west African nation (the "Golden State" of the book's title). The story includes many fictionalized details from the author's real life, including his experiences with the Civil Air Patrol, motorcycle touring, and being inducted as an honorary commander of a C-5M squadron in San Antonio, Texas. These accounts play well with the complexities inherent in numerous powerful countries (e.g., Russia, China, France, and the U.S.) all vying for influence and power in a remote but resource-rich part of the world. If you're interested in a fictional account of global politics, written by an author who has done it for real, this book is for you.



# អត្ថន័យបុណ្យ៤ កក្កដា សម្រាប់សហរដ្ឋអាមេរិក

**អត្ថបទដោយ : រីឆាដ ហូវ**
**ប្រែសម្រួលជាខេមរភាសាដោយ : សុខា**

បុណ្យឯករាជ្យជាថ្ងៃបុណ្យជាតិដ៏សំខាន់សម្រាប់សហរដ្ឋអាមេរិកដែលត្រូវបានប្រារព្ធធ្វើតៗគ្នាមកតាំងតែពីថ្ងៃទី៤នៃខែកក្កដាឆ្នាំ១៧៧៦។ បុណ្យឯករាជ្យនេះប្រារព្ធឡើង ដើម្បីជាសក្ខីភាពទៅនឹងថ្ងៃប្រកាសឯករាជ្យដោយតំណាងអាមេរិកទាំង១៣ ដែលស្ថិតនៅក្រោមអាណានិគមនៃចក្រព័ទ្ធអង់គ្លេស។

ចងក្រងដោយ ថូម៉ាស ចេហ្វឺសិន សេចក្តីពន្យល់អំពីការប្រកាសឯករាជ្យនេះ បញ្ជាក់ថាចំនួន១៣ នៃអាណាចក្រអាមេរិកនោះលែងស្ថិតនៅក្រោមអាណានិគមរបស់ចក្រព័ទ្ធអង់គ្លេសតទៅទៀតហើយ ប៉ុន្តែប្រទេសដែលត្រូវបានផ្តល់ឱ្យមានសេរីភាព និងឯករាជ្យនេះ ត្រូវមានឈ្មោះថា ជាសហរដ្ឋអាមេរិក។

បន្តិចក្រោយមករដ្ឋឯករាជ្យថ្មីថ្មោងនេះត្រូវវិវត្តឆ្លងកាត់សង្គ្រាមក្នុងប្រទេសដែលបានបញ្ចប់នៅឆ្នាំ១៧៨៣ ហើយពលរដ្ឋនៃរដ្ឋដែល

**តទៅទំព័រទី ១១**


សមាគមអតីតយុទ្ធជនខ្មែរនៅហ្វីឡាដែលហ្វៀ


ព្យុះហយាត្រានៅឡូវែល

# July 4th- Independence Day

Independence Day is a holiday in the United States that celebrates the adoption on July 4, 1776 of the Declaration of Independence by representatives of the thirteen American colonies which were then at war with Great Britain. Written primarily by Thomas Jefferson, the Declaration of Independence explained the reasons why the colonies had revolted and stated that the thirteen colonies were no longer part of the British Empire but were instead a free and independent country called the United States of America.

Soon after the American Revolutionary War ended in 1783, citizens of the newly created United States began celebrating the 4th of July as the birthday of America. Since then, celebrations have come to include parades, fireworks, band concerts, picnics, baseball games and family reunions.

The city of Lowell celebrated Independence Day this year with a large fireworks display on the banks of the Merrimack River with the LeLacheur Park baseball stadium available to the public for viewing (although the fireworks were rescheduled from July 4 to July 5 to due heavy rain). The town of Chelmsford celebrates the 4th of July each year

**Continued to Page 11**

# សមាជិកសភាខ្មែរពីររូបមកឡូវែល

**ដោយ : ខ្មែរផុស ស.រ.អា**

កាលពីរាត្រីទី៥កក្កដា២០១៤ នៅភោជនីយដ្ឋានសំពៅមាសគណបក្សសង្គ្រោះជាតិនៅឡូវែលប្រមាណ១០០នាក់បានរៀបចំទទួលភ្ញៀវកិត្តិយសរបស់ខ្លួន គឺលោក ម៉ៅ មានីវ៉ាន់ សមាជិកសភាអាណត្តិទី៣មណ្ឌលកំពុងចាមជាគណអចិន្ត្រៃយ៍របស់បក្សនឹងលោក ញ៉យ ចំរើន សមាជិកសភាថ្មីមណ្ឌលកំពុងចាមដូចគ្នាជាអគ្គលេខាគណកម្មការប្រតិបត្តិបក្សសង្គ្រោះជាតិមកពីភ្នំពេញចូលរួមជាភ្ញៀវកិត្តិយសផងដែរ គឺដំណាងរាស្ត្រ២រូបទៀតដែលនៅឡូវែលនេះស្រាប់ គឺលោកវេជ្ជបណ្ឌិត កែវ សម្បត្តិ និងលោក ង៉ោ គីមឈឿង ។ ចូលរួមជាគណធិបតីនារាត្រីនេះដែរ គឺលោក អ៊ុន សុខុម ជាប្រធានស្ដីទីគណបក្សសង្គ្រោះជាតិប្រចាំម៉ាសាឈូសេត ខណៈដែលសមាជិកស្នូលរបស់គណបក្សច្រើនគ្នាអវត្តមានដោយសារបុណ្យឯករាជ្យជាតិអាមេរិកាំងក្នុងរាត្រីដ៏សំខាន់ដែលគណកម្មការនាយកគណបក្សបានបញ្ជូនតំណាងរាស្ត្ររបស់ខ្លួនឱ្យមកធ្វើបេសកកម្មនៅឡូវែល ។ មានការបញ្ចាំងវីដេអូរំលឹកពីសកម្មភាពវីកវរនយោបាយនៅទីក្រុងភ្នំពេញបង្កឡើងដោយក្រុមបាតុករចេញមកទទួលមេដឹកនាំនៃបក្សប្រឆាំងរូបភាពបង្ក្រាបយ៉ាងសាហាវយង់ឃ្នងរបស់យោធារដ្ឋាភិបាលទៅលើបាតុករអហិង្សាជាពិសេសការវាយរបស់កងកម្លាំងប្រដាប់ដោយដំបងដែកមកលើសមាជិកសភាខ្មែរ លោក ញ៉យ ចំរើន បណ្តាលឱ្យរងរបួសក្បាលជាទម្ងន់... ។ល។

ពិធីករនាពេលរាត្រីនោះគឺ សុបិន ពិន នឹងសុវណ្ណដារា នាងបានណែនាំឱ្យស្គាល់គណធិបតីអញ្ជើញភ្ញៀវមកនិយាយសម្តែងការចាប់អារម្មណ៍ម្នាក់ម្តងៗមានទាំងសំនួរចម្លើយ រហូតដល់ម៉ោង១០មុននឹងក្រុមភ្លេងសម័យចាប់បន្ទរកំសាន្តរហូតដល់អាធ្រាត ៕


អ៊ុន សុខុម,កែវ សម្បត្តិ,ម៉ៅ ម៉ូនីវណ្ណ,ង៉ោ គីមឈៀង


អ៊ុន សុខុម


តំណាងរាស្ត្រជួបស្រស់ស្រាយទាក់ទងនិងភ្ញៀវមកពីតំបនឆ្ងាយៗ


រាំកំសាន្តក្នុងកម្មវិធី

តមកពីទំព័រទី ១០

# អត្ថន័យបុណ្យ៤ កក្កដា

ទើបតែកើតថ្មីថ្មោងនេះ ក៏ចាប់ផ្តើមប្រារព្ធថ្ងៃទី៤ កក្កដា ជាថ្ងៃកំណើតនៃជាតិសាសន៍អាមេរិក ។



តាំងពីពេលនោះមកពីធីបុណ្យឯករាជ្យជាតិអាមេរិកធ្វើឡើងមានការគួបផ្សំពីការដើរព្យុះហយាត្រា ការដុតកាំជ្រួច ការប្រគុំតន្ត្រី ការខ្ចាប់អាហារទៅញ៉ាំនៅរមណីយដ្ឋាននានា ការមើលការប្រកួតបាល់អោប ឬការជួបជុំគ្រួសារជាដើម ។

ឆ្នាំនេះ ក្រុងឡូវែលបានធ្វើការប្រារព្ធពិធីបុណ្យឯករាជ្យជាតិ និងលើកកម្មវិធីដុតកាំជ្រួចទៅថ្ងៃទី៥ ខែកក្កដាវិញ ត្បិតមូលហេតុអាកាសធាតុមិនអំណោយផលនាថ្ងៃទី៤ ហើយកម្មវិធីដុតនិងទស្សនាកាំជ្រួច ធ្វើនៅពហុកីឡាដ្ឋាន លេឡឺធី ប្របនឹងដងស្ទឹងមែរីម៉ាក់ ។

ស្របគ្នានោះដែរ មានការដុតកាំជ្រួចជាឯកជន ទោះបីការដុតកាំជ្រួចឯកជនជាសកម្មភាពមិនស្របច្បាប់នឹងត្រូវផាកពិន័យ៣០០ដុល្លារ ។

សហរដ្ឋអាមេរិកជាជាតិមួយនៃជនអន្តោប្រវេសន៍ ហើយជនអន្តោប្រវេសន៍ជាផ្នែកមួយដែលបានចាក់គ្រឹះតាំងពីកំណើតនៃជាតិមួយនេះ។ រាល់ជនអន្តោប្រវេសន៍ដែលបានភៀសខ្លួនមកកាន់ទឹកដីនេះ គឺដើម្បីស្វែងរកសេរីភាព និងឯករាជ្យភាពដែលមានចែងច្បាស់ក្នុងរដ្ឋធម្មនុញ្ញប្រទេសនេះ។ ដូច្នេះជាប្រការប្រពៃថ្លៃថ្នូរ និងសក្តិសមនៅពេលដែលពួកគេចូលរួមអបអរបុណ្យនេះទាំងអស់គ្នារាល់រដូវក្តៅ ៕

# គណបក្សសង្គ្រោះជាតិត្រូវអ្នកគាំទ្រសង្ស័យ ពីព្រោះតស៊ូយូរពេក

**អត្ថបទវិភាគ ដោយ : ពិន សំខុន**

ឱកាសដែលគណបក្សសង្គ្រោះជាតិបានបង្ហាញ



ថា ខ្លួនមានកម្លាំងគាំទ្រគ្រប់គ្រាន់សម្រាប់ឈ្នះយ៉ាងហោចណាស់ក៏មាន២ដងដែរ ចាប់តាំងពីបោះឆ្នោតសាកលនាខែកក្កដាឆ្នាំ២០១៣មក ។

មកទល់ពេលនេះគេនៅតែមិនឃើញគណបក្សសង្គ្រោះជាតិរំកិលចេញពីតុចរចាបាន ហើយផ្តើមដឹកនាំវាសនាជាតិនៅឡើយ ១ឆ្នាំក្រោយមកក្តីសង្ឃឹមរបស់ពលរដ្ឋដែលចូលរួមតស៊ូជាមួយក៏ថមថយថែមទាំងនឹកទៅដល់អសមត្ថភាពក្នុងការដឹកនាំជាតិរបស់គណបក្សសង្គ្រោះជាតិទៀតផង ។ ហេតុអ្វី?

**១-**មេបែកបាក់គ្នា? លោក សម រង្ស៊ី នឹងលោក កឹម សុខា មានចារឹកតស៊ូស្ទិតស្វាញក្លាហានដូចគ្នា តែរបៀបបង្ហាញឆន្ទៈ មិនដូចគ្នាទេ ដែលអ្នកវិភាគមិនត្រូវវិនិច្ឆ័យតែលើសម្បកនោះទេ រីឯជម្រៅវិញ អ្នកទាំងពីរូប ក៏មិនទាន់មានការបង្ហាញថាខ្លួនទទ់ជង្គង់ ចំពោះមុខលុយ ឬមុខអំណាច ឬក៏មុខអំពើហឹង្សាម្តងណានៅឡើយទេ ។ ប្រាកដជាមានការខ្វែងយោបល់គ្នាជាមិនខាននៅពេលដឹងថា ឈ្នះឆ្នោតហើយ បែរជាលោក ខៀវ កញ្ញារីទ្ធ

តទៅទំព័រទី ១៥

Continued from page 10

# July 4th- Independence Day

with a mammoth parade that attracts marching bands, emergency vehicles,

military units and elected officials from all over the region. Many peple gather at their homes with

family members for cookouts that usually feature hot dogs, hamburgers, corn on the cob and ice cream. Sometimes individuals light fireworks even though the private use of fireworks is illegal in Massachusetts and subject to a $300 fine in the city of Lowell.

The United States is a nation of immigrants and immigrants have been part of Lowell since its founding. Many who have come to America

from other countries did so because of the freedoms and rights that were listed in the Declaration of Independence. It is certainly appropriate to celebrate these freedoms each summer.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនាន់ថ្មីសម្រាប់ព័ត៌មានល្អៗសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី១៤ ខែកក្កដា ឆ្នាំ២០១៤

# រដ្ឋាភិបាលយោធាថៃ ជួយឱ្យប្រព័ន្ធផ្សព្វផ្សាយទទួលបានព័ត៌មានច្បាស់ស្តីពីពលករចំណាកស្រុក

**ដោយៈ ជូលៀ វ៉ាឡើស and សាំង សុគន្ធរិទ្ធ ।**

**June 30, 2014**

ស្រះកែវ, ប្រទេសថៃ-នៅឯសន្និសីទសារព័ត៌មានមួយកាលពីថ្ងៃសុក្រ ធ្វើឡើងក្នុងគោលបំណង "លើកកម្ពស់ការយល់ដឹងផ្នែកសង្គម" មន្ត្រីរដ្ឋាភិបាលយោធាថៃបានជួបជាមួយអ្នកកាសែតខ្មែរជិត១០០នាក់នៅទីនេះ ដើម្បីនិយាយការពារការបង្ក្រាបរបស់រដ្ឋាភិបាលយោធាលើការងារខុសច្បាប់ដែលបានចាប់ផ្តើមកាលពីដើមខែនេះ ។

ចាប់តាំងពីធ្វើរដ្ឋប្រហារដណ្តើមអំណាចបានកាលពីចុងខែមុនមករដ្ឋាភិបាលយោធាថៃបានចាប់ផ្តើមបង្កើតទំនាក់ទំនងជាមួយសាធារណជន ហើយបង្ក្រាបការប្រឆាំងនឹងរបបរបស់ខ្លួនដែលមានបំណង" នាំមកនូវសេចក្តីសុខដល់ប្រជាជនឡើងវិញ" ។ កាលពីថ្ងៃព្រហស្បតិ៍រដ្ឋាភិបាលយោធាថៃបានប្រកាសថា ខ្លួនបង្កើតគណៈកម្មការឃ្លាំមើលប្រព័ន្ធផ្សព្វផ្សាយដើម្បីរកសញ្ញាប្រឆាំងនឹងខ្លួន ។

អំឡុងសន្និសីទសារព័ត៌មានកាលពីថ្ងៃសុក្រនៅឯទីបញ្ជាការយោធាខេត្តស្រះកែវ ទាហានថៃចាក់សាក់ និងដែលស្លៀកឯកសណ្ឋានយោធាបានលើកកាហ្វេ និងនំដាក់លើថាស ពណ៌ផ្កាឈូកបម្រើភ្ញៀវ ។ ផ្ទាំងរូបភាពធំៗនៅច្រកចូលទីបញ្ជាការយោធានេះបង្ហាញពីទិដ្ឋភាពទាហានថៃជួយពលករចំណាកស្រុកខ្មែរ លើកអីវ៉ាន់ និងជួយបីកូនតូចរបស់ពលករចំណាកស្រុកម្នាក់ ។

លោក ផាការ៉ាថន ទានឆៃ (Phakrarathorn Tianchai) អភិបាលខេត្តស្រះកែវ បានថ្លែងទៅកាន់អ្នកកាសែតថា "រដ្ឋាភិបាលចង់ឱ្យប្រព័ន្ធផ្សព្វផ្សាយទាំងអស់របស់កម្ពុជាចុះផ្សាយអត្ថបទមួយដែលសរសេរថា រដ្ឋាភិបាលថៃមិនបានបង្ក្រាបពលករចំណាកស្រុកខ្មែរ ដើម្បីសងសឹកទេ ។ វាមិនមែនជាគោលនយោបាយរបស់យើងទេ ។ រដ្ឋាភិបាលថ្មីចង់ធ្វើកំណែទម្រង់រដ្ឋាបាលរបស់ខ្លួន ។ រដ្ឋាភិបាលយោធាចង់រៀបចំឡើងវិញ និងរស់នៅដោយសន្តិភាព" ។

អ្នករៀបចំកម្មវិធីឈ្មោះ សុខ សុវណ្ណ និង ប្រាសិត សាងរុងរឿង (Prasit Sangrungrueng) មកពីសហភាពប្រព័ន្ធផ្សព្វផ្សាយអាស៊ាន (Union Media of Asean) ដែលជាសមាគមអ្នកកាសែតថៃ និងខ្មែរមានមូលដ្ឋាននៅក្នុងខេត្តស្រះកែវបានរំឭកដាស់តឿនបណ្តាអ្នកកាសែតដែលចូលរួមក្នុងពិធីនេះមិនឱ្យសួរសំណួរស្តីពីនយោបាយថៃឡើយ ។

ទោះបីជាបែបនេះក្តី ក៏មន្ត្រីថៃ នៅតែត្រូវបានសាកសួរសំណួរធ្ងន់ៗមួយចំនួនដែលអំពីរំហូរពលករចំណាកស្រុកយ៉ាងគំហុកដែលបានមកដល់ភ្លាមៗមួយរំពេច និងដែលបានធ្វើឱ្យមន្ត្រីកម្ពុជារកតែត្រៀមខ្លួនទុកមុនក៏មិនទាន់ ។

លោក ផាការ៉ាថន បានអះអាងថា "រដ្ឋាភិបាលថៃ ថ្មីនេះមិនបានបង្ក្រាបលើពលករចំណាកស្រុកទេ ។ រដ្ឋាភិបាលថៃរីករាយនឹងឆ្លើយ និងយល់ពីគ្នាទៅវិញទៅមក ។ រដ្ឋាភិបាលសូមបញ្ជាក់ជាថ្មីម្តងទៀតថា វិធីល្អបំផុត គឺត្រូវបង្កើតមណ្ឌលសម្រាប់ពលករចំណាកស្រុកស្វែងរកការងារធ្វើដែលមានសុវត្ថិភាពយោងទៅតាមច្បាប់រដ្ឋ និងផ្តល់ប្រាក់ខែខ្ពស់ ។ នោះគឺជាឆន្ទៈរបស់រដ្ឋាភិបាលថ្មី ហើយវានឹងប្រសើរឡើងជាងពីមុន" ។

ពេលសួរអំពីសេចក្តីរាយការណ៍ដែលលើកឡើងថា មន្ត្រីថៃបានបាញ់បំបែកកង់រថយន្តមួយគ្រឿងដឹកពលករចំណាកស្រុកខ្មែរពេញ កាលពីថ្ងៃទី១៥ ខែមិថុនា ដែលបណ្តាលឱ្យមនុស្សប្រាំមួយនាក់បាត់បង់ជីវិតលោក សុរិយា ផាវ៉ារី (Suriya Paowaree) មេបញ្ជាការយោធាខេត្តស្រះកែវបានមានប្រសាសន៍ថា លោកក៏ដឹងពីឧបទ្ទវហេតុនេះដែរ ។ លោកបានមានប្រសាសន៍ទៀតថា "អំឡុងពេលនោះ យើងកំពុងពង្រឹងសន្តិសុខទាហានបានព្យាយាមឃាត់ពួកគេ ប៉ុន្តែអ្នកបើករថយន្តបានព្យាយាមបើកគេចខ្លួន ។ យើងចាត់វិធានការ ឱ្យដោយសារទង្វើរបស់ពួកគេឈ្លើយពេក" ។ **តទៅទំព័រទី ១៣**



Cambodian journalists snap photographs with Thai soldiers during a press event on Friday at the Sa Kaeo military office in Thailand. (Julia Wallace/The Cambodia Daily)

# Thai Junta Helps Media Get Migrant Story Straight

**BY JULIA WALLACE AND SAING SOENTHRITH | JUNE 28, 2014**

SA KAEO PROVINCE, Thailand - At a press event on Friday aimed at "enhancing social understanding," officials from Thailand's military government met with nearly 100 Cambodian journalists here to defend the junta's handling of a crackdown on illegal labor that began earlier this month.

Since seizing power in a coup late last month, the Thai junta has embarked on a public relations offensive to tamp down dissent against its regime, whose stated aim is "returning happiness to the people." On Thursday, it announced that it would set up panels to monitor the media for signs of dissent.

During Friday's press junket at the Sa Kaeo provincial military office, tattooed Thai soldiers in military fatigues were enlisted to serve coffee and cakes on tiny pink trays. Large posters at the building's entrance showed scenes of Thai soldiers helping Cambodian migrant workers carry their bags and cuddling a migrant's baby.

"The government wants all Cambodian media to print an article that says the Thai government did not crack down on Cambodian migrant workers in retaliation," Sa Kaeo governor Phakarathorn Tianchai told journalists.

"It is not a policy. The new government wants to reform its administration. The junta wants to reorganize and live in peace."

Journalists in attendance were warned not to ask questions about Thai politics by the event organizers, Sok Sovann and Prasit Sangrungrueng of the Union Media of Asean, an association of Thai and Cambodian journalists based in Sa Kaeo.

Nonetheless, the Thai officials were peppered with a number of critical questions about the migrant exodus, which came suddenly and left Cambodian officials initially unprepared.

"The new Thai government did not crack down on migrant workers," Mr. Phakarathorn insisted. "The Thai government is very happy to answer this and understand each other. The government asserts again that the best way is to create a center for migrant workers to find work that is safe according to state law and provides a good salary."

Asked about reports that Thai officials had shot out the tires of a car full of Cambodian migrants on June 15, causing two people to die, Sa Kaeo military commander Suriya Paowaree said he was aware of the incident.

"During that time, we were strengthening security. The soldiers tried to stop them, but the car driver tried to escape. We acted [because] their action was very rude."

After proclamations of friendship, photo sessions, and a lunch of green curry and fried chicken drumsticks, journalists were driven to visit a new "one-stop office" set up by Thai authorities near the Aranyaprathet border crossing. The office is meant to bring Cambodian migrant workers back into the country rapidly and legally.

Senior Sergeant Sakorn Sukosi of the Thai Immigration Police said around 110 new staff members had been brought in to man the operation. Around 100 Cambodian workers were processed on Thursday, the center's first day in service, but hundreds more were streaming through on Friday.

As Cambodians walked across the border, they were given numbered tags to hang around their necks. They were then lined up and ushered into an air-conditioned office, where they waited at stations to have their identity documents checked and be photographed and fingerprinted. The cost of a new migration permit was just 80 baht, around $2.50, down from 800 baht, about $25, before the crackdown.

After finishing the process, Sun Phearom, 23, and his three brothers, Pheara, Phea and Roat, relaxed under a tent as they clutched their new pink Thai identity cards, good for two months. All of them had migrated for the first time in April from their hometown in Banteay Meanchey province, enlisting the services of a local people-smuggler who took them across the border and find them jobs in Bangkok for a fee of about $67 each.

They had been happy with their new jobs at a large food market in Bangkok, where they worked ladling out soup and filling buns with chopped meat, for around $10 a day. But they returned home two weeks ago on their parents' orders.

"We heard the Thai military was shooting Cambodians. We heard from one to another, and it made our parents concerned, and they called us home," said Phearom.

The brothers said they had been issued temporary identification books by Banteay Meanchey authorities in lieu of applying for an official Cambodian passport, but this was enough to get them legally into Thailand for the next year. The books cost just 25,000 riel, about $6, a fraction of the sum they had paid the smuggler.

"I'm feeling comfortable, not like previously, because now I'm working legally and not illegally," Phearom said. "I feel safe."

Banteay Meanchey deputy governor Oum Reatrey, who also attended the event, spent time chatting with returned migrants and said he was impressed with the center, but noted that the cheerful operation was also a deft public relations move.

"That is part of the Thai junta-they lure you," he said. "You know the Thai junta, they are trying to **Continued to page 21**

ឌឺ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឺ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី១៤ ខែកក្កដា ឆ្នាំ២០១៤

## តមកពីទំព័រទី ១២ រដ្ឋាភិបាលថៃជួយឱ្យប្រព័ន្ធផ្សព្វផ្សាយ...

បន្ទាប់ពីការប្រកាសពីទំនាក់ទំនងមិត្តភាព "កម្ពុជា និងថៃដូចជាបងប្អូន" ពិធីថតរូបអនុស្សាវរីយ៍ និងទទួលទានអាហារថ្ងៃត្រង់ គឺសម្លការី និងមាន់បំពងអ្នកកាសែតត្រូវបានដឹកទៅទស្សនានៅ" ការិយាល័យច្រកចេញចូលតែមួយ "ថ្មីមួយដែលអាជ្ញាធរថៃបានបង្កើតឡើងនៅជិតចំណុចឆ្លងព្រំដែនអារ៉ាញ់។ ការិយាល័យនេះមានគោលបំណងនាំពលករចំណាកស្រុកខ្មែរចូលទៅក្នុងប្រទេសថៃវិញឱ្យបានឆាប់រហ័ស និងដោយស្របច្បាប់។

អនុពលបាលឯក សាកន ស៊ូកូស៊ី (Sakorn Sukosi) មកពីផ្នែកនគរបាលអន្តោប្រវេសន៍ថៃ បានមានប្រសាសន៍ថា បុគ្គលិកថ្មីៗប្រហែល ១១០នាក់ត្រូវបាននាំចូលឱ្យមកធ្វើការនៅមណ្ឌលនេះ។ ពលករខ្មែរប្រហែល១០០នាក់ត្រូវបានឆ្លងកាត់ដំណើរការធ្វើលិខិតស្នាម កាលពីថ្ងៃព្រហស្បតិ៍ជាថ្ងៃដំបូងដែលមណ្ឌលនេះបើកផ្តល់សេវាកម្ម ។

នៅពេលប្រជាពលរដ្ឋខ្មែរដើរឆ្លងព្រំដែន ពួកគេត្រូវបានផ្តល់កាតមានបង់លេខពាក់នៅនឹងក។ បន្ទាប់មកពួកគេតម្រង់ជួរគ្នាចូលទៅក្នុងការិយាល័យម៉ាស៊ីនត្រជាក់កន្លែងដែលពួកគេរង់ចាំពិនិត្យឯកសារសម្គាល់ខ្លួន និងថតរូប ហើយផ្តិតម្រាមដៃ ។ ថ្លៃលិខិតអនុញ្ញាតថ្មី គឺត្រឹមតែ៨០បាត ឬប្រហែល២្យ៥០ដុល្លារប៉ុណ្ណោះ ហើយពីមុនពេលបង្ក្រាបគឺ៨០០បាត ឬប្រហែល២៥ដុល្លារ ។

បន្ទាប់ពីបញ្ចប់ដំណើរការធ្វើលិខិតស្នាមនេះ យុវជន ស៊ុន ភារម្យ អាយុ២៣ឆ្នាំ និងបងប្អូនប្រុសបីនាក់របស់ខ្លួនឈ្មោះ ភារ៉ា ភា និង រ័ត្ន បានសម្រាកក្រោមកៅស៊ូតង់នៅពេលពួកគេកាន់អត្តសញ្ញាណប័ណ្ណថៃពណ៌ផ្កាឈូកជាប់នៅក្នុងដៃ។ ពួកគេទាំងអស់បានធ្វើចំណាកស្រុកជាលើកដំបូងកាលពីខែមេសាចេញចេញពីស្រុកកំណើតរបស់ខ្លួននៅខេត្តបន្ទាយមានជ័យ តាមរយៈមេខ្យល់ម្នាក់នៅក្នុងមូលដ្ឋានដែលបានព្រមព្រៀងនាំពួកគេឆ្លងដែន និងរកការងារឱ្យពួកគេធ្វើនៅក្នុងក្រុងបាងកកដោយគិតតម្លៃក្នុងម្នាក់ៗប្រហែល ៦៧ដុល្លារ។

ពួកគេរីករាយជាមួយការងារថ្មីរបស់ខ្លួននៅផ្សារលក់ចំណីអាហារដ៏ធំមួយនៅក្នុងក្រុងបាងកកដោយទទួលបានកម្រៃប្រហែល១០ដុល្លារក្នុងមួយថ្ងៃ ប៉ុន្តែពួកគេបានវិលត្រឡប់មកស្រុកវិញ កាលពីពីរសប្តាហ៍មុនតាមបញ្ជារបស់ឪពុកម្តាយ។

ភារម្យ និយាយថា "យើងឮថា យោធាថៃបានបាញ់ប្រជាជនខ្មែរ។ យើងឮពីមាត់មួយទៅមាត់មួយ ហើយវាបានធ្វើឱ្យឪពុកម្តាយរបស់ខ្ញុំព្រួយបារម្ភ។ ហើយពួកគាត់ក៏ទូរស័ព្ទឱ្យពួកយើងត្រឡប់មកស្រុកវិញ"។

បងប្អូនបង្កើតទាំងនេះ និយាយថា ពួកគេទទួលបានសៀវភៅសម្គាល់អត្តសញ្ញាណបណ្តោះអាសន្នដែលអាជ្ញាធរខេត្តបន្ទាយមានជ័យបានចេញឱ្យជំនួសការដាក់ពាក្យសុំលិខិតឆ្លងដែនកម្ពុជាផ្លូវការ ប៉ុន្តែវាគឺគ្រប់គ្រាន់សម្រាប់ឱ្យពួកគេចូលទៅក្នុងប្រទេសថៃដោយស្របច្បាប់បានសម្រាប់ឆ្នាំក្រោយ។ សៀវភៅនេះមានតម្លៃត្រឹមតែ២៥.០០០រៀល ឬប្រហែលប្រាំមួយដុល្លារ ។ ភារម្យ និយាយទៀតថា "ខ្ញុំមានអារម្មណ៍ស្រួលចិត្តមិនដូចពីមុនទេ ពីព្រោះពេលនេះ ខ្ញុំធ្វើការដោយស្របច្បាប់ គឺមិនមែនខុសច្បាប់ទៀតទេ។ ខ្ញុំមានអារម្មណ៍ថា មានសុវត្ថិភាព"។

លោក អ៊ុំ រាត្រី អភិបាលរងខេត្តបន្ទាយមានជ័យដែលបានចូលរួមពីធីនេះដែរ បានចំណាយពេលជជែកលេងជាមួយពលករចំណាកស្រុកដែលវិលមកវិញ ហើយបានមានប្រសាសន៍ថា លោកស្ញប់ស្ញែងចំពោះមណ្ឌលនេះ ។ លោកមានប្រសាសន៍ទៀតថា "នោះគឺផ្នែកមួយរបស់យោធាថៃ ពួកគេបានល្បួងលួងលោមបងប្អូនបងប្អូនស្គាល់រដ្ឋាភិបាលយោធាថៃ ពួកគេកំពុងព្យាយាមលុបបំបាត់វិធានការមុនៗរបស់ពួកគេ"។

បន្ទាប់ពីដំណើរទស្សនកិច្ចនេះ លោក សុវណ្ណ ដែលមកពីសហភាពប្រព័ន្ធផ្សព្វផ្សាយអាស៊ាន ដែលនិយាយភាសាថៃយ៉ាងស្ទាត់ជំនាញ និងអាណិតចំពោះរដ្ឋាភិបាលយោធាថៃថ្មីនេះ បានឱ្យស្វាយមួយចំនួនទៅអ្នកយកព័ត៌មានម្នាក់ដែលបះពីដើមមួយដែលគាត់និយាយថា មានអាយុកាល១០០ឆ្នាំ។ លោកបានពន្យល់ថា លោកត្រូវបានជំរុញឱ្យរៀបចំព្រឹត្តិការណ៍កាលពីថ្ងៃសុក្រ ដោយសារតែការចុះព័ត៌មានខុសក្នុងប្រព័ន្ធផ្សព្វផ្សាយកម្ពុជាជុំវិញគោលនយោបាយការងាររបស់ថៃ។

លោកបានមានប្រសាសន៍ថា "រដ្ឋាភិបាលយោធាបានប្តេជ្ញាបោសសម្អាតរាល់សកម្មភាពអំពើពុករលួយ រួមទាំងមន្ត្រីនគរបាល ឬក្រុមហ៊ុនដែល **តទៅទំព័រទី ២៤**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី១៤ ខែកក្កដា ឆ្នាំ២០១៤

# កម្មករខ្មែររាប់ពាន់នាក់ធ្វើដំណើរត្រឡប់ទៅធ្វើការនៅប្រទេសថៃវិញ

**ដោយ : ផន បុប្ផា** | **June 30, 2014**

កម្មករខ្មែររាប់ពាន់នាក់បានធ្វើដំណើរត្រឡប់ទៅធ្វើការនៅប្រទេសថៃវិញហើយដោយសារការសម្រុកចាកចេញពីប្រទេសនេះបានបញ្ចប់ និងសូម្បីតែនៅពេលដែលរដ្ឋាភិបាលកម្ពុជាបានបង្កើនចំនួនការងារទ្វេដងសម្រាប់អ្នកដែលបានវិលត្រឡប់មកវិញដែលចង់ស្វែងរកការងារធ្វើនៅទីនេះក៏ដោយ។

កម្មករខ្មែរជាង២៤០.០០០នាក់បានសម្រុកចាកចេញពីប្រទេសថៃក្នុងរយៈពេលពីរបីសប្តាហ៍កាលពីដើមខែនេះចំពេលមានពាក្យចចាមអារ៉ាមថា ទាហានថៃបានបាញ់និងចាប់ខ្លួនកម្មករខុសច្បាប់បន្ទាប់ពីការផ្តួលរំលំរដ្ឋាភិបាលក្រុងបាងកកកាលពីខែមុន ហើយបានប្រកាសប្រើច្បាប់អាជ្ញាសឹក។

ក្រៅពីការប្រឹងប្រែងនៅតាមព្រំដែនកម្ពុជា-ថៃដើម្បីជួយដល់អ្នកវិលត្រឡប់មកវិញ និងជួយសម្រួលឱ្យកម្មករវិលត្រឡប់ទៅស្រុកកំណើតរបស់ខ្លួនវិញនៅតាមបណ្តាខេត្តនានានោះ រដ្ឋាភិបាលបានកាត់បន្ថយតម្លៃធ្វើលិខិតឆ្លងដែន និងប័ណ្ណការងារដើម្បីឱ្យពួកគេត្រឡប់ទៅធ្វើការងារចាស់របស់ខ្លួនវិញឱ្យបានឆាប់។

លោក គោស៊ុំ សារឿត អភិបាលខេត្តបន្ទាយមានជ័យបានមានប្រសាសន៍កាលពីម្សិលមិញថា កម្មករប្រហែល១០.០០០នាក់បានធ្វើដំណើរវិលត្រឡប់ទៅប្រទេសថៃវិញដោយមានឯកសារចាំបាច់ក្នុងដៃកាលពីសប្តាហ៍មុន។

មន្ត្រីក្នុងស្រុកមួយចំនួនបានរាយការណ៍ថា អ្នកវិលត្រឡប់មកវិញដែលធុញទ្រាន់នឹងការរង់ចាំឯកសារចាំបាច់បានធ្វើដំណើរទៅព្រំដែនវិញដោយមានផែនការឆ្លងចូលប្រទេសថៃដោយខុសច្បាប់ទៀត។ ប៉ុន្តែលោក សារឿត បានមានប្រសាសន៍ថា លោកមានជំនឿថា ពួកគេនឹងមិនអាចឆ្លងកាត់ទេ។ លោកបានមានប្រសាសន៍ថា "ខ្ញុំមិនបារម្ភទេ។ ថៃតឹងរ៉ឹងណាស់ឥឡូវនេះ។ គេមិនអនុញ្ញាតឱ្យកម្មករខុសច្បាប់ឆ្លងព្រំដែនទេ"។

លោក ស៊ុន សំអាត ប្រធាននគរបាលអន្តោប្រវេសន៍នៅច្រកទ្វារព្រំដែនអន្តរជាតិប៉ោយប៉ែតក្នុងខេត្តបន្ទាយមានជ័យបានមានប្រសាសន៍ថា ពលរដ្ឋខ្មែរប្រហែល២។000នាក់បានឆ្លងដែនចូលប្រទេសថៃក្នុងរយៈពេលបីថ្ងៃមកនេះ ប៉ុន្តែលោកមិនដឹងថាតើមានប៉ុន្មាននាក់ជាកម្មករចំណាកស្រុកឡើយ។

ទន្ទឹមនឹងនោះដែរ ទីភ្នាក់ងារការងារជាតិលើកឡើងថា ឥឡូវនេះគេរកការងារបានចំនួន៣៧.០០០សម្រាប់អ្នកវិលត្រឡប់មកវិញដែលចង់ធ្វើការក្នុងប្រទេសកម្ពុជា គឺកើនឡើងជាងទ្វេដងពីការងារចំនួន១៦.០០០ដែលខ្លួនបានបញ្ជាក់កាលពីថ្ងៃពុធសប្តាហ៍មុន។

លោក ហុង ជឿន ប្រធានទីភ្នាក់ងារនេះបានមានប្រសាសន៍ថា "នៅពេលពួកគេត្រឡប់មកតាមច្រកទ្វារប៉ោយប៉ែតយើងបានសួរពួកគេថាតើពួកគេចង់ធ្វើអ្វី។ យើងមានការងារចំនួន៣៧.០០០សម្រាប់ពួកគេ ហើយមានច្រើនជាងនេះទៀត"។ ដើម្បីជួយផ្គូផ្គងកម្មករជាមួយការងារទាំងនោះ លោក ជឿន បានមានប្រសាសន៍ថា ព័ត៌មានលម្អិតអំពីឱកាសការងារនេះនឹងត្រូវបញ្ជូនទៅមន្ទីរការងារខេត្ត និងកន្លែងធ្វើការចំនួនប្រាំពីរកន្លែងនៅទូទាំងប្រទេស៕ **សារុន**

# As Exodus Ends, Workers Return to Thailand

**By Phorn Bopha | June 30, 2014**

Thousands of Cambodians have already headed back to Thailand for work now that the exodus of migrant laborers out of the country has ended, even as the Cambodian government has doubled the number of jobs available for returnees who want to find work here.

More than 240,000 Cambodians flooded out of Thailand in the space of a few weeks earlier this month amid rumors that the Thai Army was shooting and arresting illegal laborers after having toppled the government in Bangkok the month before and imposed martial law.

Amid a relief effort along the Thai-Cambodian border to aid the returnees and help them make it back to their home provinces, the government has slashed the price of passports and work permits in a bid to get many of them back to their old jobs fast.

Banteay Meanchey Governor Kousoum Saroeuth said Sunday that approximately 10,000 Cambodians made the trip back to Thailand with the requisite paperwork in hand last week.

Some local officials have reported that returnees who were tired of waiting for the necessary documentation had headed back to the border with plans to cross into Thailand again illegally. But Mr. Saroeuth said he was confident they would not get through.

"I am not worried. The Thais are very strict now," he said. "They are not allowing illegal workers to get across."

Sun Sam Ath, immigration police chief at the Poipet International Checkpoint in Banteay Meanchey, said about 2,000 Cambodians had crossed into Thailand over the past three days, although he did not know how many of them were migrant workers.

The National Employment Agency, meanwhile, says 37,000 jobs have now been identified for returnees wanting to stay in Cambodia, more than twice the 16,000 jobs it had identified as of last Wednesday.

"When they came back through Poipet, we asked them what they wanted to do," said the agency's president, Hong Choeun. "We have 37,000 jobs available for them, and there are more."

To help match workers to those jobs, Mr. Choeun said details about the openings would be sent to the provincial labor departments and seven job centers across the country.

# បាតុកម្មហឹង្សាផ្ទុះឡើងមានរបួស និងចាប់ខ្លួន

**ដោយ : ពិន សំខុន**

ភ្នំពេញ : បាតុកម្មអហឹង្សាមួយបានផ្តើមឡើងដោយគណបក្សសង្គ្រោះជាតិ ដើម្បីទាមទារឱ្យដោះលែងទីលានប្រជាធិបតេយ្យ និងអនុញ្ញាតិឱ្យពលរដ្ឋអាចមកបញ្ចេញមតិបានឡើងវិញ កាលពីថ្ងៃទី១៦ កក្កដា ២០១៤ វេលាម៉ោង៨ព្រឹក ដឹកនាំដោយអ្នកស្រី មូរ សុខហួរ បានតុកម្មបានយកបដារទៅដាក់លើរនាំងលួសបង្ហាញនូវឆន្ទះឱ្យដកលួសបន្លា និងកងកម្លាំងប៉ូលិសចេញពីទីលាននោះ ។ ភ្លាមនោះក្រុមប៉ូលិសបានទទួលបញ្ជាពីសាលាសង្កាត់ និងសាលាក្រុងភ្នំពេញឱ្យបំបែកក្រុមបាតុករដែលមានចំនួនច្រើនរយនាក់ ដោយកម្លាំងប៉ូលិសរាប់រយនាក់ប្រដាប់ដោយ អាវក្រោះ និងដំបងឆក់ច្រើនរយនាក់ដូចគ្នា ។ បណ្តាលឱ្យមានរបួសច្រើនគ្នា ។ ទ្រាំមិនបានដោយអំពើឃោឃៅពេកក្រុមបាតុករដោយផ្តើមតដៃ ដោយដំបងដោយចងទង់ជ័យ និងបដារបណ្តាលឱ្យមានរបួសជាង២០នាក់ បើទោះជាអ្នកស្រី មូរ សុខហួរ ឃាត់មិនឱ្យប្រើអំពើហឹង្សាតបតវិញក៏ដោយ ។ ប៉ូលិសបានដកថយទៅក្នុងរបងលួសបន្លាវិញដោយចាប់បានលោកស្រី មូរ សុខហួរ ជាតំណាងរាស្ត្រ និងតំណាងគណបក្សសង្គ្រោះជាតិពីររូបទៀត ដែលមានឈ្មោះ មូរ សុខហួរ . ហូ វ៉ាន់ . ម៉ែន សុថាវិន. កែវ ភិរម្យ. រា ខេមរិន្ទ និង តំណាងយុវជន អឿ ណារិទ្ធ ទៅជាមួយផង ។ បន្តិចក្រោយមកតំណាងរាស្ត្រ ហូ វ៉ាន់ ម្នាក់ទៀតបានចេញមកតវ៉ាឱ្យដោះលែងតំណាងរាស្ត្រទាំងអស់មកវិញ តែត្រូវបានប៉ូលិសក្រុងចាប់ខ្លួនចំនួន៤នាក់ ហើយឃុំខ្លួនរហូតដល់ពេលនេះ ។



បាតុករធ្លាប់បានបង្ហាញពីភាពអស់សង្ឃឹម និងឈឺចាប់លែងស្តាយជីវិតច្រើនលើកនៅតែស្តាប់ឱវាទគណបក្សសង្គ្រោះជាតិនៅឡើយ ។ នាពេលនេះ ការស្តាប់ឱវាទបានត្រូវថយចុះ ប៉ូលិសក្រុងចាប់ខ្លួនអ្នកអហឹង្សាទៅវិញ នេះប្រាកដជាការចាប់ផ្តើមនៃឱកាសលំបាកនឹងដោះស្រាយសន្តិភាពនៅកម្ពុជាអាចធ្វើឱ្យក្លាយជាសង្គ្រាមស៊ីវិលទៅថ្ងៃមុខបាន ៕

KhmerPost USA, LLC
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us
Sokha Lim
អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D.
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

តមកពីទំព័រទី ១១

## គណបក្សសង្គ្រោះជាតិត្រូវអ្នកគាំទ្រ....

ខាងគណបក្សប្រជាជនប្រកាសជំនួស គ.ជ.ប ។ ថាចាញ់ទៅវិញ ប្រកាសតវ៉ា ឬក៏វាយសម្រុកយកអំណាច? គណបក្សសង្គ្រោះជាតិសម្រេចយកការតស៊ូមតិដែលបន្ទាយពេលច្រើនខែមិនឃើញលទ្ធផល... រហូតមកដល់៥ខែក្រោយមក ក៏ជម្រុញឱ្យមានបាតុកម្មតស៊ូមតិដ៏ធំមួយទៀត ប្រជាពលរដ្ឋប្រមាណ១លាននាក់ បានមកសម្តែងការគាំទ្រម្តងទៀត ហើយក៏ប្រាកដជាមានការខ្វែងយោបល់ម្តងទៀតដែរ តស៊ូមតិរហូតដល់ឈ្នះ ឬក៏សម្រុកយកអំណាចតែម្តង? សេចក្តីសម្រេចចុងក្រោយថា ត្រូវរំសាយបាតុកម្មដ៏សែនប្រជាប្រិយនោះទៅវិញ។ គ្មាននរណាដឹងពីមូលហេតុដែលនាំឱ្យមានការរំសាយបាតុកម្មនោះ គឺជាអ្វីនោះឡើយ ។ មេដឹកនាំសង្គ្រោះជាតិទាំងពីរមិនដែលមានបង្ហាញថា មានបង្ហាញការខ្វែងយោបល់ជាសាធារណទេ តែយ៉ាងហោចណាស់ ក៏បានសម្តែងការគោរពនឹងអនុវត្តយោបល់រួមបានល្អខ្ទង់តិចតួចពីការដណ្តើមអំណាចដោយហឹង្សាមិនព្រមទុកឱ្យលេសទៅគណបក្សប្រជាជន ដើម្បីវាយបកទៅថ្ងៃក្រោយវិញបន្តិចឡើយ ។ តាំងពីមានស្លាប់មនុស្សនាឱកាសបាតុកម្មនាខែធ្នូឆ្នាំមុនមកគណបក្សសង្គ្រោះជាតិមិនចុះទៅតវ៉ាតាមផ្លូវហ៊ុកហ៊ាត់ដូចមុនទៀតទេ តែពលរដ្ឋនឹងកម្មករនៅតែសកម្មគ្មានឈប់ដដែលដែលជាហេតុនាំឱ្យការគាំទ្រចំពោះគណបក្សសង្គ្រោះជាតិថយចុះតែមេដឹកនាំនៅតែមិនព្រមពន្យល់ពីមូល



ហេតុនៃការដឹកនាំមិនបានលទ្ធផលនោះសោះក្រៅតែពីការសុំឱ្យពលរដ្ឋទុកចិត្តលើភាពស្មោះត្រង់របស់ខ្លួនដោយគ្មានលក្ខខណ្ឌតែប៉ុណ្ណោះ ។

២-គណបក្សប្រជាជនដូចជារឹងមាំឬ ? មែនតែសំបកក្រៅ! ដូចជាការងារជាមន្ត្រីជាន់ខ្ពស់គ្មានកិត្តិយសបានមកពីការលួចបន្លំដោយគ្មានអៀនខ្មាស់បាតុកម្មរបស់ប្រជារាស្ត្ររាប់ម៉ឺនសែន លាន បញ្ជាក់ពីភាពមិនស្មោះត្រង់មិនពេញចិត្ត គឺមិនបានបោះឆ្នោតអោយទៅកាន់អំណាចរដ្ឋ ក៏គ្មាននរណាគោរពដែរ ។ តើអ្វីទៅជាភាពរឹងមាំរបស់គណបក្សប្រជាជន ? គឺជំនឿថាប្រទេសកម្ពុជា គឺជាជ័យ ភ័ណ្ឌ របស់គណបក្សប្រជាជនដែលបានបណ្តេញក្រុមខ្មែរក្រហមចេញពីអំណាចកាលពីឆ្នាំ១៩៧៩ជំនឿ នេះបាននាអោយមានការកាន់អំណាចយង់ឃ្នងត្រឡប់ទៅរកសម័យបុរេប្រវត្តដេកស៊ីលើសម្បត្តមហាសាលលើខ្នងប្រជារាស្ត្រមិនអាចទទួលបានឡើយ ។ កម្លាំងនៃគណបក្សពេលនេះធ្លាក់នៅលើថ្ងៃអន្សាដង្គាបមរណមកដល់ក៏រួមខំប្រឹងលាបពណ៌លាក់បាំងកេរ្តិ៍ខ្មាស់ប្រឹងត្រដររស់ជាចុងក្រោយតែប៉ុណ្ណោះ ។ ម្យ៉ាងទៀត តស៊ូយូរទៅគ្មានយុវវ័យខ្លាំងៗមកជំនួសអ្នកនយោបាយដែលបំពុងតែទ្រុឌទ្រោមក៏ជាសញ្ញាស្លាប់ដែរ ។ មិនមានសញ្ញាណាមួយដែលថា គណបក្សប្រជាជនស្រុះគ្នាប្រព្រឹត្តអំពើបាបកម្មទាំងមូលនោះទេ នៅមានពួកគណបក្សប្រជាជនដែលមានតែឈ្មោះតែស្ងាត់ស្ងៀមមានការសាកល្បងដក ហ៊ុន សែន ច្រើនដង ដែរតែមិនបានសម្រេច ក៏ព្រោះតែមានការបែកបាក់ផ្ទៃក្នុងយ៉ាងស្ងៀមស្ងាត់មិនចង់ដួលជាមួយទេ ។ បាន័យថា អ្នកដែលខិលខូចមូលមង្គាច់ការពិតអាចនឹងទទួលទោសពៃរ៍ រីឯអ្នកដែលចង់រស់នៅសុខសាន្តប្រាកដជាមិនចង់ចូលដៃជើងនឹងអបាយមុខនេះទេ ដូច្នេះអ្នកដែលមិនបញ្ចេញសម្លេងដ៏ច្រើនលើសលុបក៏មិនច្បាស់ជាគាំទ្ររដ្ឋាភិបាលគ្មានកិត្តិយសនេះដែរ ។ តើមានចលនាមនុស្សខាងគណបក្សប្រជាជនទៀតដែរឬទេ? គ្មានទៀតទេ! នៅមានតែកងកម្លាំងបង្ក្រាបជាប៉ូលិស ជាទាហ៊ានដែលស្ទើរលែងហ៊ានទទួលអនុវត្តន៍បញ្ជាដ៏គ្មានខ្លឹមសារ ស្នេហាជាតិនោះទៅហើយ ។

៣-ចិននឹងយួនជាជំហ៊ រប្រទេសសម្រាប់គណបក្សប្រជាជនប្រទេសទាំង២នេះ ជាកុម្មុយនិស្តគ្មានការគោរពអង្គការប្រជារាស្ត្រណាមួយនៃប្រទេសរបស់ខ្លួនទេ យកចំណេញពីរាស្ត្រខ្មែរដោយគ្រាន់តែចិញ្ចឹមមេធំៗប៉ុន្មានគ្រាប់ដែលពូកែរសម្លាប់រាស្ត្រខ្មែរតែប៉ុណ្ណោះអស់ប៉ុន្មានក៏បានដែរ ។ ជាសំណាងដែរដែលមានប្រទេសសេរីឃ្លាំមើលការអនុវត្តន៍សិទ្ធមនុស្សនៅកម្ពុជាខ្លះៗដែរនោះប្រជាពលរដ្ឋខ្មែរខិតខំទប់ទល់ ការគម្រាមកំហែងពីប្រទេសទាំង២នេះយ៉ាងក្លាហានមិនចាញ់គណបក្សប្រឆាំងទេ នឹងធ្វើអោយកម្លាំងនៃចលនាទាំង២នេះ **តទៅទំព័រទី ២១**

# 10 យ៉ាងនៃសកម្មភាពមិនអស់ប្រាក់ក្នុងរដូវក្តៅ
## ដែលលោកអ្នកអាចជួយឱ្យបុត្រធីតាមានពិន្ទុល្អនៅសាលាពេលចូលរៀនវិញ
## ដោយ ចូ អាន់ស្ពិន នាយកប្រតិបត្តិនៃសមាគមថែទាំកុមារ

**ប្រែសម្រួលជាខេមរភាសាដោយ : សុខា**

**១-ក្នុងផ្ទះត្រូវមានសៀវភៅ:** ផ្អែកតាមការស្រាវជ្រាវពីសាកលវិទ្យាល័យនេវ៉ាដាដែលបានស្រាវជ្រាវទៅលើ៤២ប្រទេសនៃគ្រួសារ ដែលមានសៀវភៅអានក្នុងផ្ទះកូនៗរបស់ពួកគេទទួល





បានពិន្ទុល្អសម្រាប់ឆ្នាំសិក្សារបស់ពួកគេ។ រាល់សៀវភៅអានថ្មីៗទាំងអស់សុទ្ធតែមានអត្ថប្រ-យោជន៍បន្ថែមភាពឈ្លាសវៃដល់កូនលោកអ្នក។ លោកអ្នកអាចទៅខ្ចីសៀវភៅបានដោយឥតគិតថ្លៃនៅបណ្ណាល័យទៅលើប្រធានបទជាច្រើន។ ឧទាហរណ៍ដូចជាកូនលោកអ្នកមានចំណង់ចំណូលចិត្តខាងបាល់អោប ដូច្នោះកូនរបស់លោកអ្នកអាចអានសៀវភៅដូចជាវិធីសាស្ត្រនាំឱ្យក្លាយជាអ្នកលេងបាល់បោះបានល្អ ឬសៀវភៅស្តីពីអ្នកលេងបាល់អោបល្បីៗជាដើម។ ការស្គាល់នូវពាក្យបានច្រើនកាលណានោះកូនអ្នកនឹងមានឱកាសច្រើនទៅលើជោគជ័យក្នុងការអាន។

**២-ឧស្សាហ៍និយាយទៅកាន់កូនលោកអ្នក :** ព្រោះតែយើងមានបំណងចង់ឱ្យកូនបានស្វែងយល់នូវពាក្យថ្មីៗល្អៗកាន់តែច្រើនការឧស្សាហ៍និយាយលែងជាមួយកូនផ្តល់អត្ថប្រយោជន៍បានយ៉ាងច្រើន។ ដូចជាឥលូវនេះយើងបានមកដល់ហាងគ្រឿងឧបភោគបរិភោគហើយ ។ យើងនឹងទិញប៉េងប៉ោះដែលមានពណ៌ក្រហម ហើយយើងនឹងធ្វើសាឡាដ។ ពីឃ្លាទាំងអស់នេះសូមអ្នកពិនិត្យពាក្យជាច្រើនដែលគេបានចេះ។ លោកអ្នកអាចបង្ហាត់ពួកគេឱ្យចេះបង្កើតឃ្លាប្រយោគ ហើយពួកគេអាចចាប់ផ្តើម និងបញ្ឈប់ពេលណាក៏បាន។ សម្រាប់បុត្រធីតាដែលមានអាយុច្រើនបន្តិចលោកអ្នកអាចឱ្យគេជួយរកបន្លែ ដូចជាប៉េងប៉ោះជាដើម។ ហើយបើសម្រាប់កូនៗវ័យជំទង់បន្តិចលោកអ្នកអាចឱ្យគេជួយធ្វើជាបញ្ជីរាយនាមម្ហូបដែលត្រូវទិញក៏បាន។

**៣-បើលោកអ្នកមានគម្រោងទៅវិស្សមកាល សូមបញ្ចូលសកម្មភាពទៅមើលអាងមច្ឆា ឬសត្វក្នុងទឹក និងសារមន្ទីរ:** បណ្ណាល័យនៅឡូវែល និងបណ្ណាល័យនៅក្រុងផ្សេងទៀត ផ្តល់ជាលិខិតទៅទស្សនានៅកន្លែងទាំងអស់នោះដោយឥតគិតថ្លៃ។ ទីកន្លែងដូចជាអាងមច្ឆា ឬសត្វក្នុងទឹក និងសារមន្ទីរអាចផ្តល់ដល់ពួកគេនូវការរៀនចេះដឹងពាក្យថ្មីជាច្រើន។ ហើយពួកគេអាចចេះពាក្យទាំងនោះដោយមិនដឹងខ្លួនព្រោះគេគិតថាលោកអ្នកនាំពួកគេទៅសប្បាយ។

**៤-អនុញ្ញាតឱ្យពួកគេជួយកិច្ចការក្នុងផ្ទះបាយ:** ការចំអិន គឺជាសុទ្ធតែអាចបង្រៀនបុត្រធីតាលោកអ្នកអំពីគណិតវិទ្យា និងវិទ្យាសាស្ត្រពិត។ ការប៉ាន់ប្រមាណចំពោះការដាក់គ្រឿងផ្សំគឺជាគណិតវិទ្យា។ ការលាយគ្រឿងផ្សំទាំងនោះចូលគ្នាឱ្យក្លាយទៅជារបស់ផ្សេងមួយទៀត គឺជាវិទ្យាសាស្ត្រ។ រាប់ចាន៤ សម្រាប់សមាជិក៤នាក់ក្នុងគ្រួសារក៏គឺជាគណិតវិទ្យា។

**៥-គេហទំព័រ:** សម្រាប់បុត្រធីតាដែលមានកម្មវិធីល្បែងលេងក្នុងម៉ាស៊ីនកុំព្យូទ័រនៅផ្ទះ សូមមាតាបិតាដាក់កម្មវិធីដែលមានអត្ថប្រយោជន៍

**តទៅទំព័រទី២០**

# 10 ways you can do this summer for FREE that will help your child do well in school this fall!

**By Jo-Ann Spence, Executive Director**
**Lowell Day Nursery Association**

**1.** Have books in the house: A University of Nevada study done in 42 countries has shown that having books in the house increases children's scores


By Jo-Ann



on academic tests. Each new book adds to the effect. You can get books for free at the library on any subject. If your child loves baseball, he/she can get books on "How to be a better Player" or the lives of famous players or stories about baseball. Any book counts and if you read to the younger ones that is great as well. Reading (in any language) increases vocabulary and words are the name of the game. The more

**Continued to page 20**

# ការបោះឆ្នោតបឋមសម្រាប់បក្សប្រជាធិបតេយ្យ នឹងប្រព្រឹត្តទៅ នាថ្ងៃអង្គារ ទី៩ ខែកញ្ញាឆ្នាំ ២០១៤
## Democratic primary election which will be held on Tuesday, September 9, 2014.

បញ្ជីរាយនាមបេក្ខជនដែលនឹងមានឈ្មោះលើសន្លឹកឆ្នោត (Name of Candidates on Ballots)

**បេក្ខជនបីរូប ឈរឈ្មោះសម្រាប់តំណែងអភិបាលរដ្ឋ (3 Candidates run for Governor)**


១-ស្ទីវ ក្រសមែន
(Steve Grossman)


២- ម៉ាសា ខូកលី
(Martha Coakley)


៣-ដន ប៊ើវីក
(Don Berwick)

**បេក្ខជនបីរូប ឈរឈ្មោះសម្រាប់តំណែងអភិបាលរដ្ឋរង (3 Candidates run for Lieutenant Governor)**


១- ស្ទីវ ខឺរីហ្គែន
(Steve Kerrigan)


២- ម៉ៃខ៍ ឡេក
(Mike Lake)


៣- លីឡែន ឈឹង
(Leland Cheung)

**បេក្ខជនពីររូប ឈរឈ្មោះសម្រាប់តំណែងអគ្គមេធាវី**

**(2 Candidates run for Attorney General)**


១- វ៉ារ៉ែន ថុលមែន
(Warren Tolman)


២- ម៉ូរ៉ា ហៀលី (Maura Healey)

**បេក្ខជនបីរូប ឈរឈ្មោះសម្រាប់តំណែងហិរញ្ញិក**

**(3 Candidates run for Treasurer)**


១- ឌិប ហ្គូលបឺជ
(Deb Goldberg)


២- ថម ខុនរ៉យ
(Tom Conroy)


៣- ប៉ែរី ហ្វាញហ្គោល
(Barry Finegold)

# កម្មវិធីបណ្តុះបណ្តាលអ្នកប្រាជ្ញខ្មែរ

**ដោយ : ខ្មែរប៉ុសស.រ.អា.**

**ហ្វីឡាដែលហ្វៀះ** នាយកមជ្ឈមណ្ឌលគ្រួសារនៅហ្វីឡាដែលហ្វៀខាងត្បូងលោក ដេវីដ សេង ទើបនឹងប្រកាសបើកកម្មវិធីដ៏ចម្លែកជាលើកទី២ មានឈ្មោះថា កម្មវិធីបណ្តុះបណ្តាលអ្នកប្រាជ្ញខ្មែរ **តទៅទំព័រទី ១៨**




ដេវីដ សេង កំពុងបង្ហាត់កម្មសិក្សា

# PRESS RELEASE
## KhmerPost USA to Host State Representative Debate

The KhmerPost USA will host a debate for the candidates for the Democratic nomination for the 18th Middlesex Representative District on Tuesday, August 19, 2014 at 7:00 p.m. at Lowell Telecommunications Corporation at 246 Market Street in Lowell. The debate will be televised live on Lowell cable TV and will be streamed live on www.ltc.org.

The 18th Middlesex District includes the Acre and Highlands neighborhoods of Lowell. The seat was previously held by Kevin Murphy who resigned earlier this year when he was elected Lowell City Manager.

**Candidates in the Democratic Primary are Brian Donovan, James Leary, Rady Mom, David Ouellette and Paul Ratha Yem.**

The KhmerPost USA is a community newspaper published biweekly in Lowell, Massachusetts and distributed in Cambodian-American communities throughout the East Coast of the United States. Founded in 2008 by Roger Samkhon Pin, the former President of the Cambodian Journalist Association of Cambodia (1994-1997) and the former Director of Radio Free Asia's Cambodian Services.

For more information about the debate, contact Soben Pin, Managing Partner of KhmerPost USA via email sobenpin@khmerpost.us or direct number at **978-656-8141 (cell) | 978-677-7163 (office)**

# ស្អីទៅឧត្តមសិក្សា ?

លឹម គិមយ៉ា

គណបក្សសង្គ្រោះជាតិ និងគណបក្សប្រជាជនកម្ពុជាបានជួបប្រជុំគ្នា ដើម្បីរកដំណោះស្រាយបញ្ហាគាំងនយោបាយជិតមួយឆ្នាំហើយ ដោយសារតែ គ.ជ.ប ដែលតែងតាំងដោយអ្នកកាន់អំណាច ហើយមានសមាជិកគណបក្សសមរង្ស៊ីពីរនាក់(១) ចូលរួមផង បានរៀបចំបោះឆ្នោតដោយមិនអព្យាក្រឹត្ត ដោយលំអៀងទៅគណបក្សប្រជាជនកម្ពុជា ដែលតាមពិតគណបក្សសង្គ្រោះជាតិទេ ដែលជាអ្នកឈ្នះ បើប្រសិនណាការរៀបចំបោះឆ្នោតនេះត្រឹមត្រូវ ។

ក្រោយពីជួបគ្នាជាច្រើនលើកមក ក៏យល់ព្រមដាក់ស្ថាប័នគ.ជ.ប ក្នុងក្របខណ្ឌរដ្ឋធម្មនុញ្ញ ក្នុងជំពូកទី១៥ ដែលស្នើដោយគណបក្សសង្គ្រោះជាតិ ។ មានស្ថាប័នច្រើន ដូចជារដ្ឋសភាព្រឹទ្ធសភា ព្រះមហាក្សត្រក្រុមប្រឹក្សាធម្មនុញ្ញជាដើមមាននៅក្នុងរដ្ឋធម្មនុញ្ញ ។ តែស្ថាប័នអស់នេះដូចជា ហ៊ុន សែន វាមិនសូវគោរពទេ ជួនកាលវាស្រែកសំលុតព្រះមហាក្សត្រចង់រំលាយរបបរាជានិយមយកសាធារណរដ្ឋវិញ ។ល។ ហេតុនេះតើស្ថាប័ន គ.ជ.ប ក្នុងក្របខណ្ឌរដ្ឋធម្មនុញ្ញតើ ហ៊ុន សែន វានឹងគោរពមួយរយភាគរយទេ។

យើងគ្រាន់តែលើកមាត្រា១ដែលគណបក្សទាំងពីរយកមកស្នើរមកពិចារណា តើកំរិតគំនិតដល់ត្រឹមណា?

គណបក្សប្រជាជនកម្ពុជាបានស្នើក្នុងមាត្រា ១៥១ ថ្មី "...។ សមាជិកគណៈកម្មាធិការជាតិរៀបចំបោះឆ្នោតត្រូវជ្រើសរើសក្នុងចំណោមឥស្សរជនដែលមានសញ្ជាតិជាខ្មែរពីកំណើតមានសញ្ញាបត្រចាប់ពីឧត្តមសិក្សាឡើងទៅផ្នែកខាងច្បាប់ ខាងរដ្ឋបាលខាងការទូត ឬខាងសេដ្ឋកិច្ច ហើយដែលមានបទពីសោធន៍ក្នុងការងាររដ្ឋយ៉ាងតិច ១០ឆ្នាំ..."។ ចំណែកគណបក្សសង្គ្រោះជាតិវិញបានស្នើក្នុងមាត្រា១៥៣ថ្មី "...។ សមាជិកគណៈកម្មាធិការជាតិរៀបចំបោះឆ្នោតត្រូវជ្រើសរើសក្នុងចំណោមឥស្សរជនដែលមានសញ្ជាតិជាខ្មែរពីកំណើតមានសញ្ញាបត្រចាប់ពីឧត្តមសិក្សាឡើងទៅផ្នែកខាងច្បាប់ខាងរដ្ឋបាលជាដើម ហើយដែលមានបទពីសោធន៍ច្រើនក្នុងការងារ...។"

យើងមានឧទាហរណ៍ពីក្រុមប្រឹក្សាធម្មនុញ្ញ ដែលមាត្រា១៣៨ ថ្មី (មាត្រា១១៩ ចាស់) រដ្ឋធម្មនុញ្ញបានចែងថា "សមាជិកក្រុមប្រឹក្សាធម្មនុញ្ញត្រូវជ្រើសរើសក្នុងចំណោមឥស្សរជនដែលមានសញ្ញាបត្រចាប់ពីឧត្តមសិក្សាឡើងទៅផ្នែកខាងច្បាប់ ខាងរដ្ឋបាល ខាងការទូត ឬ ខាងសេដ្ឋកិច្ច ហើយដែលមានបទពីសោធន៍ច្រើនក្នុងការងារ ។ "យើងសង្កេតឃើញក្រុមប្រឹក្សាធម្មនុញ្ញមិនចាំបាច់មានសញ្ជាតិជាខ្មែរពីកំណើតទេ ។

ប៉ុន្តែយើងមើល តើសមាជិកក្រុមប្រឹក្សាធម្មនុញ្ញទាំង៩នាក់ទាំងនោះ មានលក្ខណៈអាចឆ្លើយតំរូវទៅនឹងលក្ខណក្នុងមាត្រា១៣៨ថ្មីនេះទេ?

បើមានឥស្សរជនមានសុភវិនិច្ឆ័យ ហើយមានសិលធិម ប៉ុន្តែគ្មានមធ្យោបាយបន្តការសិក្សា ឬគ្មានលុយទិញសញ្ញាប័ត្រ តើគិតយ៉ាងដូចម្តេច? ដូចខ្លះគេយកសញ្ញាបត្របណ្ឌិតមកឱ្យដល់ផ្ទះមិនចាំបាច់ទៅរៀនទេ។ បេក្ខជនសមាជិកគណៈកម្មាធិការជាតិរៀបចំបោះឆ្នោតដែលរដ្ឋសភាត្រូវរើសហេតុនេះគួរតែទុកឱ្យរដ្ឋសភាជ្រើសរើសដោយសេរីមិនចាំបាច់តំរូវយ៉ាងនេះទេ ។ ឬមួយដោយមិនបានពិចារណាគិត គឺចំឡងតាមគ្នាដូចកង្កែបស្រែកឆ្លងឆ្លើយគ្នា ។

តើលោកបណ្ឌិតខ្លះ ដូចជាលោកបណ្ឌិតរដ្ឋជាមយៀប លោកបណ្ឌិត ហ៊ុន សែន លោកបណ្ឌិតជា ស៊ីម លោកបណ្ឌិត ហេង សំរិន ជាពិសេសលោកជំទាវសម្តេចកិត្តិព្រឹទ្ធបណ្ឌិត ប៊ុន រ៉ានី ហ៊ុន សែន ហៅ ប៊ុន សាមហៀង តើយើងអាចចាត់ទុកថាមានសញ្ញាបត្រចាប់ពីឧត្តមសិក្សាឡើងទៅទេ?

*(១) ពេលដែលចូលជាសមាជិក គ.ជ.ប គឺត្រូវតែលាលែងពីសមាជិកគណបក្ស*

***លិម គិមយ៉ា***

*បេក្ខជនតំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិនៅខេត្តកំពង់ធំ*

---

តមកពីទំព័រទី ១៧ **កម្មវិធីបណ្តុះបណ្តាលអ្នកប្រាជ្ញខ្មែរ**

ដែលគ្រាន់តែពួកភ្លាមធ្វើឱ្យទឹកទៅដល់អ្នកដែលមានមហិទ្ធិរិទ្ធអាចបណ្តុះបណ្តាលកំពូលមនុស្សដែលមានចំណេះនឹងភាពឆ្លាតវៃខ្ពង់ខ្ពស់ ដូចជាងាយស្រួលពេកមិនគួរជឿបាន ។ តែលោក ដេវីដ សេង ជាអនុបណ្ឌិតខាងចិត្តសាស្ត្រជាអ្នកដឹកនាំកម្មវិធីបាននិយាយពន្យល់ថា អ្នកប្រាជ្ញខ្មែរ គឺជាកូនខ្មែរអ្នកដែលបានរៀនសូត្រជ្រៅជ្រះ ហើយដើម្បីឱ្យអាចរៀនសូត្រជ្រៅជ្រះបាន គឺជាតួរនាទីរបស់មាតាបីតានឹងក្រុមគ្រួសារដែលត្រូវជួយជ្រោមជ្រែងកុលបុត្រកុលធីតាខ្មែរក្នុងបំណងផ្តល់បរិយាកាសនឹងលើកទឹកចិត្តឱ្យការសិក្សានឹងការទទួលចំណេះរបស់កុមារាកុមារីអាចប្រព្រឹត្តទៅបាន... ខ្ញុំទើបនឹងបញ្ចប់កម្មវិធីជាលើកទី១ ជាមួយមាតាបីតានឹងក្រុមគ្រួសារខ្មែរ២៥នាក់ ដែលមកហាត់ហ្វឹកហ្វឺនចំនួន១២សប្តាហ៍មួយសប្តាហ៍ហាត់២ម៉ោងបានលទ្ធផលយ៉ាងគាប់ចិត្ត ។

ហ្វីឡាដែលហ្វៀជាក្រុងដែលសម្បូរខ្មែររស់នៅក្នុងលំដាប់ថ្នាក់ទី៣បន្ទាប់ពីឡុងប៊ិចនឹងឡូវែលមកក្នុងចំនួនដ៏ច្រើននេះ មានអ្នកដែលទទួលបានជោគជ័យក្នុងការសិក្សា ហើយក្លាយទៅជាអ្នកប្រាជ្ញនោះបែរជាមានតិចទៅវិញ បើប្រៀបធៀបទៅនឹងសហគមន៍អាស៊ីដទៃទៀត ដូច្នេះវាជាការចាំបាច់បំផុតដែលសហគមន៍ខ្មែរត្រូវស្វែងរករួមសម្បាច់ទាមទារជំនួយសម្រាប់ការអប់រំកូនចៅឱ្យរឹតតែប្រសើរឡើង ។ កម្មវិធីបណ្តុះបណ្តាលអ្នកប្រាជ្ញខ្មែរបានមកដល់ឃើតបន្តិចមែនតែមិនមែនខកពេលទេ គួរតែបងប្អូនក្នុងសហគមន៍ចូលរួមពិភាក្សានឹងផ្តល់យោបល់ពីការសិក្សារបស់កូនចៅឱ្យបានច្រើនគ្នា ដើម្បីប្តូរអនាគតលោកអ្នកឱ្យបានភ្លឺស្វាងប្រសើរឡើងបាន ៕



## ដំណឹងមរណភាព

Anthony SAK

Ryan SAK

Sayuri SAK

យើងខ្ញុំ ហោង ឡៅ, ឡៅ សាក់, ឡៀន សាក់, ធារី សាក់, រ៉ានី សាក់, ថុនី សាក់, ធារ៉ាក់ សាក់, ធារ៉ាន សាក់, ខែនី សាក់, ប្រាយអិន សាក់, **Quyen Pham, Say Manh Vuong, William Vuong, Amy Vuong** និង **Alice Vuong** ដែលត្រូវជាឪពុក, ម្តាយ, បងប្អូនប្រុសស្រី, កូន ព្រមទាំងញាតិសន្តានទាំងអស់ មានសេចក្តីក្រៀមក្រំនិងទុក្ខជាទម្ងន់ ដោយ **ថន សាក់, អែលៀន វួង, អែនថូនី សាក់, រ៉ាយអិន សាក់ និង សាយូរី សាក់** ដែលបានទទួលអនិច្ចកម្មទៅកាន់បរលោកខាងមុខនៅថ្ងៃព្រហស្បតិ៍ ទី១០ ខែកក្កដា ឆ្នាំ២០១៤ ដោយឧបទ្ទវហេតុអគ្គីភ័យ។

### កម្មវិធីបុណ្យ

**ថ្ងៃសុក្រទី១៨ ខែកក្កដា ឆ្នាំ២០១៤ (Friday, July 18, 2014)**

- ម៉ោង ១-៣ រសៀល — ជួបជុំពុទ្ធបរិស័ទ និងពិធីគោរពវិញ្ញាណក្ខ័ន្ធសពនៅ **Fay McCabe Funeral Home** (105 Moore Street, Lowell)
- ម៉ោង ៣:០០ រសៀល — ពិធីរំកិលសពឆ្ពោះទៅកាន់ វត្តពន្លឺពុទ្ធចក្រ **The Glory Buddhist Temple** (24 Cambridge Street, Lowell)
- ម៉ោង ៥:០០ ល្ងាច — ជួបជុំពុទ្ធបរិស័ទ នមស្សការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃចំរើនព្រះបរិត្ត និងជាបង្សុកូល

**ថ្ងៃសៅរ៍ ទី១៩ ខែកក្កដា ឆ្នាំ២០១៤ (Saturday, July 19, 2014)**

- ម៉ោង ៨:៣០ ព្រឹក — ជួបជុំញាតិមិត្តជិតឆ្ងាយ
- ម៉ោង ១០:៣០ ព្រឹក — នមស្សការព្រះរតនត្រ័យ សមាទានសីល ដាក់បាត្រ វេរភត្តាហារប្រគេនព្រះសង្ឃ ជាបង្សុកូល ដើម្បីបញ្ជូនកុសលទៅជូនដួងវិញ្ញាណក្ខ័ន្ធសព
- ម៉ោង ១២:០០ ថ្ងៃត្រង់ — ញាតិមិត្តទទួលទានភោជនាហារ
- ម៉ោង ១:០០ រសៀល — ពិធីដង្ហែសពទៅបញ្ចុះនៅ **Westlawn 2 Cemetery** (Boston Road, Lowell)

អាស្រ័យហេតុនេះ យើងខ្ញុំសូមអញ្ជើញពុទ្ធបរិស័ទមកចូលរួមក្នុងការសម្តែងគារវកិច្ច និងគោរពវិញ្ញាណក្ខ័ន្ធសពឲ្យបានច្រើនកុះករ និងដើម្បីអនុមោទនាយកមគ្គផលជាកុសលឧទ្ទិសជូនលោកអ្នកដ៏មានគុណ, ញាតិសន្តានដែលស្ថិតនៅទីជិតឆ្ងាយជាមួយយើងខ្ញុំកុំបីអាក់ខានឡើយ។ ដំណឹងមរណភាពនេះចាត់ទុកជាពត៌មានដល់ញាតិមិត្ត និងសប្បុរសជនជិតឆ្ងាយ។

សូមអរគុណ



# ចេន សៃចៃ អ្នកចម្រៀងខ្មែរសុរិន្ទ

**អត្ថបទដោយ : សុខា**

ក្នុងទំព័រអត្ថបទសិល្បៈ និងវប្បធម៌នៃសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក លេខនេះ លើកយកនូវការកំសាន្តតាមអត្ថបទក្នុងបទចម្រៀងពូជខ្មែរដូចគ្នារបស់អ្នកចម្រៀងខ្មែរសុរិន្ទ ចេន សៃចៃ ឬ សៃចៃ ឃុនណាម៉ា(ស) ។

**ពូជខ្មែរដូចគ្នា**

អើ! ហាអើ!...អើ!...អើងអើយ!

I- ថាស្រុកស្រែយើង ហាអឺ! ហាអើ! ...នោះនៅជាប់គ្នា
ថាស្រុកស្រែយើង ហាអឺ! ហាអើ! ....នោះនៅជាប់គ្នា
ប្រទេសថៃ និងកម្ពុជា ផែនដីជាប់គ្នា មិនមែនអ្នកឆ្ងាយ
បើរាប់តាមតា តាមយាយ ហ្លួងយើងប្រុសស្រី បងប្អូនគ្នា ។

II- នាងនៅស្រុកសុរិន្ទ ហាអឺ! ហាអើ! ...ជាប់កម្ពុជា
នាងនៅស្រុកសុរិន្ទ ហាអឺ! ហាអើ! ...ជាប់កម្ពុជា
ភាសានិយាយក៏ដូចគ្នា បើស្តាប់ជាៗ ក៏ផរដឹងរឿង
ខ្មែរលើ ខ្មែរក្រោម ហ្លួងយើង ផរតែដឹងរឿង និយាយគ្នាបាន ។

III- អង្គរវត្ត អង្គរធំ ហាអឺ! ហាអើ! ....នោះក៏សំខាន់
អង្គរវត្ត អង្គរធំ ហាអឺ! ហាអើ! ....នោះក៏សំខាន់
នាងមាសណា កល្យាណ ចង់មានសង្សារមកនាំដើរថ្មៀវ
កម្លោះខ្មែរបងណានៅលើវ មកនាំនាងថ្មៀវ ណាបានប ។

IV- ថាបើបានសម្បើម ហាអឺ! ហាអើ! ..មិនបាច់មានទេណា
ថាបើបានសម្បើម ហាអឺ! ហាអើ! ...មិនបាច់មានទេណា
សុំតែកុំកម្បត់កុំប្រោ បុណ្ណោះបងអើយណា ត្រូវចិត្តក្រមុំស្រី
បើឆបមែនស្រឡាញ់មែនជឹងចៃ មកសួរយកក្រមុំថៃ បាន
លើយបងខ្មែរ ។ (រក្សាសិទ្ធ ផលិតកម្ម ស៊ី វី អឹម)



Jane Sai Jai

គួរបញ្ជាក់ផងដែរ នាង ចេន សៃចៃ មានទីកន្លែងកំណើតនៅភូមិសុរិន្ទ មានបងប្អូន៦នាក់ រួមមានប្រុសពីរនាក់ និងស្រី៤នាក់។ នាងជាកូនទីប្រាំ។ ថ្លែងក្នុងសារព័ត៌មានខ្មែរវីអូអេការច្រៀងជាទេពកោសល្យរបស់នាងដែលមានពីកំណើត ត្បិតនាងបញ្ជាក់







ថា នាងចេះ រៀន ហាត់ ច្រៀង តាំងតែពីអាយុ៦ឆ្នាំម្ល៉េះ។ និស្ស័យសិល្បៈនេះ បានបណ្តុះនាងឱ្យក្លាយជាអ្នកសិល្បៈចម្រៀងខ្មែរសុរិន្ទដែលនិយាយរដឹន ដែលប្រិយមិត្តចម្រៀងរបស់នាងស្គាល់នាងតាមរយៈបទល្បី១ ដូចជា ឆ្នាំមុន ឱ រណ ក្រមុំស្រែមុខខ្មៅ និងពូជខ្មែរដូចគ្នាជាដើម។ វិធីនេះក៏បាននាំនាងឱ្យស្គាល់ទីជិតឆ្ងាយរាប់ពីប្រទេសភូមិផងរបងជាមួយ គឺកម្ពុជានាងបានទៅសម្តែងដល់ប៉ៃលិន សៀមរាប ស្រះកែវ បាត់ដំបង។ ទីឆ្ងាយសែនឆ្ងាយដែលនារីស្រុកស្រែរូបនេះ មានភ័ព្វសំណាងបានទៅដល់គឺសហរដ្ឋអាមេរិកដែលនាងថ្លែងថា បានទៅដល់ច្រើនជាង២០រដ្ឋក្នុងសហរដ្ឋអាមេរិកនៃទីដែលមានបងប្អូនខ្មែររស់នៅ ៕

តមកពីទំព័រទី ១៦

## ១០យ៉ាងនៃសកម្មភាពមិនអស់ប្រាក់...

ដល់ការអប់រំកម្មវិធីអប់រំទាំងនោះមានក្នុងគេហទំព័រ scholarstic.com nig abckids.com ។ ឬអាចជា Dadcando.com ដែលជាគេហទំព័រមានផ្ទាំងសម្រាប់គូរ និងចំណុចផ្ដល់ភាពសប្បាយៗជាច្រើនដែលលោកអ្នកអាចមានជាមួយកូនលោកអ្នក។

**៦-ប្រាប់ដល់ពួកគេអំពីរឿងអតីតកាលតាំងពីអ្នកនៅក្មេងៗ:** ក្មេងៗចូលចិត្តរៀន និងស្ដាប់អំពីរឿងអតីតកាលនានាដែលបានកើតឡើងចំពោះឪពុកម្ដាយរបស់ពួកគេពេលដែលពួកគេអង្គុយជជែលលែងជាមួយឪពុកម្ដាយ។ វិធីនេះលោកអ្នកឃើញកូនលោកអ្នកចាប់ផ្ដើមលេងអ្វីមួយដោយលោកអ្នកមិនបានរៀបចំឱ្យទេ អាចមានន័យថា គេកំពុងតែប្រើប្រាស់ខួរក្បាលរបស់ពួកគេ។ ពួកគេអាចតាក់តែងច្បាប់ពេលដែលគេលេងដោយខ្លួនឯង និងអាចផ្លាស់ប្ដូរវេនគ្នា និងប្រើប្រាស់ការស្រមើស្រម៉ៃរបស់ពួកគេ។ ពេលពួកគេឆ្លងឆ្លើយគ្នានោះពាក្យថ្មីជាច្រើនដែលគេទទួលបានពីគ្នាទៅវិញទៅមក។

**៩-និយាយអំពីសាលារៀន:** ចន្លោះពេលមួយចំនួនរំឭកពួកគេអំពីសាលារៀន ហើយបង្ហាញអំពីមោទនភាពរបស់អ្នកដែលមានចំពោះ





បង្កើនក្ដីស្រឡាញ់ និងចងភ្ជាប់បទពិសោធន៍ ហើយជាឱកាសបង្រៀនពាក្យថ្មីៗ និងពង្រីកបទពិសោធន៍គេបន្ថែមទៀត។ ចំណែកឯការសួរសំណួររបស់កូនទៅកាន់ឪពុកម្ដាយទាក់ទិននឹងរឿងទាំងនោះក៏បង្កើនចំនេះដឹងលើពាក្យថ្មីៗផងដែរ។

**៧-ពិនិត្យពីកម្មវិធីទូរទស្សន៍ដែលគេកំពុងមើល:** កម្មវិធីមួយចំនួនដែលផ្សព្វផ្សាយទាក់ទាញកុមារមិនសូវជាល្អសម្រាប់កុមារឡើយ។ ដូចនេះ អ្នកត្រូវចំណាយពេល៥នាទី ដើម្បីថ្លឹងថ្លែងថា តើកម្មវិធីដែលកូនលោកអ្នកកំពុងមើលនោះ ល្អ ឬយ៉ាងណា! បើកម្មវិធីនោះ មានឈុតឆាកវាយតប់គ្នាច្រើន គឺមិនល្អឡើយ។ដូចនេះ បន្តិចម្ដងៗពេលអ្នកសិក្សាកម្មវិធីទូរទស្សន៍ទាំងអស់នោះ នោះអ្នកនឹងអាចវិនិច្ឆ័យបានថាកម្មវិធីទូរទស្សន៍ណាល្អ ហើយមួយណាមិនល្អ។

**៨-បើកសេរីភាពឱ្យពួកគេបានលេង:** បើពួកគេ។ ប៉ាម៉ាក់អាចប្រាប់កូនៗអំពីតម្លៃធំធេងដែលបានផ្ដល់ដល់ការសិក្សារបស់កូនៗ។ ពេលដែលពួកគេដឹងថា លោកអ្នកឱ្យតម្លៃដល់ការសិក្សារៀនសូត្ររបស់ពួកគេនោះពួកគេក៏ឱ្យតម្លៃការសិក្សារបស់ខ្លួនឯងដែរ។

**១០- ក្រលេកមើលស្លាកលេខឡានពេលធ្វើដំណើរ:** កូនៗរបស់ខ្ញុំសុទ្ធតែធំៗអស់ហើយ ប៉ុន្ដែខ្ញុំនិងស្វាមីខ្ញុំតែងតែពិនិត្យមើលស្លាកលេខឡានពេលធ្វើដំណើរម្ដងៗ ដើម្បីរាប់ចំនួនរដ្ឋដែលយើងបានឃើញ។ ដូច្នេះលោកអ្នកក៏អាចធ្វើដូចគ្នាបែបនេះដែរជាមួយកូនលោកអ្នកទៅលើពាក្យនានាផ្ដើមពីព្យញ្ជនៈ A ដល់ Z ។ ដូចជាអក្សរ A : Animal អក្សរ B:Bus GkSrC: Car ជាដើម ៕





Continued from page 16

## 10 ways you can do this summer for

WORDS they know, the better their chance of success in reading!

**2.Talk to your child:** Since we want them to know more words, talking to your child definitely helps. For young children, you can help them learn the names of things. For example, " Here we are at the grocery store. We are buying "red tomatoes. We will put them in a salad. Look at all the words they have learned. You are also showing them that sentences are made up of words and they start and stop. For older children, you can let them find things in the store, "Can you find me the red tomatoes?" For teens, you can let them make the list or shop one side of the store while you do the other.

**3.** If you are going on vacation, add a museum or an aquarium – The Lowell Library (and many other cities) has free tickets to many museums and other places to take your children. There are many new words and things to see and learn at any of these places. The children will never know you are helping them do better at school. They will think they are just having fun!

**4.Let them help around the house:** Cooking is all about math and science! Measuring ingredients is math! Mixing ingredients together and coming up with something else is science! Putting things away by size and shape is a math skill. Counting 4 plates for 4 family members- math!

**5.Websites:** For those children who must have a computer game, look for educational ones. Scholastic.com and abckids.com (for example) have many good and FREE games and activities for children. Dadcando.com is a fun free website full of crafts and fun things to do with your child.

**6.Tell them stories from when you were a kid or read to them:** Young children really love to learn about their parents and hearing stories (or being read to ) while sitting with you is not only a loving, bonding experience- it is increasing vocabulary and widening their experiences. Asking questions about your stories also increases their vocabulary.

**7.Check what they are watching on TV:** Some shows marketed for children are NOT good for children. Look at the shows for few minutes and see how it feels to you. Are the characters fighting all the time? Are they whining and fussing with each other? You'll soon know which shows are right for your children.

**8. Send them out to play:** When children are playing by themselves with no planned activity, they have to use their brains! They make up their own games and learn how to follow rules, take turns and use their imaginations! All good things! All that talking together- new words!

**9.Talk about school:** Every once in awhile mention school and how proud of them you are. Tell them how much you value them learning and how many new things they know. If they know that YOU value school, they will feel good about it too!

**10.**Look at license plates while you are driving: My children are grown but my husband and I still look at license plates of cars to see how many states we can find. You can see how many cars have 6's on their plates or what color the plates are or what letters your children see on the plates. You can also just look out the window and find things that start with the alphabet letters.

A: animals, B: bus C: car etc.

តមកពីទំព័រទី ១៥

## គណបក្សសង្គ្រោះជាតិត្រូវអ្នកគាំទ្រ....

បើរួមគ្នាខ្លាំងឡើងឥតឧប្បមាតទល់នឹងប្រទេសចិននឹងយួនបានយ៉ាងប្រសិទ្ធភាព ។

៤-គណបក្សសង្គ្រោះជាតិនៅខ្វះអ្វីដើម្បីជ័យជំនះ? ខ្វះគំរូច្បាស់លាស់នៃគោលដៅតស៊ូរបស់ខ្លួនខ្វះតម្លាភាពក្នុងជំនឿទៅលើការដឹកនាំជាពិសេសខ្វះពតិមានផ្ទៃក្នុងលំអិតពីកូរសត្រូវខ្លួនដើម្បីធ្វើការទប់ទល់ជាយថាហេតុបង្កការធ្លាក់របស់គណបក្សប្រជាជនអោយបានរឹតតែឆាប់ ។ យើងដឹងហើយថាគណបក្សសង្គ្រោះជាតិខ្វះខាតថវិការសម្រាប់គ្រប់គ្រងចលនាតស៊ូរបស់ខ្លួនក៏ប៉ុន្តែនរណាក៏ដឹងដែរថា គណបក្សប្រជាជនលែងមានការគាំទ្រក្នុងស្រុកអស់រលីងទៅហើយដែរ នេះជាកត្តាសំខាន់ណាស់មួយដែលយុទ្ធសាស្ត្រគណបក្សសង្គ្រោះជាតិគួរតែផ្តោតទៅលើម្រាមដៃជ្រៀតជ្រែកនៃបរទេសមកលើអធិបតេយ្យភាពនឹងប្រជាធិបតេយ្យនៅកម្ពុជាមិនមែននៅលើការប្រកាន់ពូជសាស្ត្រទេ ។ មិនគួរទុកឱ្យគេមើលឃើញថា "មានការប្រឹងប្រែងរបស់ប្រជាពលរដ្ឋដែលនៅតស៊ូមិនឈប់ឈរទោះជាគ្មានគណបក្សសង្គ្រោះជាតិក៏ដោយ"បានទេ មិនត្រូវនៅពីក្រោយការបំផុសបំផុលប្រជារាស្ត្រទៀតទេ ទាំងក្មេងទាំងចាស់នៅត្រូវការកិច្ចដឹកនាំរបស់គណបក្សសង្គ្រោះជាតិដដែលនៅឡើយ សុខចិត្តបូជាការតស៊ូចំពោះជាតិមិនត្រូវការកម្លាំងថវិការរបស់គណបក្សសង្គ្រោះជាតិក៏បានដែរ ។ ថ្ងៃអន្សារបស់គណបក្សកាន់អំណាចបានមកដល់ច្រើនខែ ហើយនៅតែមិនរលំ មហាត្មៈគន្ធី បានធ្លាប់បាននិយាយថា "គេត្រូវបង្កហេតុអោយសត្រូវវាភ្ញាត់" មិនមែនអង្គុយចាំការបោះឆ្នោតដែលសត្រូវប្រជារាស្ត្រមិនដែលគោរពម្តងណានៅទេ ។

៥-គណបក្សប្រជាជនខ្វះអ្វីដើម្បីកុំអោយរលាយទាំងពូជ សព្វថ្ងៃគណបក្សប្រជាជនលេចមុខមាត់តែក្រុមអ្នកកាន់អំណាចរដ្ឋាភិបាលតែប៉ុណ្ណោះ រីឯអ្នកឯទៀតរង់ចាំតែស៊ីឡាកតែប៉ុណ្ណោះស្លាប់ ឬរស់តាមតែវាស្នានាយករដ្ឋមន្ត្រីចាំផ្ទះ ហ៊ុន សែន សម្រេចអោយ ។ តាមពិតទៅវាស្នាគណបក្សប្រជាជន ប្រសិនបើភ្លាត់ស្នៀតមិនខុសអ្វីពីវាស្នាក្រមខ្មែរក្រហមនាពេលនេះទេបើមិនរៀបចំដួល កុំថាមិនបានប្រាប់ វានឹងឈឺចាប់រកស្តាយមិនបាន ពីព្រោះលោភខ្លាំងពេកវាបែកពោះ។

ពេលនេះ យើងយល់ថា ជាឱកាសសម្បទានឱ្យគណបក្សប្រជាជនរៀបចំខ្លួនឈរឡើងមកវិញពីព្រោះគណបក្សសង្គ្រោះជាតិមិនបានប្រើឱកាសប្តូរដៃនៃអំណាចដែលប្រជារាស្ត្របានផ្តល់ឱ្យ ។ បើគណបក្សប្រជាជនឆ្លាតគេនឹងប្តូរនាយករដ្ឋមន្ត្រីទៅឱ្យមនុស្សម្នាក់ទៀតនៅក្នុងបក្សដដែល ដើម្បីកែរលំអេមុខមាត់មួយរយៈសង្គ្រោះជាតិនឹងប្រជាជាតិអាចនឹងខកចិត្ត ពីព្រោះមិនបានប្តូរចរន្តកាន់អំណាចបែរជាប្តូរបានតែបមនុស្សតែប៉ុណ្ណោះ។ ក្នុងរូបភាពថ្មីនេះ បើទោះជាចាញ់គណបក្សប្រជាជននៅមានវត្តមាននៅឆាកនយោបាយអនាគតកម្ពុជាបានមិនរលាយដូចខ្មែរក្រហមទេ៕

Continued from page 12

## Thai Junta Helps Media Get Migrant Story Straight

eliminate their own previous acts."

After the tour, Mr. Sovann of the Union Media of Asean, who speaks fluent Thai and is sympathetic to the new military government, offered a reporter a handful of mangosteens from a tree he said was 100 years old. He explained that he was inspired to organize Friday's event because of misinformation in the Cambodian press.

"The military government vowed to clean up all corrupt activity, including police officials or companies colluding with them to get migrant workers to give bribes," he said. "The Thai government holding power needs to clean up all this stuff. Our Cambodian media has a lack of information for migrant workers-that is the problem. We cannot help our own people."

Mr. Sovann added that the perks of the junket tour-which included a trip to the countryside, a night at a hilltop resort, and a Saturday morning outing to watch a marathon-were being paid for by wealthy Thai journalists who were members of UMA.

"You must acknowledge that the Thai media has its own riches," he said cryptically.

One of these wealthy Thais was Mr. Prasit, the secretary-general of UMA, who had lavishly praised the Sa Kaeo authorities earlier in the day for doing "very good work to help Cambodian migrants return home, whether it was raining or the sun was beating down, both day and night."

According to Mr. Sovann, Mr. Prasit cut his teeth as a journalist covering the Khmer Rouge in the 1990s before becoming a wealthy businessman.

"He got rich through Cambodia, so now he needs to feed back and help the next Khmer media generation," he explained.

The Cambodians seemed to appreciate the help.

Thorn Samnang of Domnung Thngai Nih newspaper said he planned to write an article describing the efficiency of the new migrant-processing center.

"It very changed my mind, because the Thai government makes it easy for the Khmer people," he said, before heading off to the resort. "I will write it for my people."

តមកពីទំព័រទី ០៣

## បទសម្ភាសន៍ជាមួយនាង យោម បុប្ផា...

រឿងសម្ពុតខ្ញុំរាល់ថ្ងៃ... តែដោយសារការតវ៉ារបស់បងប្អូនសហគមន៍របស់អង្គការក្នុងស្រុកនឹងអន្តរជាតិមិនឈប់មិនឈរទម្រាំស្ថានខ្ញុំក្នុងគុកបានធូរស្រាលពីកន្លែងសម្រាកក៏គ្មានទឹកស្អាតក៏គ្មានម្ហូបអាហារស្អាតមានអនាម័យនឹងរស់ជាតិក៏គ្មានដែរ សម្លរ ត្រកួនមួយទងក្នុងទឹកថ្លាឆ្វង់... ដល់ក្រោយមក ទើបគេបញ្ជូនខ្ញុំឱ្យនៅបន្ទប់ស្រួលជាងមុនតែទោះជាយ៉ាងណាក៏ដោយក៏មិនស្រួល

**សំនួរ:** គេយកដីយកផ្ទះហើយចាប់ខ្លួនដាក់គុកទៀត តើគេចាប់បុផ្ផាដោយលេសអ្វី?

**យោម បុផ្ផា:** គេចង់បានដីយើងគេចាប់យើងដោយចោទតាមទោសព្រហ្មទណ្ឌវិញ ថាខ្ញុំហ្នឹងបានវាយបុរសរត់ម៉ូតូឌុប២នាក់ នៅពេលទៅតុលាការហ្នឹងខ្ញុំមិនដែលទាំងឃើញមុខថា ជានរណាផងទេ ហើយអ្នកចាប់ខ្ញុំជិះឡានឥតផ្លាកលេខស្នៀក គឺនុយស៊ីវិលទៀត នេះជារឿងខុសច្បាប់រំលោភសិទ្ធមនុស្សរួចស្រេចទៅហើយ!





ដូចនៅក្រៅដែរ ដោយសារក្បួនច្បាប់ពន្ធនាគារតឹងតែងចាក់សោច្រើនជាន់ គឺពីក្នុងដល់ក្រៅមាន៥ជាន់ ។

**សំនួរ:** តើអ្វីទៅដែលនាំឱ្យឆ្នាំគុកបន្ធូរពីការតឹងតែងមកជាធូរស្រាលវិញនោះ?

**សំនួរ:** តែប្រជាពលរដ្ឋពេលនោះហ៊ានចេញមុខតវ៉ាថាអយុត្តិធមិឱ្យដោះលែងបុផ្ផាមកវិញ?

**យោម បុផ្ផា :** ចំពោះការតវ៉ានេះ ខ្ញុំមានមោទនភាពណាស់នៅពេលឃើញបងប្អូនសហគមន៍




**យោម បុផ្ផា:** ដំបូងឡើងគេត្រូវបំបាក់ស្មារតីយើងដោយដាក់គុកយើងជាមួយអ្នកទោសឧក្រិដ្ឋធំៗជួនកាលពួកគាត់មានសតិអារម្មណ៍មិនល្អគាត់ឈ្លោះវាយគ្នាក្នុងគុកគេនឹក ថានឹងធ្វើឱ្យយើងភ័យខ្លាចដាក់នៅកន្លែងមានមនុស្សរស់នៅប្រជ្រៀតគ្នាដេកគរគ្នា សូម្បីតែអង្គុយក៏គរជើងគ្នាដែរ តែយើងមិនព្រមបាក់... បន្ថែមពីនេះទៀតមានបងប្អូនសហគមន៍មានប្រជាពលរដ្ឋធ្វើបាតុកម្មរាល់ថ្ងៃទាមទារឱ្យដោះលែងខ្ញុំដោយថាខ្ញុំឥតបានធ្វើអ្វីខុសទេ កំហុសខ្ញុំគឺជាការលាបពណ៌តែប៉ុណ្ណោះមានអង្គការសិទ្ធមនុស្សក្នុងស្រុកនឹងអន្តរជាតិក៏តាមដានរឿងខ្ញុំប្រកិតណាស់ដែរ នេះជាសារមួយដល់អ្នកគ្រប់គ្រងគុក ក៏ដូចជារដ្ឋាភិបាល ថាខ្ញុំមិនមែននៅម្នាក់ឯងទេ

បឹងកក់ក៏ដូចជាសហគមន៍ឯទៀតៗមិននៅស្ងៀមហ៊ានចេញមុខមក ទាមទារ ឱ្យដោះលែងនាងខ្ញុំប្រឈមមុខនឹងការវាយដំពីប៉ូលីសធ្វើឱ្យបាក់ដៃបាក់ជើង បាក់ធ្មេញ ខ្លះរលូតកូន ការបាញ់ទឹកឱ្យសន្លប់វាយធ្វើទារុណកម្មនឹងដំបងឆក់គ្រប់បែបយ៉ាង...ហើយបានបងប្អូននៅក្រៅប្រទេសនោះទៀតខិតខំទាមទារតវ៉ាទៅអង្គការលើកលែងទោសអន្តរជាតិ ឱ្យដោះលែងនាងខ្ញុំដែរ ....

**សំនួរ:** តើការទាមទារតវ៉ាហ្នឹងបណ្តាលឱ្យមានការថ្កោលទោស តើបានធ្វើឱ្យរដ្ឋាភិបាលខូចខាតអ្វីខ្លះទៅ ?

**យោម បុផ្ផា:** រដ្ឋាភិបាលដែលបានចាប់ខ្លួននាងខ្ញុំ ការរំលោភបំពានសិទ្ធមនុស្ស ក៏ដូចជាការបើកបណ្តោយឱ្យធ្វើអភិវឌ្ឍន៍ឱ្យក្រុមហ៊ុនចិននឹងវៀតណាមចូលមកកាប់បំផ្លាញ ព្រៃឈើបឹង បូរបំផ្លាញសម្បត្តិធម្មជាតិ **តទៅទំព័រទី ២៥**

# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគូ សាមុត
តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤
តម្លៃ $10



CAMBODGE
តម្លៃ $5



អង្គការជានរណា?
បីភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
អាចទិញនៅអាសយដ្ឋាន៖ 45 Merrimack St., Suite 218A, Lowell, MA 01852

---

# Your Bussiness
## Card is Here for $50/mon

ពាណិជ្ជកម្មរបស់អ្នកនៅទីនេះចំណាយ
ត្រឹមតែ $50 ក្នុង១ខែ

---

## ត្រូវលក់ហាងធ្វើក្រចក (Liberty Nail)
## &
## រកបុគ្គលិកស្រីធ្វើក្រចក

ត្រូវលក់ហាងក្រចក Liberty Nail នៅ Dracut ក្នុង Walbrook Plaza មានកន្លែងចតឡាន
អាស័យដ្ឋានហាង: 18 Pleasant St, Dracut, MA 01826
-មានតុធ្វើក្រចកដៃ ៤ (ថ្មី) -តុធ្វើក្រចកជើង ៣ (ថ្មី) -សំបូរអតិជនចេញ ចូលច្រើន
-ហាងធំទូលាយ អាចដាក់សម្ភារៈកែសម្ផស្ស ឬធ្វើជាបន្ទប់ខ្ញីខនង បាន

**ត្រូវការជ្រើសរើសបុគ្គលិកស្រីធ្វើក្រចកប្រញាប់ :**

-ត្រូវចេះធ្វើក្រចកដៃ និងជើង: ទាំងម៉ូតៗ និងធម្មតា
-ត្រូវមានបទពិសោធន៍ និងសញ្ញាប័ត្រធ្វើក្រចក
សូមទូរស័ព្ទមក លីសា (Lisa) 978-895-2083
ចេះនិយាយអង់គ្លេស និង វៀតណាម (Speak English/Vietnamese)

---

# Night Time Duct Cleaners Wanted

Large established duct cleaning company is looking for hardworking technicians to perform kitchen grease exhaust cleaning, Hvac cleaning, mold remediation, and fire&water cleanup. $12-$20 per hour depending on experience. Will train the right person. Must have valid drivers license. We provide health, 401k, vacation, holidays, and OT. Room for advancement. $1,000.00 Bonus for city of Boston and State certified cleaners. **Call 781.356.8244**

---

www.vmlaptops.com

## Computer Repair

**Repair, Buy , Sale, and Trade**

VM LAPTOPS CENTER

**VANNAK MOEUN (VICTOR)**
*President*

**(401)-314-7777**
**(513)-518-4938**

301 Reservoir Ave Unit 2
Providence, RI 02907

E-mail: van@vmlaptops.com

Fax#: (401)-461-2220

---

# Liberty Nail Salon for SALE
# &
# Help Wanted-Female Nail Tech

Liberty Salon for SALE, in Walbrook Plaza, in Dracut
Address: 18 Pleasant St, Dracut, MA 01826

- Big space for beauty facilities and Waxing Room Female Nail Tech
- Manicure, Pedicure
- With experiences and License Manicure, Pedicure

Please call Lisa: **978-895-2083** (English/Vietnamese)

---

## We Buy Broken Laptops

VM LAPTOPS CENTER

**Free, Free, Free,Free**
**Computer Diagnostic**

Laptops Motherboard Replacement
Virus, Spy ware, Ad ware Removal
Laptops DC Jack Replacement
Laptops Screen Replacement

Scan to view our Website!

# សេចក្ដីជូនដំណឹង

## កិច្ចប្រជុំជាសាធារណៈ និងឱកាសផ្ដល់យោបល់

### ស្ដីពីរបាយការណ៍នៃសេចក្ដីព្រាងលើបញ្ញត្តិ៦

អង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌមីដដលស៊ិកខាងជើង ហៅកាត់ថា អិន អឹម អឹម ភី អូ (NMMPO) បានផ្សព្វផ្សាយជាសាធារណៈនូវបាយការណ៍នៃសេចក្ដីព្រាងលើបញ្ញត្តិលេខ៦ ដើម្បីឱ្យសាធារណជនបានជ្រាប និងផ្ដល់ជាយោបល់ ។ បទបញ្ញត្តិ៦ពិនិត្យទៅលើពីប្រសិទ្ធភាពដែលអង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌ មីដដលស៊ិកខាងជើងហៅកាត់ថា អិន អឹម អឹម ភី អូ (NMMPO) បានប្រតិបត្តិទាក់ទិនទៅនឹងការអនុវត្តកិច្ចព្រមព្រៀងសិទ្ធមនុស្សឆ្នាំ១៩៦៤ និងលក្ខខ័ណ្ឌ: ព្រមទាំងច្បាប់ទាំងឡាយដែលកំណត់ដោយ យូ អេស ឌី អូ ធី (USDOT) ។

កិច្ចប្រជុំជាសាធារណៈនឹងប្រព្រឹត្តទៅនៅថ្ងៃអង្គារ ទី២៩ ខែកក្កដា ឆ្នាំ២០១៤ នៅវេលាម៉ោង៥ និង៣០នាទីរសៀល។ កិច្ចប្រជុំនេះធ្វើឡើងដើម្បីជម្រាបដល់សាធារណជន និងទទួលយោបល់ពីសាធារណៈជន ស្ដីពីរបាយកការណ៍នៃសេចក្ដីព្រាងខាងលើ ។

កិច្ចប្រជុំនេះ នឹងប្រព្រឹត្តទៅនៅការិយាល័យរដ្ឋាភិបាលក្នុងខណ្ឌមីដដលសិកខាងជើង ផ្លូវ៤០ ឆឺចស្ទ្រីត ស៊ុតលេខ២០០ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត(40 Church Street, Suite 200, Lowell, MA). លោកអ្នកអាចផ្ញើយោបល់តាមទូរស័ព្ទ ឬអ៊ីម៉ែលទៅកាន់ ចឹសស្ទីន ហូវឹដ តាមរយៈលេខទូរស័ព្ទ ៩៧៨-៤៥៤-៨០២១ បន្ដចុចលេខ១២១ ឬអាចអ៊ីម៉ែល jhoward@nmcog.org ។ ហើយលោកអ្នកក៏ផ្ញើយោបល់តាមសំបុត្រទៅកាន់អាស័យដ្ឋានខាងលើដែលផុតកំណត់ទទួលយោបល់នៅថ្ងៃទី៧ សីហា ឆ្នាំ២០១៤។ លោកអ្នកអាចចូលមើលច្បាប់ចម្លងនៃព័ត៌មានអំពីកិច្ចប្រជុំនេះតាមគេហទំព័រ ww.nmcog.org ឬដោយទូរស័ព្ទមកកាន់ ៩៧៨-៤៥៤-៨០២១ ។

**ចំណាំ** :ទីកន្លែងនៃកិច្ចប្រជុំខាងលើផ្ដល់ដល់អ្នកចូលរួមដែលមិនចេះភាសាអង់គ្លេស និងជនពិការនូវទីតាំងងាយទៅដល់ ព្រោះនៅក្បែរមធ្យោបាយធ្វើដំណើរសាធារណៈ។ អិន អឹម ស៊ី អូ ជី ផ្ដល់ជូននូវការចតទោចក្រយាន្តនៅជាន់ទីពីរប្រកបដោយសុវត្ថិភាព ។ លោកអ្នកអាចទទួលបានទីកន្លែងស្នាក់នៅ និងការបកប្រែភាសាដោយគិតថ្លៃ (ទាំងភាសាកាយវិកា និងសម្លេងការថតរូប និងវីដេអូប្រដាប់ជំនួយសម្លេងស្ដាប់ការប្រជុំ និងឧបករណ៍ជំនួយក្នុងទម្រង់ផ្សេងៗទៀត) តាមរយៈការស្នើរសុំពេលចូលរួមកិច្ចប្រជុំខាងលើ។

សម្រាប់ការស្នើរសុំទីកន្លែងស្នាក់នៅ និងសេវាបកប្រែភាសាពេលចូលរួមកិច្ចប្រជុំ សូមទាក់ទង ចឹសស្ទីន ហូវឹដ តាមរយៈលេខទូរស័ព្ទ ៩៧៨-៤៥៤-៨០២១ បន្ដចុចលេខ១២១ ឬអាចអ៊ីម៉ែល jhoward@nmcog.org ។ ការស្នើរសុំជំនួយបកប្រែភាសាកាយវិកា និងភាសានិយាយ គួរតែធ្វើឡើងឱ្យលឿនបំផុតតាមដែលអាចធ្វើបាន ដើម្បីឱ្យបុគ្គលិកដែលទទួលបន្ទុកអាចរៀបចំឱ្យបានទាន់ពេលវេលា។

# NOTICE OF PUBLIC MEETING AND COMMENT OPPORTUNITY : 2014 DRAFT TITLE VI ASSESSMENT REPORT

The Northern Middlesex Metropolitan Planning Organization (NMMPO) has released the 2014 Draft Title VI Assessment Report for public review and comment. The Title VI assessment examines how well the Northern Middlesex MPO complies with Title VI of the Civil Rights Act of 1964, and with the regulations and policies set by the USDOT.

A public meeting to receive comments on the draft document will be held on July 29th, 2014, 5:30PM, at the Northern Middlesex Council of Governments office, located at 40 Church Street, Suite 200, Lowell, MA. You may also submit comments by phone at (978) 454-8021, ext 121 or at jhoward@nmcog.org. If preferred, comments may be mailed to the above address. The public comment period will end at close of business on August 7, 2014. You may access a copy of the document online at www.nmcog.org or by calling (978) 454-8021.

Notice: This location is accessible to people with disabilities and is near public transportation. NMCOG offers secure bicycle parking on the second floor. The NMMPO provides reasonable accommodations and/or language assistance free of charge upon request (including but not limited to interpreters in American Sign Language and languages other than English, open or closed captioning for videos, assistive listening devices and alternate material formats), as available. For assistance, please contact Justin Howard at (978) 454-8021, ext 121 or at jhoward@nmcog.org . Requests should be made as soon as possible for services requiring advanced arrangements, including sign-language, CART or language translation or interpretation.

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ប្រជាធិបតេយ្យសម័យនោះដឹកនាំប្រទេសដោយរបៀបប្រកាន់បក្សពួកបញ្ចុះបញ្ចូលផ្ដល់ផលប្រយោជន៍ទៅឱ្យដៃជើងរបស់ខ្លួននៅក្នុងរង្វង់អ្នករាជការធ្វើឱ្យកិច្ចរដ្ឋាភិបាលច្រឡំបល់ខ្វះវិន័យ ខ្វះសេចក្ដីថ្លៃថ្នូរ ខ្វះសេចក្ដីក្លាហានជាការផ្ទុយទៅនឹងបាវចនារបស់គណបក្សប្រជាធិបតេយ្យដែលថា "វិន័យ.ថ្លៃថ្នូរ. ក្លាហាន"នោះ ទៅវិញ ។ ក្រៅពីនេះ អ្នកដឹកនាំគណបក្សនេះបានបង្កើតនូវការខ្វែងគំនិតគ្នាជាច្រើន រហូតដល់មិនចុះសម្រុងរវាងគ្នាឯងទៀតផង ។ ពួកគេពុំបានធ្វើឱ្យមានទំនាក់ទំនងជាមួយមហាជនដែលជាប្រជាពលរដ្ឋក្រីក្រអ្នកស្រែចំការទេ ពួកគេខ្នះខ្នែងតែរករបរ និងកៅអីសម្រាប់ពួកខ្លួនតែប៉ុណ្ណោះ ។ នេះជាការភ័ន្តច្រឡំទី៣ ។

ពួកប្រជាធិបតេយ្យភ្លេចខ្លួន ពុំបាននឹកថាដរាបណាខ្លួនពុំទាន់បានធ្វើអ្វីមួយឱ្យរាស្ត្រឃើញថា ខ្លួនស្រឡាញ់រាស្ត្រ បំរើរាស្ត្រដោយស្មោះស្ម័គ្រការពាររាស្ត្រ ដោះទុក្ខវេទនារបស់រាស្ត្រ ហ៊ានជាប់គុកច្រវាក់ ប្រថុយប្ដូរជីវិតដើម្បីការពារផលប្រយោជន៍រាស្ត្រ និងប្រទេសជាតិ ហើយបែរជានាំគ្នាប្រឹងរកតែប្រយោជន៍ផ្ទាល់ខ្លួន និងបក្សពួកខ្លួនតែម្យ៉ាងនោះដរាបនោះ ច្បាស់ជាពុំអាចប្រឆាំងយលឈ្នះលើពួករាជានិយមបានឡើយ ព្រោះប្រជារាស្ត្រខ្មែរ និងពួកអ្នកអែបអបលុតក្រាបគ្រុន១ នៅតែទុកស្ដេចថា ជាម្ចាស់ផែនដីជាម្ចាស់ជីវិតរបស់ខ្លួននៅឡើយ ។

បន្ទាប់ពីបានរំលាយរដ្ឋសភា រួចកាន់តំណែងជានាយករដ្ឋមន្ត្រីខ្លួនឯងនោះ សីហនុ បានភ្ញាក់ខ្លួនថា ត្រូវតែស្វះស្វែងរកឯករាជ្យដែលជាចំណងរបស់ប្រជាពលរដ្ឋទូទៅ ឱ្យបានមុនពួកអ្នកតស៊ូដោយកម្លាំងអាវុធ ជាពិសេសចលនាខ្មែរយៀកមិញ ដែលមាន ស៊ឺន ង៉ុនថាន់ ជាមេដឹកនាំ និងជាមេរដ្ឋាភិបាលបណ្ដោះអាសន្ននៃកម្ពុជាសេរីដែលយួនយៀកមិញបានបង្កើតឡើង ។ បើពុំនោះទេ រាជសម្បត្តិរបស់ខ្លួនច្បាស់ជាត្រូវរលំ ហើយរាជានិយមខ្មែរក៏នឹងត្រូវរលាយ ។ ហេតុនេះ ហើយបានជានៅដើមខែកុម្ភៈ ឆ្នាំ១៩៥៣ បន្ទាប់ពីបានផ្ទេរតំណែងនាយករដ្ឋមន្ត្រីទៅឱ្យលោក ប៉ែន នុត និងប្រគល់ក្រុមប្រឹក្សារាជានុសិទ្ធិថ្វាយទៅព្រះរាជបិតា នរោត្តម សុរាម្រិត ស្រេចហើយ ស្ដេចសីហនុ ក៏ចេញដំណើរទៅប្រទេសបារាំង ចុះសំចតនៅក្រុងរ៉ូម ប្រទេសអ៊ីតាលី ។ ទ្រង់បានផ្ញើរសារលិខិតមួយទៅប្រធានាធិបតីបារាំង វ៉ាន់ សង់អូរិយ៉ូល បង្ហាញនូវយោបល់របស់ទ្រង់អំពីការរៀបចំឱ្យមានឯករាជ្យនៃប្រទេសកម្ពុជា (នេះជាលើកដំបូងបំផុត ដែលស្ដេចសីហនុ ហ៊ានប្រើពាក្យ "ឯករាជ្យ"ជាមួយប្រធានាធិបតី បារាំង)។ លុះយាងទៅដល់ប្រទេសបារាំងស្ដេច សីហនុ ដែលនៅមានវ័យក្មេងខ្ចីនៅឡើយ ហើយជាអ្នកល្មោភស្រីស្រស់នោះ ក៏ទៅសំណាក់នៅឡាណាប៉ូល ឆ្នេរសមុទ្រកូដាសៀវ ហើយទ្រង់បានផ្ញើលិខិតនោះទៅនូវលិខិតជាច្រើនច្បាប់ទៅប្រធានាធិបតីបារាំង ទាមទារឱ្យបារាំងផ្ទេរអំណាចយោធា និងតុលាការមកឱ្យខ្មែរ ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ដល់ថ្ងៃទី២៥ មីនា ទើបបារាំងទទួលស្ដេចសីហនុ នៅវិមានអេលីហ្សេ ។ ការសន្ទនារវាងសីហនុ និងអូរិយ៉ូល ឥតបានលទ្ធផលអ្វីទាំងអស់ ដោយអូរិយ៉ូលធ្វើឫកជាថ្លង់មិនដឹងមិនឮតែម្ដង ។ រួចស្ដេចសីហនុក៏បានខំព្យាយាមទាក់ទងជាមួយអ្នកទទួលខុសត្រូវបារាំងជាច្រើននាក់ ដើម្បីធ្វើកិច្ចចរចាឱ្យមានដំណើរទៅមុខ ប៉ុន្តែនៅតែពុំបានការអ្វីទាំងអស់ ។ ទ្រង់តូចព្រះទ័យខ្លាំងណាស់ចំពោះបារាំងដែលវាយឫកក្រអឺតក្រទមដាក់ទ្រង់ ដូច្នេះទ្រង់ក៏នឹកភ្នកដល់សហរដ្ឋអាមេរិកដែលជាអ្នកផ្ដល់អាវុធយ៉ាងសន្ធឹកសន្ធាប់ជាងគេទៅឱ្យកងទ័ពបារាំងនៅឥណ្ឌូចិន ក្រោយពេលដែលចិនបានក្លាយទៅជាកុម្មុយនីស្ត ។ ទ្រង់ទុករាជបរិវារដែលហែរហមមួយក្រុមឱ្យនៅធ្វើការចរចារជាមួយបារាំង មានជាអាទិ៍: លោក ប៉ែន នុត និងលោក សម សារី រួចទ្រង់ក៏យាងទៅសហរដ្ឋអាមេរិក កាត់តាមក្រុងម៉ុងរ៉េអាល់ប្រទេសកាណាដា ។ លុះយាងទៅដល់ក្រុងម៉ុងរ៉េអាល់នៅថ្ងៃទី១២ មេសា ១៩៥៣ ស្ដេចសីហនុ បានប្រថាប់នៅប្រទេសកាណាដាចំនួន១សប្ដាហ៍ដែលនៅទីនោះទ្រង់បានទាក់ទាញអារម្មណ៍ពួកអ្នកសារព័ត៌មានឱ្យជ្រួតជ្រាបអំពីបញ្ហាទាមទារឯករាជ្យរបស់ខ្មែរ ។

ថ្ងៃទី ១៩ មេសា ១៩៥៣ ស្ដេចសីហនុព្រមទាំងបរិវារបានធ្វើដំណើរទៅដល់ក្រុងវ៉ាស៊ីនតោន សហរដ្ឋអាមេរិក ដែលមានលោកអនុប្រធានាធិបតី Richard Nixonជាអ្នកទទួលព្រះអង្គ ។ ថ្ងៃបន្ទាប់មកទ្រង់បានចូលជួបសន្ទនាជាមួយរដ្ឋលេខាធិការ ក្រសួងការបរទេសសហរដ្ឋអាមេរិកឈ្មោះ John Foster Dulles ចំនួនមួយម៉ោង ។

ក្នុងកិច្ចសន្ទនានោះ ទ្រង់បានមានព្រះបន្ទូលទៅកាន់លោក ដាល់ឡិស ថា "ឯករាជ្យខ្មែរបើមិនរកវិធីដោះស្រាយតាមផ្លូវនយោបាយទេ ហើយនាំគ្នាខំប្រឹងប្រែងតែខាងផ្លូវយោធាតែម្យ៉ាងនោះ ទោះបីស.រ.អាជួយយ៉ាងណាក៏ដោយ ក៏មិនអាចនឹងយកឈ្នះបានឡើយ ។ ព្រោះប្រជាជនមិនចូលរួមក្នុងការតស៊ូដោយគេមានជំនឿថា វាប្រឆាំងនឹងផលប្រយោជន៍របស់គេ ។ បើប្រគល់ឯករាជ្យពិតប្រាកដទៅឱ្យប្រទេសទាំង៣នៅឥណ្ឌូចិនមានន័យថា ធ្វើឱ្យប្រទេសទាំងនោះបានយល់កាន់តែច្បាស់នូវការទទួលខុសត្រូវរបស់ខ្លួនក្នុងសង្គ្រាមនេះ ។ សង្គ្រាមដែលចាញ់ឈ្នះឋិតនៅលើការយកចិត្តទុកដាក់ ជាពិសេសពីលោកប្រធានាធិបតេយ្យទាំងអស់ ។

ឯចម្លើយរបស់លោក Dulles តបទៅស្ដេចសីហនុវិញមានដូចតទៅនេះ: "ខ្ញុំសន្យានឹងព្រះចៅថា នៅពេលណាគ្រោះថ្នាក់កុម្មុយនីស្តអស់ពីប្រទេសរបស់ព្រះអង្គពេលនោះយើងនឹងអាចធ្វើអ្វីគ្រប់យ៉ាងដែលអាចធ្វើទៅបាន ដើម្បីឱ្យបារាំងទទួលស្គាល់នូវឯករាជ្យពេញទីរបស់ប្រទេសព្រះអង្គ. ប៉ុន្តែដរាបណាសត្រូវរួមរបស់យើង គឺពួកយៀកមិញមិនទាន់បរាជ័យទេនោះ ដរាបនោះព្រះអង្គត្រូវយល់ និងជឿជាក់ថា ពួកគេមានសមត្ថភាពបោសសំអាតបំផ្លាញរាជាធិបតេយ្យខ្មែរ ព្រមទាំងទំនៀមទំលាប់ដ៏ប្រពៃ និងអរិយធម៌បុរាណយូរអង្វែងរបស់ប្រទេសព្រះអង្គទៀតផង ។ ដូច្នេះដរាបណាគ្រោះថ្នាក់ដ៏ធំនេះ ដែលអាចជាគ្រោះថ្នាក់ដល់អាយុជីវិតនៃប្រទេសរបស់ព្រះអង្គមិនទាន់កំចាត់បានទេនោះ ដរាបនោះយើងមិនអាចធ្វើឱ្យបារាំងអស់កម្លាំងកាយ និងកម្លាំងចិត្តបានឡើយ ។ ទំនាស់រវាងព្រះអង្គ និងបារាំងវាបំរើតែប្រយោជន៍សត្រូវរួមរបស់យើងតែប៉ុណ្ណោះ"។

ពាក្យសំដីនៃរដ្ឋលេខាធិការក្រសួងការបរទេសសហរដ្ឋអាមេរិកនេះ បានធ្វើឱ្យនរោត្តម សីហនុ ខកព្រះទ័យយ៉ាងខ្លាំង ហើយមុននឹងយាងត្រឡប់ទៅកាន់មាតុប្រទេសវិញ ដោយកាត់តាមទីក្រុងតូក្យូប្រទេសជប៉ុននោះ នៅក្រុងញូវយ៉ក ទ្រង់បានធ្វើសេចក្ដីថ្លែងការណ៍មួយទៅកាន់សារព័ត៌មានញូវយ៉កថៃម៍ដូចតទៅនេះ :

"តាំងពីច្រើនឆ្នាំមកហើយ គំនិតថា វៀតមិញធ្វើការតស៊ូដើម្បីឯករាជ្យវៀតណាមនោះ កាន់តែមានជំនឿច្រើនឡើងនៅក្នុងមជ្ឈដ្ឋានវរជនខ្មែរ ។ បើបារាំងមិនព្រមឱ្យឯករាជ្យកាន់តែច្រើនឡើងទៅខ្មែរទេ ក្នុងរយៈពេល៣-៤ខែខាងមុខនេះខ្មែរមុខជានឹងចូលរួមពិតប្រាកដជាមួយវៀតមិញមិនខានឡើយ"។

ការគម្រាមកំហែងរបស់ស្ដេចសីហនុនេះ បានញុំាងឱ្យបារាំងបន្ទន់ឥរិយាបថរបស់ខ្លួនខ្លះដែរ ហើយកិច្ចចរចារបារាំង-ខ្មែរ ក៏បានចាប់ធ្វើឡើងនៅចុងខែមេសា ឆ្នាំ១៩៥៣ ។ នៅថ្ងៃទី៩ ឧសភា ១៩៥៣ លោក ប៉ែន នុត និងលោក ដឺម៉ុងតែលរដ្ឋមន្ត្រីក្រសួងសមាគតរដ្ឋបានចុះកិច្ចព្រមព្រៀង

តទៅលេខក្រោយ

---

តមកទំព័រទី ១៣ **រដ្ឋាភិបាលថៃជួយឱ្យប្រព័ន្ធផ្សព្វផ្សាយ...**

ឃុបឃិតជាមួយពួកគេ ដើម្បីនាំពលករចំណាកស្រុកដើម្បីទទួលបានសំណូក ។ រដ្ឋាភិបាលថៃដែលគ្រប់គ្រងអំណាចចាំបាច់ត្រូវតែបោសសម្អាតរឿងនេះ។ ប្រព័ន្ធផ្សព្វផ្សាយកម្ពុជារបស់យើងខ្វះព័ត៌មានសម្រាប់ពលករចំណាកស្រុកនោះ គឺជាបញ្ហា។ យើងមិនអាចជួយប្រជាពលរដ្ឋរបស់យើងបានទេ"។

លោក សុវណ្ណ បានបន្ថែមទៀតថា ដំណើរទស្សនកិច្ចដែលរួមមានការធ្វើដំណើរមួយទៅជនបទសម្រាករយៈពេលមួយយប់នៅរមណីយដ្ឋានភ្នំ ហើយកាលពីព្រឹកថ្ងៃសៅរ៍ចេញទៅមើលកីឡាម៉ារ៉ាតុនត្រូវបានចេញថ្លៃឱ្យដោយអ្នកកាសែតថៃមានស្តុកស្តមដែលជាសមាជិករបស់សហភាពប្រព័ន្ធផ្សព្វផ្សាយអាស៊ាន។

លោកបានបន្តថា "អស់លោកត្រូវតែទទួលស្គាល់ថា តើប្រព័ន្ធផ្សព្វផ្សាយថៃមាន១ណាស់"។ ម្នាក់ក្នុងចំណោមជនជាតិថៃដែលមានទ្រព្យស្តុកស្តម្ភទាំងនេះ គឺលោក ប្រាស៊ិត អគ្គលេខាធិការរបស់ UMA ដែលបានកោតសរសើរអាជ្ញាធរខេត្តស្រះកែវ នៅថ្ងៃនោះចំពោះការ" ធ្វើការបានយ៉ាងល្អដើម្បីជួយពលករចំណាកស្រុកខ្មែរមិនថាភ្លៀង ឬព្រះអាទិត្យរះក្ដៅឡើយ"។

យោងតាមលោក សុវណ្ណ បានឱ្យដឹងថា លោក ប្រាស៊ិត មានបទពិសោធចេញពីអ្នកកាសែតម្នាក់ដែលចុះផ្សាយព័ត៌មានអំពីខ្មែរក្រហមក្នុងទសវត្សរ៍ឆ្នាំ១៩៨០ មុនពេលក្លាយជាពាណិជ្ជករដ៏ស្តុកស្តម្ភ។ លោកបានពន្យល់ថា "គាត់ក្លាយជាអ្នកមាន ដូច្នេះពេលនេះគាត់ចាំបាច់ត្រូវ និងជួយបង្កើ តប្រព័ន្ធផ្សព្វផ្សាយខ្មែរ"។

ប្រជាពលរដ្ឋកម្ពុជាហាក់ដូចជាមិនពេញចិត្តនឹងជំនួញទេ។ លោក ថន សំណាង មកពីកាសែតដំណឹងថ្ងៃនេះ និយាយថា លោកមានគម្រោងសរសេរអត្ថបទមួយរៀបរាប់ពីប្រសិទ្ធភាពនៃមណ្ឌលដំណើរការជ្រើសរើសពលករថ្មីនេះ។ លោកថ្លែងថា "វាបានផ្លាស់ប្ដូរចិត្តរបស់ខ្ញុំពីព្រោះរដ្ឋាភិបាលថៃ ពីព្រោះរដ្ឋាភិបាលថៃបង្កលក្ខណៈងាយស្រួលដល់ពលរដ្ឋខ្មែរ។ ខ្ញុំនឹងសរសេរវាដើម្បីប្រជាពលរដ្ឋរបស់ខ្ញុំ"៕ **សុខុម**

តមកពីទំព័រទី ២១

## បទសម្ភាសន៍ជាមួយនាង ឃោម បុប្ផា...

គឺជាការខាតបង់ធំណាស់សម្រាប់ប្រទេសកម្ពុជារដ្ឋាភិបាលមិនដែលចាត់ទុកពលរដ្ឋខ្លួនឯងដែលជាម្ចាស់ឆ្នោតជាម្ចាស់អំណាចទេ តែងតែបើកដៃឱ្យក្រុមហ៊ុនបរទេសមកធ្វើបាបយកដីធ្លីប្រជាពលរដ្ឋខ្លួនឯងបំផ្លាញជាតិខ្លួនឯងនេះ គឺជាភាពអយុត្តិធម៌ខ្លាំងណាស់មិនថាសម្រាប់ខ្លួនខ្ញុំ ឬអ្នកបឹងកក់ទេ តែសម្រាប់ប្រទេសកម្ពុជាទាំងមូល... យើងឃើញហើយថា នៅក្រោមពាក្យថាអភិវឌ្ឍន៍នេះ គេបំផ្លាញអស់ ហើយព្រៃ ស្រុកភូមិ បឹងបួរ ទន្លេ ត្រីទន្លេឥឡូវ មិនសូវមានទេ មានតែត្រីចិញ្ចឹមខ្ញុំបានទៅរតនគិរី គ្រាន់តែព្រៃឡង់តែមួយដែលជួលឱ្យក្រុមហ៊ុនហង់អាញ់តែមួយវាធ្វើបាបយកដីធ្លីពលរដ្ឋបំផ្លាញសម្បត្តិព្រៃឈើរាប់រយហិចតាកេរ្តិ៍ដំណែលដូនតា គឺជាការខាតបង់ធំណាស់របស់ពលរដ្ឋខ្មែរដែលនៅក្រោមការគ្រប់គ្រងរបស់ជនម្នាក់នោះ ដែលកាន់អំណាច ៣០ឆ្នាំមកហើយ ហើយក្នុងការគ្រប់គ្រងនោះមិននាំភាពចំរុងចំរើនដល់ប្រជាពលរដ្ឋម្តងណាទេ មានតែអំពើពុករលួយជាប្រព័ន្ធទូទាំងប្រទេស បក្ខពួកនិយមប្រើអំពើហឹង្សាមិនដែលចាត់ទុកប្រជាពលរដ្ឋខ្លួនឯងជាម្ចាស់ស្រុកនោះទេ ។

**សំនួរៈ** ប្រជាពលរដ្ឋដែលមកធ្វើបាតុកម្មរួមទាំងបុផ្ផាខ្លួនឯងផង លែងខ្លាចជនផ្តាច់ការដែលធ្វើឱ្យជីវិតគេ បើរស់តទៅទៀត របៀបហ្នឹងក៏មិនប្រសើរ តើគេគិតរបៀបហ្នឹងទាំងអស់គ្នា ឬក៏មានខ្លះៗទេ ?

**ឃោម បុផ្ផាៈ** មិនអញ្ចឹងទេ គឺទាំងអស់គ្នាតែម្តង ខ្ញុំគិតថាទូទាំងប្រទេសបេះដូងចិត្តថ្លើមគាត់ទៅអស់ហើយ គឺគាត់ចង់បានការប្តូរស់ប្តូរ ចង់បានការដឹកនាំថ្មីចង់បានមន្ត្រីដែលស្អាតស្អំស្មើរភាពគ្នាគោរពច្បាប់ ដូចគ្នាទាំងរាស្ត្រទាំងមន្ត្រី



ក៏ប៉ុន្តែនៅខ្វះបន្តិចទៀត គឺសេចក្តីក្លាហានរបស់បងប្អូនថែមបន្តិចទៀត ប្រាកដជាបានសម្រេចបំណងផ្លាស់ប្តូរនោះជាមិនខាន...របបនេះបានធ្វើឱ្យប្រជាពលរដ្ឋទូទាំងប្រទេសឈឺចាប់ដោយភាពអយុត្តិធម៌គ្រប់បែបយ៉ាងនាំគ្នាចេញមកតវ៉ាយ៉ាងច្រើននិយាយការណ៍ពិតថ្កោលទោសរបបនោះគ្រប់គ្នា ដូច្នេះមិនអាចរស់នៅយូរបានទេរបបនោះ នឹងត្រូវចប់ជាមិនខាន ។

**សំនួរៈ** ប្រជាពលពលរដ្ឋចេញមកសម្តែងការមិនពេញចិត្តច្រើនម្លឹងៗស្មើរមិនគួរជឿបាន ទៅខ្ញុំឆ្ងល់ថា ហេតុអ្វីក៏នៅមិនទាន់រលំទៀត?

**ឃោម បុផ្ផាៈ** ខញុំគិតថា បងប្អូននៅមិនទាន់មានភាពជឿជាក់លើ...

**សំនួរៈ** ខ្លួនឯង ?

**ឃោម បុផ្ផាៈ** មិនមែនទេ! គឺនៅប្រទេសកម្ពុជាមានអ្នកកាន់អំណាច២ គឺបក្សសង្គ្រោះជាតិមួយនឹងបក្សប្រជាជនមួយក្នុងពេលនេះ ប្រជាពលរដ្ឋមានការគាំទ្រសង្គ្រោះជាតិច្រើនហើយ ហើយដឹងថាមានការឈឺចាប់ចង់ឱ្យមានការផ្លាស់ប្តូរ អ្នកកាន់អំណាច សព្វថ្ងៃហើយតែមិនទាន់ជឿជាក់លើបក្សមួយទៀត គឺខ្ញុំក្តីបងប្អូន ឬទៀតក្តីចង់ឱ្យមានការជឿជាក់ ដើម្បីឱ្យមានការផ្លាស់ប្តូរឱ្យបានឆាប់រហ័ស

**សំនួរៈ** តើនៅខ្វះកន្លែងណាទៅ?

**ឃោម បុផ្ផាៈ** យើងជាអ្នកតស៊ូមតិឃើញថា នៅខ្វះការជាក់លាក់មួយខ្ញុំមិនដឹងទេថា តើគណបក្សសង្គ្រោះជាតិដឹងទេថា ប្រជាពលរដ្ឋចង់បានអ្វី? មានបំណងទៅដល់ណា ?

**សំនួរៈ** តើអាចនិយាយពីគោលដៅនោះបាន ឬទេ?

**ឃោម បុផ្ផាៈ** គោលដៅ គឺអ្វីដែលយើងចង់បាននោះ គឺផ្លាស់ប្តូរអ្នកដឹកនាំ

**សំនួរៈ** ហើយគណបក្សសង្គ្រោះជាតិឥតបានដឹងរឿងហ្នឹងទេឬ ?

**ឃោម បុផ្ផាៈ** ខ្ញុំមិនដឹងថាពួកគាត់បានដឹង ឬក៏មិនដឹងទេ តែនេះគឺជាគោលដៅរបស់ប្រជាពលរដ្ឋ !

**សំនួរ ៈ** ខ្ញុំចង់និយាយថា គណបក្សសង្គ្រោះជាតិឥតទាន់ចង់ឥតចង់ឱ្យទៅដល់គោលដៅភ្លាមៗទេ គឺពន្យាពេលឱ្យនៅយូរតទៅទៀត

**ឃោម បុផ្ផាៈ** ចា! ខ្ញុំចាំថា នៅពេលមួយនោះមានប្រជាពលរដ្ឋជាច្រើនគ្រប់មជ្ឈដ្ឋានផុសផុលចេញមកមកតស៊ូមតិមានប្រជាពលរដ្ឋគ្រប់ស្រទាប់ពួកយុវជនខាងព្រៃឈើ ម៉ូតូកង់៣ កម្មករខ្ញុំមិនចាំថ្ងៃច្បាស់ទេ គឺមុនថ្ងៃគេដេញនៅទីលានប្រជាធិបតេយ្យប្រជាពលរដ្ឋផុសផុលខ្លាំងណាស់មានមនុស្សប្រហែលជា១លាននាក់ ហេតុអ្វីក៏ប្រកាសឱ្យបញ្ឈប់ទៅវិញ? ខ្ញុំមិនបានយល់ថាហេតុអ្វីក៏ងាកមករកការចរចាទៅវិញ ហើយការចរចានោះទោះទៀតសោត ក៏មិនបានលទ្ធផលអ្វីទាល់តែសោះ

**សំនួរៈ** ការចរចារសំដៅលើការបោះឆ្នោតជាធំ រីឯប្រជាពលរដ្ឋចង់បានការទម្លាក់រដ្ឋាភិបាលមែនទេ ?

**ឃោម បុផ្ផាៈ** ចា ! ខ្ញុំនៅតែឆ្ងល់ចំណុច១ថាគណបក្សសង្គ្រោះជាតិមិនព្រមចូលសភាទេ តែហេតុអ្វីក៏ទៅចូលរួមបោះឆ្នោតឃុំសង្កាត់អ្វីនឹងគេដែរ? សង្ឃឹមថាគណបក្សសង្គ្រោះជាតិអាចនឹងផ្តល់ចម្លើយឱ្យយើងបាន ៕

**សូមអានជាបន្តនៅលេខក្រោយទៀត**

# 9 កក្កដា 2014 - 9 July 2014 ـ Demonstration of khmer Krom in P.Penh

១-កាលពីព្រឹកមិញនេះ ព្រះសង្ឃ និងយុវជនស្នេហាជាតិបានធ្វើសន្និសីទសារព័ត៌មានស្តីពីការធ្វើបាតុកម្មនៅមុខស្ថានទូតយួនទាមទារអោយអ្នកនាំពាក្យស្ថានទូតយួនសុំទោសប្រជាពលរដ្ឋខ្មែរជាសាធារណៈចំពោះពាក្យសម្តីដែលអ្នកនាំពាក្យរូបនេះ និយាយថា ទឹកដីកម្ពុជាក្រោមជាទឹកដីរបស់ដូនតាយួននៅភោជនីយដ្ឋានប៉ៃតង រាជធានីភ្នំពេញ។ នៅព្រឹកថ្ងៃទី០៨ខែកក្កដា និស្សិតព្រះសង្ឃ និងប្រជាពលរដ្ឋប្រមាណ២០០អង្គនាក់បានប្រមូលផ្តុំគ្នានៅមុខស្ថានទូតវៀតណាមនៅតាមបណ្តោយផ្លូវព្រះមុនីវង្សក្នុងរាជធានីភ្នំពេញ ដើម្បីទាមទារឱ្យមន្ត្រីអ្នកនាំពាក្យស្ថានទូត លោក ត្រឹង វ៉ាន់ថុង សុំទោសចំពោះការថ្លែង កាលពីដើមខែមិថុនាថា ទឹកដីកម្ពុជាក្រោមជារបស់វៀតណាមតាំងពីដើមមកមិនមែនបារាំងកាត់ចេញពីកម្ពុជាទេ។

ប្រជាបាតុករមិនត្រឹមតែតែមិនទទួលបាននូវចម្លើយពីដំណាងស្ថានទូតវៀតណាមតែប៉ុណ្ណោះទេ ប៉ូលីសរដ្ឋាភិបាល ហ៊ុន សែន ថែមទាំងវាយបំបែកយ៉ាងសាហាវបណ្តាលឱ្យមានរបួសប្រមាណ ១០នាក់ ។ សមាគមការពារសិទ្ធិមនុស្សអាដហុកថ្កោលទោសចំពោះការប្រើប្រាស់កម្លាំងខុសច្បាប់ម្តងហើយម្តងទៀត ដោយអាជ្ញាធររាជធានីភ្នំពេញក្នុងការបង្ក្រាប និងបំបែកសេរីភាពជួបជុំបញ្ចេញមតិរបស់ប្រជាពលរដ្ឋដែលធានាដោយរដ្ឋធម្មនុញ្ញ ៕

ខាងក្រោមនេះ សហព័ន្ធខ្មែរក្រោមបានបញ្ចេញអត្ថបទប្រវត្តិសាស្ត្រមួយ ដើម្បីបញ្ជាក់ពីភាពត្រឹមត្រូវនៃបាតុកម្មរបស់ខ្លួន :

## មូលប្រវត្តិសាស្ត្រទឹកដីកម្ពុជាក្រោម

កាលណានិយាយពីទឹកដីកម្ពុជាក្រោម យើងមិនអាចកាត់ផ្តាច់ ដោយមិននិយាយពីព្រះរាជាណាចក្រកម្ពុជាបាននោះទេ ព្រោះកាលពីដើមឡើយ ទឹកដីកម្ពុជាក្រោមជាទឹកដីកម្មសិទ្ធិរបស់ព្រះរាជាណាចក្រកម្ពុជា។

លោក Dauphin Meunier អនុប្រធានសមាគមភូមិសាស្ត្រ និងសេដ្ឋកិច្ចបារាំង បានសរសេរអំពីប្រវត្តិសាស្ត្រខ្មែរថា ប្រជារាស្ត្រកម្ពុជា ដែលគេស្គាល់ថាជាប្រជារាស្ត្រខ្មែរនោះ បានបង្កើតឡើងដោយក្រុមអូស្ត្រូអាស៊ីយ៉ាទិក (Austro Asiatique) ហើយបានតាំងលំនៅក្នុងឧបទ្វីបឥណ្ឌូចិនប្រហែលជាង្គែសតវត្សរ៍មុនគ្រិស្តសករាជ។ លោក Dauphin Meunier បានសរសេរបញ្ជាក់ថា ប្រជារាស្ត្រទាំងឡាយនៅឥណ្ឌូចិនមានតែប្រជារាស្ត្រខ្មែរទេ ដែលបានតាំងទីលំនៅមុនគេបង្អស់។ លុះដល់សតវត្សរ៍ទី១៣ ទើបឃើញមានជនជាតិអណ្ណាម សៀម និងភូមា។

លោក Andre Migot បានចម្លងឡើងវិញនូវផែនទីប្រវត្តិសាស្ត្រនិងបុរាណវិទ្យាបង្ហាញពីភាពអស្ចារ្យ មហាចក្រភពខ្មែរ ឬហៅថា កម្ពុជទេសា (Empire Khmer Kambujadeca) នៅសតវត្សរ៍ ទី១១-១២-១៣ ដែលបានកាន់កាប់ស្ទើរតែទាំងស្រុងក្នុងឧបទ្វីបឥណ្ឌូចិន និងមួយភាគធំនៃទឹកដីសៀម។ លោក Andre Migot បានសរសេរបន្តថា ភាពខុសគ្នាដែលបានកើតមានឡើង រវាងប្រទេសវៀតណាម និងប្រទេសខ្មែរ មិនមែនជាភាពចៃដន្យនៃមជ្ឈដ្ឋានភូមិសាស្ត្រនោះទេ។ ការពិតជាក់ស្តែងជួរភ្នំអណ្ណាមបានខណ្ឌចែកតំបន់ពីរដាច់ដោយឡែកពីគ្នារួចទៅហើយ ហើយមនុស្ស ភាសា វប្បធម៌ សាសនា និងការរស់នៅខុសគ្នាទាំងស្រុងតែម្តង។ មានន័យថា មានពិភពពីរដាច់ដោយឡែកពីគ្នា គឺប្រទេសវៀតណាមជាពិភពចិន ប្រទេសខ្មែរជាពិភពឥណ្ឌា។

ចាប់តាំងពីសតវត្សរ៍ទី២ រហូតដល់ទី៦ នៃគ្រិស្តសករាជ គឺជាសម័យកាលមួយហៅថា សម័យកាល Proto-Khmer បានផ្សាយគ្រប់ទិសទី។ សម័យនេះហើយ ក្រុមប្រវត្តិវិទូបានសរសេរថា ជាសម័យកាលអរិយធម៌ខ្មែររុងរឿង និងរីកចម្រើនដ៏អស្ចារ្យ (សម័យហ្វូណន)។ ពេលនោះពុំទាន់មានព្រះរាជាណាចក្រកម្ពុជានៅឡើយទេ គេស្គាល់តែ ***នគរហ្វូណន ឬប្រទេសហ្វូណន*** ប៉ុណ្ណោះ។ ហេតុដូចម្តេចបានជានគរហ្វូណនល្បីល្បាញខ្លាំងម្ល៉េះ កាលសម័យនោះ?

លោក Louis Malleret បុរាណវិទូដ៏ឆ្នើម បានសរសេរ និងបោះពុម្ពផ្សាយដោយសាលាបារាំងចុងបូព៌ាប្រទេសថា ហ្វូណនមានកំពង់ផែដ៏សំខាន់មួយនៅ អូរ កែវ បារាំងហៅថា អុក អែវ ជាទីប្រជុំនៃអ្នកជំនួញមកពីគ្រប់ទិសទីនៃពិភពលោក។ កំពង់ផែនេះ មិនត្រឹមតែទទួលសំពៅមកពីប្រទេសចិន ម៉ាឡេស៊ី និងឥណ្ឌាប៉ុណ្ណោះទេ ក៏មានមកពីប្រទេសហូឡង់ផងដែរ។

កំពង់ផែអូរ កែវ ស្ថិតនៅខេត្តពាមបន្ទាយមាស កម្ពុជាក្រោម យួនបានប្តូរទៅជាខេត្តហា ទៀង ទៅជា កៀង យ៉ាង នៅជាប់ព្រំដែនខេត្តកំពត បច្ចុប្បន្នក្លាយជាភូនភ្នំតូចមួយមានរាងចតុកោណកែង មានទទឹង ១គីឡូម៉ែត្រកន្លះ បណ្តោយ ៣គីឡូម៉ែត្រ។ ស្ថិតនៅទិសអាគ្នេយ៍ជើងភ្នំបាថេ។

លោក Louis Malleret បានសរសេរទៀតថា អូរ កែវ មិនមែនត្រឹមតែបុរីសមុទ្រនោះទេ តែជារាជធានីដំបូងរបស់ហ្វូណន ឬនគរភ្នំ ទៀតផង។ ដោយសារការរីកចំរើននេះហើយ ទើបព្រះមហាក្សត្រខ្មែរបានសាងរាជធានីនៅព្រៃគ ឬព្រៃនគរ យួនបានប្តូរជា សៃហ្គន បច្ចុប្បន្នជាទីក្រុងហោជីមិញ។ ចំពោះ លោក Sylvestre ដែលបានសរសេរនៅក្នុងសៀវភៅរបស់លោកឈ្មោះ រាណាចក្រអណ្ណាម ថា ព្រះមហាក្សត្រខ្មែរទាំងឡាយបានសោយរាជ្យនៅរាជធានីព្រៃនគរប្រហែល ២៨៩ឆ្នាំ មុនគ្រិស្តសករាជ។

ឆ្នាំ១៩២០ ក្រុមបុរាណវិទ្យាមួយក្រុមបានថតទិដ្ឋភាពទឹកដីកម្ពុជាក្រោមទាំងមូលពីលើអាកាស ហើយបានឃើញតំបន់ អូរ កែវ មានព្រែកជីកជាច្រើន ហើយកន្លែងខ្លះមានសណ្ឋានជាទីក្រុងទៀតផង។ រហូតដល់ថ្ងៃទី១០ នៃកុម្ភៈ ឆ្នាំ១៩៤៤ លោក Louis Malleret បុរាណវិទូបារាំង បានធ្វើការសិក្សាស្រាវជ្រាវទៅលើសំណង់ចាស់ៗទាំងនោះឡើងវិញ ហើយបានកកាយជីករុករក ដើម្បីរកវត្ថុបុរាណទាំងឡាយនៅទីនោះ យកមកធ្វើការពិសោធន៍។

លោក Louis Malleret បានសរសេររៀបរាប់ថា អូរ កែវ ប្រហែលជាទីក្រុងវ៉េនីស (Venice) របស់ ***ហ្វូណន*** ដែលជាទីក្រុងដ៏ធំបំផុតនៅអាស៊ីនេះហើយ ព្រោះជាបុរីដ្ឋានមួយនៅជាប់មាត់ទឹក ដែលមានសង់ជាគេហដ្ឋានតំរៀបជាជួរដោយសម្ភារៈស្រាលៗទៅតាមការប្រែប្រួលនៃធារាសាស្ត្រធម្មជាតិ។ ដោយការខិតខំប្រឹងប្រែងស្រាវជ្រាវយ៉ាងសកម្ម ក្រុមអ្នកបុរាណវិទូ បានកាយរកឃើញគ្រឹះព្រះវិហារធ្វើអំពីថ្មនៅសេសសល់កប់យ៉ាងជ្រៅក្នុងស្រទាប់ដី។ គេឃើញឧបករណ៍ថ្មរលីង គ្រឿងចានឆ្នាំងធ្វើពីដី គុជ ខ្សែក កងដៃធ្វើអំពីកែវ អំពីថ្មដ៏មានតម្លៃ រូបចម្លាក់សំណាកធ្វើអំពីសំណប៉ាហាំង វត្ថុធ្វើអំពីដែក អំពីមាសប្រមាណ ១៣០០មុខ ទម្ងន់ ១១២០គីឡូក្រាម។

ដោយក៏ការឃើញជាក់ស្តែងបែបនេះ សារព័ត៌មានរបស់យួនឈ្មោះ Le Journal d'Extrême-Orient ចេញផ្សាយថ្ងៃទី២៤ ខែមេសា ឆ្នាំ១៩៦២ បានចុះផ្សាយនូវសេចក្តីថ្លែងការណ៍ជាផ្លូវការមួយរបស់អាជ្ញាធរយួននៅខេត្តពាមបន្ទាយមាស (យួនប្តូរទៅជា ហា តៀង ទៅជា កៀង យ៉ាង) ដោយបានវាយតម្លៃ និងទទួលស្គាល់យ៉ាងច្បាស់ថា អូរ កែវ ពិតជាទីក្រុងវ៉េនីស (Venice)។ នេះបញ្ជាក់ឲ្យឃើញច្បាស់ថា យួនបានទទួលស្គាល់ការពិតនៃប្រវត្តិសាស្ត្រ ថាទឹកដីខ្មែរយ៉ាងពិតប្រាកដ។

ចំណែកលោក Dauphin Meunier បានសរសេរសង្ខេបការងាររបស់ពួកឯកទេសស្រាវជ្រាវរកឃើញអូរ កែវ ថាផ្នែកកសិកម្មក៏មានការរីកចម្រើនខ្លាំងណាស់ដែរ។ ព្រះមហាក្សត្រខ្មែរទាំងឡាយនៃនគរហ្វូណន បានយកព្រះទ័យទុកដាក់យ៉ាងខ្លាំងចំពោះកសិកម្ម។ ព្រះអង្គបានត្រាស់បង្គាប់ឲ្យប្រជានុរាស្ត្រកសាង និងថែរក្សាអាងទឹក ជីកប្រឡាយបញ្ចូលទឹកសាបបានជាង ២០០គីឡូម៉ែត្រ។ ព្រះអង្គបានប្រែក្លាយទឹកដីហ្វូណនទៅជាទឹកដីមានជីវជាតិសម្រាប់កសិកម្ម។ ជាមួយគ្នានេះ លោកបេសកជនចិនបាននិទានរៀបរាប់ថា ព្រះមហាក្សត្រខ្មែរទាំងឡាយនៃនគរហ្វូណន មានការប៉ិនប្រសប់ខ្លាំងណាស់ក្នុងនយោបាយកសិកម្ម ព្រះអង្គបានប្រែក្លាយទឹកដីហ្វូណន ជាទឹកដីកសិកម្មដ៏ប្រណិត មានការរីកចម្រើនយ៉ាងក្រៃលែង។

ថ្មីៗនេះ លោក ង្វៀង មិញ សាង Nguyen Minh Sang ប្រធានមន្ទីរវប្បធម៌ខេត្តមាត់ជ្រូក (យួនប្តូរជា អាង យ៉ាង) នៃអាជ្ញាធរវៀតណាមកុម្មុយនិស្ត បច្ចុប្បន្ន បានទទួលស្គាល់ដោយគ្មានអល់អែកថា វប្បធម៌ អូរ កែវ ឬអុក អែវ គឺជាមរតកវប្បធម៌របស់ខ្មែរយ៉ាងពិតប្រាកដ ដែលមានតាំងពីសតវត្សរ៍ទី១ មកម៉្លេះ។ លោក ង្វៀង មិញ សាង Nguyen Minh Sang បានបន្តទៀតថា គេរកឃើញដំណែលនៃវប្បធម៌ខ្មែរនេះ ត្រូវបានរកឃើញនៅគ្រិស្តសករាជ១៩៤២ ហើយបានចាប់ធ្វើការស្រាវជ្រាវនៅគ.ស១៩៤៤ រហូតដល់ ឆ្នាំ១៩៨៣ ។ នៅក្នុងការសិក្សាស្រាវជ្រាវចាស់កកាយនេះ បានរកឃើញវត្ថុបុរាណមួយចំនួន ដូចជាគ្រឿងប្រើប្រាស់ប្រចាំថ្ងៃ ថ្មចម្លាក់ សិវលិង្គព្រះឥសូរ គ្រឿងអលង្ការ ឧបករណ៍តន្ត្រីយ៍ សម្លៀកបំពាក់ និងឥដ្ឋសម្រាប់ប្រើប្រាស់ជាសំណង់ផ្សេងៗជាដើម។ លោក ង្វៀង មិញសាង បានបញ្ជាក់ទៀតថា មរតកវប្បធម៌អូរ កែវ ដែលបានតម្កល់ទុកនៅសារមន្ទីរវប្បធម៌ខេត្តមាត់ជ្រូក Chau Doc មានជាង ១០.០០០មុខ ហើយ[illegible] រដ្ឋាភិបាលសាធារណរដ្ឋសង្គមនិយមវៀតណាម ទទួលស្គាល់ជាថ្នាក់ជាតិនៅឆ្នាំ១៩៩៩។





តទៅទំព័រទី ២៧







# វិយោគកថាជូនចំពោះគ្រួសារសពដែលស្លាប់ក្នុងអគ្គីភ័យថ្ងៃទី១០កក្កដា២០១៤

ដោយ ខ្មែរផុស ស.រ.អា

អគ្គីភ័យទើបនឹងបានឆក់យកជីវិតមនុស្សចាស់៤នាក់ នឹងកូនក្មេង៣នាក់ នាកណ្តាលក្រុងឡូវែល ដែលមានខ្មែររស់នៅច្រើនជាងគេបង្អស់ នាឆ្នេរខាងកើត នៃស.រ.អា.នេះ។ ជាថ្មីម្តងទៀត សហគមន៍ទាំងមូលបានកាន់ទុក្ខជូនគ្រួសារនៃសពដែលសុទ្ធតែខ្មែរ ជាអ្នកធ្លាប់ស្គាល់ការស្លាប់ច្រើនជាងរស់នៅតាំងតែពីច្រើនទស្សវត្សមកហើយ ទើបបានមកដល់តំបន់ថ្មីនៃស.រ.អា។ ដែលខ្លួននឹកស្មានថាអាចរស់នៅសុខសាន្ត គ្មានភិតភ័យតទៅទៀតនោះឡើយ ។ តាំងតែពីព្រឹកនៃថ្ងៃទី១០នោះ សហគមន៍ខ្មែរភ័យញ័ររន្ធត់ ចំពោះការបាត់បង់ដ៏ច្រើនបំផុត ជាលើកដំបូងនៅ ស.រ.អា.នេះ បានចេញមករកក្រុមគ្រួសារឬមិត្តភក្ត្រចំនួនច្រើនរយនាក់ ក្រុមថ្នាក់ដឹកនាំខ្មែរក៏ចេញមកព្រោងព្រាត មានសមាគមខ្មែរជាំដឹកមុខចូលរួមសង្គ្រោះផ្លូវចិត្តនឹងកាយ ជាមួយក្រុមកាកបាតក្រហម Red Cross ក្រុម មេរីម៉ាក វ៉ាឡើរ វិមារក ្ធលលយេ ក្រុមគ្រីស្ទសាសនាឈើ CChurch នៅមានបេក្ខជងតំណាងរដ្ឋខ្មែរទាំង២រូប មានតំណាងក្រុងខ្មែរ នឹងវត្តខ្មែរ ក៏បានចូលរួមជាចុងក្រោយដែរ តែពិសេសទៅទៀតនោះ លោកអភិបាលក្រុង អេលីយ៉ុត រ៉តនី ទឹកមុខក្រៀមក្រំ ក៏បានចេញមកជួយចាត់ចែងតាំងពីព្រលឹមដល់ព្រលប់ដែរ ទូរទស្សន៍គ្រប់ឆាណល់បានផ្សាយពតិមានយ៉ាងរន្ថើនតាំងពីពេលផ្តើមកើតហេតុរហូតដល់យប់ជ្រៅ រីឯនៅទីលាន ប្រកួតកីឡា មានមនុស្ស រាប់សែននាក់ក្រោកឈរ ស្ងឹងស្ងាតចូលរួមមរណទុក្ខគោរពវិញ្ញាណក្ខន្ធនាល្ងាចនោះដែរ ។

ស.រ.អា.បានផ្តោតចក្ខុមើលមកសហគមន៍ខ្មែរ ដោយសារមានខ្មែរស្លាប់ច្រើនក្នុងអគ្គីភ័យតែមួយចរន្តជំនឿថាការស្លាប់រស់នឹងសុខទុក្ខរបស់សហគមន៍ខ្មែរគ្មាននរណាឈឺឆ្អាលទេនោះបានត្រូវផ្លាស់ប្តូរ ។ តើនៅមានចរន្តអ្វីទៀតដែលកំពុងប្តូរដែរនោះ? មនុស្សស្លាប់ក្នុងអគ្គីភ័យលើកនេះ បានត្រូវទទួលការគោរព នឹងសោកស្តាយ យ៉ាងទូលំទូលាយ ពីអ្នកនៅរស់ ពុំមែនជាចៃដន្យទេ គឺប្រាកដជាការស្លាប់ដោយគ្រោះថ្នាក់លើកនេះ ក៏ពុំមែនជាការរំដោះពីសេចក្តីទុក្ខទៀតដែរពីព្រោះអ្នកនៅរស់មានអារម្មណ៍ថាខ្លួនមានការបាត់បង់មនុស្សដែលជាទីស្រឡាញ់របស់ខ្លួន ដែលមិនអាចបំភ្លេចឬរំងាប់បានឡើយ រីឯមនុស្សទៅបាត់ហើយនោះ ក៏ជឿជាក់ថាមិនបានបោះបង់សេចក្តីស្រឡាញ់ចោលពីអ្នកនៅរស់ដែរ ទ្រព្យសម្បត្តិនឹងសម្ភារៈទាំងអស់លែងមានន័យអ្វីចំពោះសេចក្តីស្រឡាញ់ទាំងនោះហើយ ។ អ្នកស្លាប់ទៅហើយក្តី ក៏បានបង្រៀនអ្នកនៅរស់ថ្ងៃនេះនៅលើដែនដីថ្មី ពីភពនៃតម្លៃថ្មីថាជីវិតជាសេចក្តីស្រឡាញ់ ពុំមែនកំណើតជាទុក្ខដូចដែលយើងធ្លាប់ដឹងមកនោះទៀតទេ សេចក្តីស្រឡាញ់រវាងម្តាយឪពុកនឹងកូន រវាងស្រីនឹងប្រុសជាប្តីប្រពន្ធ រវាងជីតាជីដូននឹងចៅវាជាធម្មជាតិចាប់កំណើតជាមួយជីវិតជាស្វ័យប្រវត្ត ។ ចំណែកឯពាក្យ ចាស់ ឈឺ ស្លាប់ របស់ខ្មែរវិញ គេធ្លាប់យល់ថា ជាការវិវត្តន៍ធម្មតានៃជីវិត ដែលកាន់តែមានបទពិសោធន៍ វាក្លាយជាទុក្ខកាន់តែច្រើនដែរ ដែលគេរំដោះចេញពីទុក្ខនោះ ដោយការលះបង់ មិនចង់ឈ្នះមិនចង់មាន... ក៏ប៉ុន្តែការរស់នៅរបស់ជីវិតថ្មីវិញ មានន័យថា ជាការរៀនសូត្រសំរាប់គាំទ្រ ជីវិតឱ្យរីតតែប្រសើរឡើង ដោយប្រឹងឱ្យទាល់តែឈ្នះ មានគម្រោងនឹងមធ្យោបាយទប់ទល់វិបត្តបានគ្រប់យ៉ាងនឹងគ្រប់ពេលវេលា នេះហើយជាវិធីរំដោះទុក្ខបែបថ្មី ដែលយុវជនទាំងខ្មែរទាំងសាសន៍ដទៃ បានចេះដឹងរស់ដោយជោគជ័យរីករាយ ឬក៏មិនទាន់មកដល់ក៏ដោយ។ ងាកទៅមើលពាក្យ ឈឺ នឹង ស្លាប់ ដែលជាឧបត្តិហេតុធម្មតានៃជីវិតមនុស្សណាក៏ត្រូវតែជួបប្រទះដែរនោះ នៅទីនេះយល់ថាជាទុក្ខខាងផ្លូវកាយនឹងចិត្ត គេខិតខំរៀបគម្រោងរុញច្រានឱ្យទៅឆ្ងាយបានមានជម្ងឺខ្លះ គេបានឈ្នះជាស្ថាពរហើយ នៅសល់តែសេចក្តីស្លាប់ជាធម្មជាតិទេ ដែលគេអាចពន្យាពេលបានខ្លះ តែមិនរហូតទេ ។ អ្នកដែលបានស្លាប់ក្នុងអគ្គីភ័យថ្ងៃទី១០នេះ គឺជាការបាត់បង់ជីវិតដោយគ្រោះថ្នាក់ ដោយចៃដន្យ មិនបានត្រៀមខ្លួនដូចអ្នក បាត់បង់ជីវិតធម្មតានោះទេ ទាំងអស់គ្នាយល់ថា ព្រលឹងអ្នកមិនអាចបង្ហាញនូវភាពរីករាយ នឹងក្តីស្រឡាញ់មកដល់អ្នកនៅរស់តទៅទៀតទេ អ្នកបានធ្វើឱ្យអ្នកដទៃនឹកស្តាយចំពោះការធ្វេសប្រហែស ដែលមិនបានឮសម្រែកនៃម៉ាស៊ីនប្រាប់ពីភ្លើងឆេះ ឬឡានទឹកមកយឺតពេល ឬក៏ផ្ទះឈើ នោះឆេះលឿនពេក ឬក៏មិនបានហាត់ប្រុងខ្លួនសម្រាប់ពេលមានអាសន្ន...។ល។ ទាំងអស់នេះ សុទ្ធតែអាចត្រៀមកាពារជាមុនបានទាំងអស់ ដើម្បីរំដោះគ្រោះកំណាចនោះឱ្យឆ្លងផុត ហេតុអ្វីក៏អ្នកនៅរស់មិនអាចជួយអ្នកបាន?

ឃើញការដាច់ខ្សែចំណងគ្រួសារយ៉ាងទាន់ហន់ដូច្នេះ ឃើញចំណងក្តីស្រឡាញ់បាត់បង់តែមួយប៉ព្រិចភ្នែក ព្រលឹងអ្នកស្លាប់ទៅហើយកំពុងរង់ចាំការរៀបចំការពារខ្លួន រៀបចំកិច្ចកាពារក្រុមគ្រួសារពីអ្នកនៅរស់ កុំឱ្យការស្លាប់ដោយគ្រោះថ្នាក់ អាចធ្លាក់មកដល់អ្នកឯទៀតបានដូចពេលមុនទៀត ។ ក្នុងករណីភ្លើងឆេះផ្ទះអស់ច្រើនល្វែងពេលនេះ តម្រូវឱ្យអ្នកជួលឬទិញផ្ទះ មើលចំណុចសុវត្ថភាព ជាអាទិភាពបើត្រូវជួសជុលត្រូវប្រើសេវា ឯកទេសទើបច្បាស់លាស់ហើយចំណេញលុយជាងសេវាងងិត ។ នៅផ្ទះមានកុមារនឹងស្ត្រី គេត្រូវត្រៀមចម្លើយតបនឹងសំនួថា បើមានភ្លើងឆេះក្នុងផ្ទះតើត្រូវធ្វើអ្វីខ្លះ? បើមានទឹកលិច? បើមានខ្យល់ព្យុះ? បើមានរញ្ជួយផែនដី? តើត្រូវធ្វើរបៀបណា ? ដើម្បីសុវត្ថិភាពរបស់គ្រួសារ ។ បើមានចម្លើយនឹងសំនួរសុវត្ថិភាពទាំងនោះរួចហើយ គេត្រូវធ្វើតែស្តសាកល្បងលើចម្លើយនោះជារឿយៗ ដើម្បីឱ្យចាំនឹងដើម្បីកែរតម្រូវ ឬក៏ជួសជុលឡើងវិញ បើការសាកល្បងនោះ ប្រទះនឹងការខ្វះខាតណាមួយជាពិសេសសូមកុំសន្សំសំចៃលើវិស័យសុវត្ថិភាពឱ្យសោះ ទើបវាសនា ទទួលបាននូវអាយុវែងមានជោគជ័យ ។

អ្នកស្លាប់ទៅហើយ ពុំមានអាយុវែងពីណាទៀតទេ តែនឹងមានសេចក្តីស្ងប់ទៅចាប់ជាតិសាជាថ្មីបានប្រសិនបើការស្លាប់នេះបានក្លាយជាគំរូល្អ ទុកជូនជាប្រយោជន៍ នឹងការពិចារណាដល់អ្នកនៅរស់ច្រើនគ្នាបាន ។ គេនឹងអាចពិចារណាទៅដល់ការប្រុងប្រយ័ត្នក្នុងគ្រោះថ្នាក់ផ្សេងទៀតដែរ ដូចជាវិបត្តសង្គម វិបត្តផ្លូវចិត្តជាដើម...។ល។ យើងមានជំនឿថា ការបាត់បង់ជីវិត របស់អ្នកទាំងអស់នឹងមិនឥតប្រយោជន៍ឡើយ ។

សូមឱ្យព្រលឹងអ្នកទាំង ៧នាក់ ជួបតែនឹងសុគតិភព កុំបីឃ្លាងឃ្លាតឡើយ ៕



# ជោគជតារាសីលោកអ្នក
## ទាំង១២ ប្រចាំឆ្នាំរោង

### ឆ្នាំជូត



អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្ដី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំឆ្លូវ



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំខាល



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំថោះ



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំរោង



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូច បំណងផងដែរ ។ បើជាអ្នកប្រកបមុខ របររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំម្សាញ់



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំមមី



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំមមែ



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំវក



រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំរកា



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយ ប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំច



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

### ឆ្នាំកុរ



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ៕




# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ – www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ៏កក់ក្ដៅមួយ ដែលផ្ដល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងធានានូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។



## មណ្ឌលផ្ដល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម (ផ្ដល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ)
- ម្ហូបខ្មែរក្ដៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips

**សូមហៅលេខទូរស័ព្ទ (978) 596-1111**



សមាគមខ្មែរតំបន់ហ្វីឡាដែលហ្វ្យា

CAMBODIAN ASSOCIATION OF GREATER PHILADELPHIA, INC.

### Job Announcement: Executive Director

**The Cambodian Association of Greater Philadelphia (CAGP)** has been serving Cambodian refugees and their families since 1979. We provide innovative bilingual programs and services to meet the combined social, economic, health and educational needs of Cambodian in Philadelphia, many of whom are survivors of the Cambodian genocide or descendants of survivors. CAGP has five full time and five part-time staff working in two separate offices in North and South Philadelphia with an annual budget of approximately $450,000.

**POSITION SUMMARY**

The Executive Director of CAGP will be a strong advocate who understands and can articulate the wide range of issues that affect Cambodian Americans of all ages. The Executive Director will shape, lead and respond to social, cultural, health, political, and economic developments in the community. The Executive Director must have a deep commitment to the advancement of social justice with an understanding of the non-profit sector to lead a multi-issue organization and collaborate with other community-based partners, policy makers, businesses and corporations. The ability to attract donors, write grants and raise funds from individual contributions, corporations, and foundations is required. For more detailed information, please visit our website at www.cagp.org or contact us at edsearch@cagp.org.

**APPLICATION DEADLINE**

We will be reviewing and accepting applications until Thursday, July 31, 2014.

# ANGKOR AUTO SERVICE,INC.

## ហាងជួសជុលរថយន្ត "អង្គរ"

**Free Estimate**

**Auto Body and Maintenance**



BODY WORKS

Auto glass and windshields

Auto Frame Straightening and Painting

មានបទពិសោធន៍២០ឆ្នាំ ជាជាងរថយន្តមានសញ្ញាប័ត្រវាយតម្លៃការងារដោយឥតយកថ្លៃ ហើយយើងជួយសន្សំប្រាក់តម្លៃបន្ថយរបស់អិនស្ចូរិនបានផង យើងផ្ដល់សេវាគ្រប់យ៉ាង :

ENGINE AND TRANSIMISSION SERVICES

State Inspection
Check Engine Light Diagnostic
Timing Belt Services
Complete Tune Up:
-Brake -Muffler -Struts
-Water Pump -A/C
-Bearing Services



From the moment you get into car accident, we will take care of you from towing to calling your insurance, and to get a rental car for you. With Angkor Auto, you can be worried free.

4835 N. 16th Street. Philadelphia, PA 19141

Tel : (215) 455-7810 / Ricky : (215) 485-1425




# មជ្ឈមណ្ឌលពេទ្យ និងទទួលព្យាបាល ស៊ី ប៊ី ស៊ី

07/23/2014

AT NEW LOCATION

ចាប់បើកហើយ

## CBC Medical & Walk-In Center

*Serving the Lowell Community for over 20 years!*

**Mon - Fri 8AM-4PM 978-454-9703**

**ទទួលអ្នកជំងឺថ្មី**

**Primary Care & Urgent Care Services**

*ពេទ្យគ្រួសារ និងសង្គ្រោះបន្ទាន់*

### Services:

- In House Lab & Blood Work
- Immunizations
- Physical Exams
- Emergency Room Follow-Ups
- Nebulizer & Asthma Treatments

- EKG Testing
- Wellness & Preventative Care
- Workers Comp Medical Treatment
- DOT Physicals
- Walk-Ins for Illness & Minor Injury

- ពិនិត្យឈាមនៅមន្ទីរពិសោធន៍ក្នុងមជ្ឈមណ្ឌល
- ចាក់វ៉ាក់សាំងការពារ
- ពិនិត្យរាងកាយ
- តាមដានពិនិត្យនៅបន្ទប់ព្យាបាលបន្ទាន់
- ហ្វឹកហាត់ផ្នែកដកដង្ហើម

- ថតចលនាបេះដូង
- ថែទាំសុខភាពទូទៅសម្រាប់គ្រួសារ
- ទទួលព្យាបាលអ្នកទទួលគ្រោះថ្នាក់នៅកន្លែងធ្វើការ
- ពិនិត្យនិងផ្ដល់លទ្ធផលបញ្ជាក់ដើម្បីទទួលសិទ្ធ
- អាចពិនិត្យពេលឈឺ និងគ្រោះថ្នាក់ដោយមិនបាច់ណាត់ជួប

**យើងខ្ញុំមានសេចក្ដីសោមនស្សជម្រាបជូនលោកអ្នក**
**យើងខ្ញុំនឹងផ្លាស់ទៅទីតាំងថ្មី**

*នៅផ្លូវ16 Pine St Unit #5 Lowell, MA 01851*
*នាថ្ងៃទី 21 កក្កដា ឆ្នាំ 2014*



*Cambodian speaking staff*
*(បុគ្គលិកនិយាយភាសាខ្មែរ)*

*បម្រើសហគមន៍ឡូវែលជាង20ឆ្នាំមកហើយ!*
*បើកសម្ពោធទីតាំងថ្មីនៅថ្ងៃទី 23 កក្កដា ឆ្នាំ 2014 ម៉ោង 9 ព្រឹក*

*យើងខ្ញុំមានកិត្តិយស សូមគោរពអញ្ជើញ ភ្ញៀវកិត្តិយសចូលរួម ការសម្ពោធទីតាំងថ្មី ដោយមានការសូត្រមន្តឲ្យពរពីព្រះសង្ឃខ្មែរ និងពិធីកាត់ខ្សែបូណ៌ ក្រោមអធិបតីភាព អភិបាលក្រុង រ៉ដន អេលៀត និងសមាជិកនៃសភាពាណិជ្ជកម្មក្រុងឡូវែល ។*



**CALL TO MAKE AN APPOINTMENT TODAY**
**(សូមទូរស័ព្ទដើម្បីណាត់ជួប)**

**978-454-9703**

# 16 Pine Street Unit #5 Lowell, MA 01851